ខ្មែរប៉ុស្ដិ៍
THE KHMER POST



KHMER BILINGUAL BIWEEKLY NEWSPAPER
VOLUME 1 ISSUE 4 | NOVEMBER, 16th - 30th, 2007 | ADVERTISING (562) 313-2129 | WWW.THEKHMERPOST.COM

# អៀង សារី និងភរិយា អៀង ធីរិទ្ធ ជាអ្នកណា ?




ដោយៈ មាជ សុវណ្ណារ៉ា, សុផាណ្ណា

អតីតរដ្ឋមន្ត្រីក្រសួងការបរទេស របស់របបកម្ពុជាប្រជាធិតបេតេយ្យ អៀង សារី ហើយនិងប្រពន្ធរបស់លោកគឺ អ្នកស្រី អៀង ធីរិទ្ធ គឺត្រូវបានគេចាប់ខ្លួនកាលពីថ្ងៃច័ន្ទកន្លងមកនេះ ពួកគាត់គឺជាជនទីបី និងទីបួនហើយក្នុងចំណោមមេដឹកនាំធំៗ របស់អតីតមេដឹកនាំខ្មែរក្រហមដែលត្រូវបានតុលាការ កោះហៅមកដើម្បីសាកសួរពីរឿងរ៉ាវសម្លាប់មនុស្សកាលគាត់នៅគ្រប់គ្រងចលនាខ្មែរក្រហមនោះ ។ មន្ត្រីម្នាក់បាននិយាយប្រាប់ឲ្យដឹងថា ប្ដីប្រពន្ធវ័យចំណាស់ពីររូបដែលចាប់ខ្លួននេះ គឺត្រូវបានចាប់ខ្លួនពីផ្ទះវីឡារបស់ពួកគេដែលស្ថិតនៅ ក្នុងទីក្រុងភ្នំពេញ ហើយអ្នកទាំងពីរត្រូវបានប្រឈមមុខនឹងការចោទប្រកាន់ពីបទឧក្រិដ្ឋកម្ម ប្រឆាំងសិទ្ធិមនុស្ស។ ចំពោះលោក អៀង សារី នឹងបន្ថែមលើទោសនេះមួយកំរិតទៀត គឺបទបង្កឧក្រិដ្ឋសង្គ្រាម ។ ពួកគេគឺជាកំពូលអតីតមេដឹកនាំទាំង៥ ដែលបច្ចុប្បន្ននេះ គឺកំពុងតែស្ថិតនៅ ក្រោមការស៊ើបអង្កេតទៅលើករណីបទឧក្រិដ្ឋក្នុងរបបខ្មែរក្រហម កាលពីឆ្នាំ១៩៧៥

(តទៅទំព័រ 6ក)

## ខ្មែរ Long Beach និងជីវិត Homeless ?

- ជំនួបមួយនិយាយពីការទ្រទ្រង់ជីវិតមនុស្ស និងសង្គមឲ្យមានភាពប្រសើរ

ដោយ ៖ មាជ សុវណ្ណារ៉ា

វាជាមោទនភាពសំរាប់ខ្មែរនៅ Long Beach ដែលមន្ត្រីរដ្ឋាភិបាល California

(តទៅទំព័រ 10 ខ)

## វិចារណកថា "យល់ញាតិឃ្លាតច្បាប់" ?

ដោយៈ ពិន សំឌុន

នៅក្នុងអត្ថបទប្រវត្តិសាស្ត្រលើកនេះ ខ្ញុំបានលើកករណីនៃប្រទេសកម្ពុជា ដែលកំពុងរៀបចំខ្លួនចេញពីទ្រង់ទ្រាយ គ្រប់គ្រងរដ្ឋ "កុលសម្ព័ន្ធ"(ខ្លះហៅថា ក្នុង) ឲ្យក្លាយទៅជា

(តទៅទំព័រទី 5 គ)









**ទី-តាំង (Ty Tang)**
Speak Khmer, Thai, Vietmanes, Lao, Chinese, English
Cell: (562) 787-1306
sales@cabetoyota.com

**កណ្ណថារា-យូ**
(Kan You)
និយាយភាសាខ្មែរនិងអង់គ្លេស
Cell: (562)477-9702
sales@cabetoyota.com

**វុធ-ផូ**
(Vuth C. Pho)
និយាយភាសាខ្មែរនិងអង់គ្លេស
Cell: (562)552-6439
sales@cabetoyota.com

# TOYOTA CABE

# នៅក្បែរលោក-អ្នកជានិច្ច!
# គ្មានក្រេឌីត គ្មានបញ្ហា ទទួលកាត់ខែ!








































HYBRID SYNERGY DRIVE®

Hybrid Synergy Drive® powering the Prius, Camry Hybrid and Highlander Hybrid, combines a clean-burning gas engine with an efficient electric motor to deliver excellent fuel economy, low emissions and performance.

**(562) 595-7411 • (800) 576-2223 • Fax: (562) 424-6731**

2895 Long Beach Blvd. Long Beach, CA 90813
1/2 MILE SOUTH OF 405 FRWY Se Habla Español
www.cabetoyota.com 1-877-862-2223

# កម្ពុជាក្រោម: ពីចរន្តជនជាតិភាគតិចទៅជាចលនារកតំបន់ស្វយ័ត

Philadelphia, ដោយ : ពិន សំខុន


ត្រាន ម៉ាន់រិន

គណៈកម្មការនាយក នៃសហគមន៍ខ្មែរកម្ពុជាក្រោម ទើបនឹងថ្លែងបញ្ជាក់ពីជំហរថ្មី របស់ខ្លួន កាលពីចុង ខែតុលា កន្លងទៅនេះគឺបានប្តូរ ពីចរន្តការពារសិទ្ធិបងប្អូនខ្មែរ ដែលរស់ជាជនភាគតិចនៅកម្ពុជា ឲ្យក្លាយទៅចលនាស្វែងរកស្វយ័តភាពនៃតំបន់ទៅវិញ ។ លោក ត្រាន់ ម៉ាន់រិន លោកប្រាក់ សេរីរ៉ុធ និងព្រះតេជគុណ ថាច់ ប៊ីរ៉ុង បានប្រាប់អង្គប្រជុំមួយដែលមានតំណាងខ្មែរជាច្រើនមកប្រជុំនៅវ៉ាស៊ីនតោន ឌីស៊ី អំពីលទ្ធភាព ដែលសហព័ន្ធខ្មែរកម្ពុជាក្រោមទើបនឹងមាននោះយ៉ាងដូច្នេះថា ៖ "អង្គការសហប្រជាជាតិ បានធ្វើសេចក្តីសម្រេចរួមមួយនាពេលថ្មីៗនេះ អនុញ្ញាតឲ្យជនជាតិភាគតិច ដែលមានទទួលការគៀបសង្កត់ ខាងផ្លូវសិទ្ធិមនុស្ស ឬនយោបាយ អាចនឹងបង្កើតរដ្ឋាភិបាលរបស់ខ្លួនមួយបាន ដើម្បីការពារសិទ្ធិរបស់ខ្លួន" ។ ឆ្លើយនឹងសំណួរ របស់ខ្មែរប៉ុស្តិ៍ លោក ត្រាន ម៉ាន់រិន បញ្ជាក់ថា "សហព័ន្ធខ្មែរកម្ពុជាក្រោម នឹងប្រើលទ្ធភាពថ្មីនេះជាមួយនឹងវត្តខ្មែរ ៥៦៥ មានព្រះសង្ឃ ប្រមាណ ២០.០០០អង្គ និងខ្មែរក្រោម៨លាននាក់ ដើម្បីធ្វើឲ្យសម្រេចបំណងការពារសិទ្ធិបងប្អូនខ្មែរ ហើយអាចនឹងទៅដល់ការស្វែងរកស្វយ័តភាពនៃកម្ពុជាក្រោមទៀតផង" ។ សហព័ន្ធខ្មែរកម្ពុជាក្រោម បានចែកចាយរូបផែនទីមួយ ដែលបង្ហាញពីតំបន់ដែលហៅថា កម្ពុជាក្រោម គឺ៖ ពាក់កណ្តាលវៀតណាមខាងត្បូង ផ្នែកខាងក្រោម ។

លោក ត្រាន ម៉ាន់រិន បានសម្តែងការកក់ក្តៅចំពោះការតស៊ូក្នុងវគ្គថ្មីនេះថា "វៀតណាមគ្មានជម្រើសអ្វីទៀតទេ ក្រៅតែពី យកចិត្តខ្មែរក្រោម ដោយវៀតណាម ទើបនឹងបានចូលជាសមាជិកសន្តិសុខ អ.ស.ប ត្រូវតែគោរពច្បាប់ដែលខ្លួនបានចុះហត្ថលេខា ជាមួយ អ.ស.ប ស្តីពីសិទ្ធិជនជាតិភាគតិចនេះ"។

ច្បាប់នោះថ្មីនោះចុះហត្ថលេខាដោយប្រទេស ១៤៣ មានទាំងវៀតណាម និងខ្មែរផងដែរ ។ នៅមាត្រាទី៤ ជាមាត្រាដែល លោក ត្រាន ម៉ាន់រិន និងសហព័ន្ធ និយាយថា"វៀតណាមឥឡូវគោរពច្បាប់ច្រើន ហើយសូម្បីតែចាប់ខ្លួនព្រះសង្ឃអ្វីក៏ប្រើតុលាការ ហើយដែរពុំដូចពេលមុនឲ្យតែធ្វើសកម្មភាពអ្វី នឹងមានការបង្ក្រាបដោយគ្មានក្រែងមតិអន្តរជាតិអ្វីបន្តិចទេ តែមិនមែនបានន័យថា គេ ស្រលាញ់យើងនោះទេ"។ តែករណីរបៀបនេះ សហគមន៍ខ្មែរក្រោមអាចនឹងប្រកាន់ឥរិយាបទមួយដូចគ្នា នឹងខ្មែរសុរិន្ទដែលមាន វាសនាជាប់នឹងប្រទេសថៃ ពុំចង់ត្រឡប់មកភ្ជាប់វាសនា ជាមួយកម្ពុជាកណ្តាលវិញទេ លោក ត្រាន ម៉ាន់រិន ឆ្លើយនឹងខ្មែរប៉ុស្តិ៍ថា "ប្រជាជនណាក៏ចង់បានសុខ បានចម្រើនដែរ អាចនឹងមានករណីនោះបាន ក៏ប៉ុន្តែយល់ថា ខ្មែរក្រោមមានប្រវត្តិជូរចត់ណាស់ជាមួយ វៀតណាម តាំងពីដាំតែអុងនោះទៅ ហើយមួយទៀតខុសគ្នាពីប្រទេសថៃ ដែលមានវប្បធម៌ស្រដៀងគ្នារីឯវៀតណាម នោះខុសគ្នាស្រឡះ លក្ខណៈទាំងពីរនេះហើយ ដែលខ្ញុំនិយាយថា ខ្មែរក្រោមនឹងតស៊ូ រហូតដល់បានសម្រេចបំណងចុងក្រោយរបស់ខ្លួន"។

នឹងដល់ភាពជូរចត់ខ្លះ ដែលខ្មែរខ្លះមានការបន្ទោសដល់អតីតខ្មែរក្រោម លោក ត្រាន ម៉ាន់រិន បន្តដោយអួលដើមកយ៉ាង នោះថា"នៅពេលដែលខ្ញុំឆ្លងដែនមកដល់កម្ពុជា ពេលណាខ្លួនខ្ញុំហាក់ដូចជាមនុស្ស ដែលបែកពីផ្ទះសម្បែងយូរហើយ!នឹកណាស់! ហើយ តែងតែចាត់ទុកខ្មែរកណ្តាលថា ជារៀបច្បងជានិច្ច តែបើពេលនេះមានការមិនយល់គ្នាខ្លះ គឺគ្រាន់តែជាយុទ្ធសាស្ត្រសម្រាប់ដណ្តើម កម្ពុជាក្រោមតែប៉ុណ្ណោះ រីឯចិត្តថ្លើមនៅជាមួយគ្នាជាដរាប"។

ចលនាខ្មែរកម្ពុជាក្រោម មានសម្បុកដ៏សំខាន់នៅ ហ្វីឡាដែលហ្វីយ៉ា និងនៅញូជ័រស៊ី ក៏ប៉ុន្តែមានការបែករំលែកគ្នា កាលពី២ ឆ្នាំមុន ទៅរកការបង្កើតរដ្ឋាភិបាលរំដោះមួយ ដោយ លោក ថាច់ តាន់ដារា និងឧត្តមសេនីយ៍ ថាច់ ចាន់រី ឯនៅកម្ពុជាឯណោះក៏មានចលនាខុសគ្នាមួយ

(តទៅទំព័រ 29 យ)

# ព័ត៌មានពីទីក្រុង Philadelphia

## មណ្ឌលសុខភាពនៃក្រុងហ្វីឡាដែលហ្វីយ៉ា
## Philadelphia Health Care Centers

**មណ្ឌលសុខភាព #1**
(STD Clinic & HIV Testing only)
Broad and Lombard, 1914
(215) 685-6570

**មណ្ឌលសុខភាព #2**
1720 South Broad Street, 19145
(215) 685-1803

**មណ្ឌលសុខភាព #3**
555 S.43rd Sreet, 19104
(215) 685-7500
M-F 8: 30 am – 5pm
T 8:00am –8:30pm
**មានភាសា :** ខ្មែរ វៀតណាម ស្ពែនទីស បារាំង

**មណ្ឌលសុខភាព #4**
4400 Haverford Ave . 19104
(215) 685-7600

**មណ្ឌលសុខភាព #5**
1920 N . 20th Street . 19121
(215) 685-2933

**មណ្ឌលសុខភាព #6**
321W . Girard Ave . 19123
(215) 685-3903

**មណ្ឌលសុខភាព #7**
Strawberry Mansion
2840 Dauphin St . 19132
(215) 685-2424

**មណ្ឌលសុខភាព #8**
131 E . Chelten Ave . 19144
(215) 685-2253

**មណ្ឌលសុខភាព #9**
2230 Cottman Ave . 19149
(215) 685-0639

## អាស័យដ្ឋាន និងលេខទូរស័ព្ទនៅភាគខាងជើងនៃទីក្រុងហ្វីឡាដែលហ្វា
Importan Numbers & Addresses for North Philadelphia

**មន្ទីរពេទ្យកុមារនៃក្រុងហ្វីឡាដែលហ្វា**
Children´s Hospital of Philadelphia - CHOP
34th St & Civic Center Boulevard
Philadelphia PA 19104
(125) 590- 1000

**នាយកដ្ឋានធនធានមនុស្ស និងព័ត៌មាន** DHS Imformation
1515 Arch St
Philadelphia PA 19102
(215) 683- 4347

**ការិយាល័យមណ្ឌលនៅតំបន់ខាងជើង** North Region School District Office
ទំនាក់ទំនងសហគមន៏ Community Relations
201 E . Olney Ave, 2nd Floor
Philadelphia PA 19120
(125) 456- 0998

**ការិយាល័យនៅតំបន់ឥសាន្ត** Northeast Region Office
4101 E Chalfont Dr, Philadelphia PA 19154
(125) 281- 5900

**ការិយាល័យមណ្ឌលអប់រំនៃហ្វីឡាដែលហ្វា** School District Of Philadelphia
ការិយាល័យមណ្ឌលនៃតំបន់ខាងកើត Central East Regional Office
Rivera Building . 5th Floor
2603 N.5th St
Philadelphia PA 19107

**ការិយាល័យមណ្ឌលអប់រំនៃហ្វីឡាដែលហ្វា** School District Of Philadelphia
440 N . Broad St
Interpretation / Translation Services
(125) 440- 4170

## បើអ្នកមិនអាចចិញ្ចឹម ១០០ នាក់បានទេ ដូច្នេះចិញ្ចឹម១នាក់បានហើយ


SOK KALYAN

នេះជាពាក្យស្លោករបស់ "ម្ដាយ តេរេស្ហា " ដែលមិនចង់ឃើញកុមារឥតមានអាហារ ។ សហគមន៍មូលនិធិកុមារខ្មែរបានប្រើពាក្យស្លោក នេះ ដើម្បីធ្វើឲ្យមានការចាប់អារម្មណ៍ដល់កុមារខ្មែរច្រើនរយពាន់ដែលខិតខំកាយសំរាមក្រែងប្រទះម្ហូបអាហារបរិភោគ ។

មូលនិធិកុមារខ្មែរ និងរៀបចំរាត្រីស្រមោលសរប្រមូលប្រាក់ជូនជាជំនួយដល់ក្មេងកំព្រាទាំងនោះ នៅថ្ងៃ សៅ ទី ០៨ ខែ ធ្នូ ឆ្នាំ ២០០៧ ។ វេលាម៉ោង ៦ ល្ងាច នៅភោជនីយដ្ឋាន:

Maxim [illegible] ។

**សំបុត្រចូល ៥០ ដុល្លារ !**



# ឡានប្រកាសលក់ជាង៧ម៉ឺនដុល្លារ ពិតជាឡានប៉ុលពតមែន?

តាមរយៈវេបសាយឈ្មោះ eBay រថយន្តមែកសីដេស ប៊ែន ស៊េរីឆ្នាំ១៩៧៣ ពណ៌ខ្មៅមួយគ្រឿង ត្រូវគេប្រកាសលក់ជា សាធារណៈ ក្នុងតម្លៃជាង៧ម៉ឺនដុល្លារអាមេរិក ។ រថយន្តនេះត្រូវម្ចាស់ជាជនជាតិអង់គ្លេស កំពុងធ្វើការនៅប្រទេសឡាវ អះអាងថា ជា រថយន្តដែលអតីតបងធំទី១ខ្មែរក្រហមឈ្មោះ ប៉ុល ពត (សាឡុត ស) បានប្រើប្រាស់ក្នុងអំឡុងទសវត្សរ៍ឆ្នាំ១៩៧៥ ប៉ុន្តែតាមសាក្សី មួយចំនួនថា វាមិនប្រាកដជារថយន្តដែល ប៉ុល ពត ប្រើកាលនៅកាន់អំណាចសម្លាប់ប្រជាជនខ្មែរនោះទេ ។

រថយន្តដែលសព្វថ្ងៃ ដាក់តាំងនៅសណ្ឋាគារ រណសិរ្សនៃទីក្រុងពេញ ប្រទេសកម្ពុជា ជារថយន្តមែកសីដេស ប៊ែន ពណ៌ខ្មៅ ស៊េរី ១៩៧៣ មានពាក់ស្លាកលេខ គ-៩៦០៩ ភព២ ជាប្រភេទស្លាកលេខចាស់ ។ អ្នកស្រី គឹម ចន្ថា ម្ចាស់សណ្ឋាគាររណសិរ្សប្រាប់ថា វាជា រថយន្តរបស់មិត្តស្រីដែលផ្ញើច្រើនខែមកហើយ ។ មិត្តស្រីអ្នកស្រី ចន្ថា ឈ្មោះ ឈា លីណា មានប្តីជាជនជាតិអង់គ្លេសឈ្មោះ ប៉ូល ហ្វ្រី បានផ្ញើរថយន្តនេះពីខែមិថុនា ហើយប្រាប់ថា គេដាក់លក់ឡាយឡុងឡាននេះ ក្នុងតម្លៃជាង៧ម៉ឺនដុល្លារអាមេរិក(៧១.៨០០ដុល្លារ)។ លោកស្រីថា មិនបានដឹងប្រវត្តិឡាននេះពិតទេ តែថាទំនងជាផលិតឆ្នាំ១៩៦០ និងប្រើប្រាស់នៅកម្ពុជាក្នុងទសវត្សរ៍ទី៧០ ។

លោក ប៉ូល ហ្វ្រី កំពុងបំរើការនៅប្រទេសឡាវ ត្រូវគេស្រង់ការអះអាងបានថា រថយន្តនេះលោកទិញពីមិត្តភ័ក្តិជនជាតិ អូស្ត្រាលីម្នាក់ជាអ្នកស្រាវជ្រាវអំពីរឿងខ្មែរក្រហម ក្នុងតម្លៃ ២,០០០ដុល្លារ ខណៈដែលមិត្តម្នាក់នោះប្រាប់ថា បានទិញពីអ្នកបើកឡាន ឲ្យ ប៉ុល ពត កំពុងប្រើដឹកទំនិញពីខេត្តកំពង់ឆ្នាំងមកភ្នំពេញ ក្នុងទសវត្សរ៍ឆ្នាំ៩០ ក្នុងតម្លៃ១តម្លឹងមាស ប្រហែល៥០០ដុល្លារ គឺបន្ទាប់ពី មិត្តរបស់លោកអះអាងប្រាប់ថា វាដូចគ្នានឹងរថយន្តរបស់ ប៉ុល ពត បានប្រើប្រាស់ ។

កន្លងមករថយន្តនេះ មានអ្នកមើលច្រើននាក់ដែរ តែម្ចាស់សណ្ឋាគាររណសិរ្សនេះប្រាប់ថា អតិថិជនគេបានសើចពេលដែល និយាយអំពីតម្លៃខ្ពស់របស់វា ។ អំពីប្រវត្តិដើម ដែលថាជារថយន្តរបស់ ប៉ុល ពត ប្រើក្នុងសម័យគាត់មានអំណាចនោះ តាមសាក្សីមួយ ចំនួនថាដូចជាមិនប្រាកដទេ ពីព្រោះថា រថយន្តប្រភេទ៣បាំងបែបនេះ មិនមានប្រើក្នុងសម័យខ្មែរក្រហមឡើយ ហើយថា គេអាចបំប៉ោងព័ត៌មានបែបនេះដើម្បីលក់ឡាននេះ បានថ្លៃខ្ពស់តែប៉ុណ្ណោះ ។

តាមព្រឹត្តិប័ត្រប្រចាំថ្ងៃ ភាសាអង់គ្លេសនៅភ្នំពេញ សម្ភាសន៍នឹងអ្នកបើកឡានឲ្យ ប៉ុល ពត(មិនប្រាប់ឈ្មោះ)ថា រថយន្តដែល ប៉ុល ពត ប្រើប្រាស់ធ្វើការងារសម័យឆ្នាំ១៩៧៥-១៩៧៩ នោះមិនដូចឡាន៣បាំងដាក់តាំងបង្ហាញនោះទេ ។ ហើយថា រថយន្ត២ គ្រឿងដែល ប៉ុល ពត ប្រើជារថយន្តប្រភេទ២បាំងធម្មតា ។ បុរសម្នាក់នេះនិយាយដែរថា ឡាន២គ្រឿងរបស់ ប៉ុល ពត បានទុកចោល ពេលដែលវៀតណាមចូលមកដល់ក្រុងភ្នំពេញ ហើយ ប៉ុល ពត គេចខ្លួនតាមរថយន្តធំមួយ ដែលងាយធ្វើដំណើរតាមផ្លូវលោក់ ។

លោក ប៉ូល ជាម្ចាស់រថយន្តនេះបានបញ្ជាក់ក្នុងវេបសាយដែរថា ដោយឯកសារត្រូវបំផ្លាញអស់ក្នុងសម័យខ្មែរក្រហម រថយន្ត ដែលប្រកាសលក់នេះ គ្មានឯកសារគ្រប់គ្រាន់ដើម្បីបញ្ជាក់ទេ ។

លោក ឆាំង យុ នាយកមជ្ឈមណ្ឌលឯកសារកម្ពុជា ដែលជាអ្នកប្រមូលឯកសារអំពីរបបខ្មែរក្រហមបាននិយាយថា តាមការ ស្រាវជ្រាវនានា មានឯកសារបញ្ជាក់ថា មេខ្មែរក្រហមមានរថយន្តទំនើបប្រើ ប្រមាណជា១០គ្រឿង តែរថយន្តដែលប្រកាសលក់ឡាយ ឡុង ៣បាំង ដែលថាជារបស់ ប៉ុល ពត នោះ គឺមិនអាចទេ ។

លោកស្រី លី គឹមសេង ភរិយា នួន ជា អតីតបងធំទី២ កំពុងជាប់ឃុំនិយាយដែរថា តាមការពណ៌នាអំពីភិនភាគរថយន្តដែល តាំងលក់នៅសណ្ឋាគារក្នុងក្រុងភ្នំពេញនេះ គឺមិនស្រដៀងគ្នានឹងរថយន្តដែល ប៉ុល ពត ធ្លាប់ប្រើប្រាស់ទេ គឺខុសគ្នាត្រង់ជាប្រភេទ រថយន្ត៣បាំងនេះតែម្តង ។

ក៏ប៉ុន្តែបើពិនិត្យលើរូបភាពឯកសារ ដែលមានក្នុងសៀវភៅប្រវត្តិខ្មែរក្រហមរបស់លោក ឌី ខាំប៉ូលី នៅទំព័រទី២២ គឺបានបង្ហាញ រូបមួយដែលមានមេខ្មែរក្រហមជាច្រើននាក់ ឈរនៅពីមុខរថយន្តមែកសីដេសមួយគ្រឿង ហើយដែលជារថយន្តស្រដៀងគ្នាជាមួយនិង រថយន្តរបស់លោក ប៉ូល ហ្វ្រី នេះដែរ ។ តាមឯកសារនោះថា ក្នុងរូបរថយន្តនោះអាចជារបស់លោក ប៉ុល ពត, នួន ជា ឬក៏ អៀង សារី ប្រើប្រាស់សម័យនោះក៏ថាបាន ។/ *ខ្មែរប៉ុស្តិ៍*

*(តមកពីទំព័រទី 1គ)*

រចនាសម្ព័ន្ធទំនើប។ រដ្ឋបាលបារាំងបានជួយកែទម្រង់ក្នុងវិស័យគ្រប់គ្រងខ្មែរយ៉ាង ក្រាស់ក្រែល...ក៏ប៉ុន្តែស្រាប់តែមកដល់ឆ្នាំ១៩៤០ បារាំងខ្លួនឯងមានវិបត្តិ ដោយប្រទេសជាឪពុកខ្មែរនេះ បានប្តូររបបពីសាធារណរដ្ឋ បារាំង មកជារដ្ឋបារាំង ដែលកាន់កាប់ប្រទេសបែបឃោជានិយម ហើយចងសម្ព័ន្ធមិត្តជាមួយនឹងប្រទេសពង្រីកទឹកដីមានអាល្លឺម៉ង់ "ណាស៊ី" ខាងអ៊ឺរ៉ុប និងប្រទេសជប៉ុន"ព្រះអាទិត្យរះ" ខាងអាស៊ី ។ ឧទាហរណ៍នេះបានផ្តល់ទស្សនៈជាគំរូនឹងការពិចារណាដល់វិបត្តិនៃ កម្ពុជា សព្វថ្ងៃនេះបានស្មើរគ្រប់អន្លើ ។ តើទស្សនៈជាគំរូនេះ វាផ្តល់ផលវិបាកជាក់ស្តែងយ៉ាងណា ស្តីអំពីការឃ្លាតចេញពីក្បួនច្បាប់ជា តម្រា ដោយសារតែយោគយល់ ឬការស្រលាញ់របស់មនុស្ស ។ ប្រទេសបារាំងនៅដើមសង្គ្រាមលោកលើកទី២ បានប៉ុនប៉ងថែរក្សាជីវិតពលរដ្ឋខ្លួន និងបតិកភណ្ឌប្រវត្តិសាស្ត្រជាតិ យ៉ាងប្រឹងប្រែងប្រឈមមុខនឹងការរៀបចំទ័ពចម្បាំង ដ៏មហិមារបស់"អាល្លឺម៉ង់ ណាស៊ី"។ ឥរិយាបទនេះគេបានឃើញដូចគ្នានៅប្រទេស បែលហ្ស៊ិក ឬអ៊ីតាលី គឺគេនាំគ្នាក្លាយទៅជាសម្ព័ន្ធមិត្ត នៃប្រទេសខ្លាំងមួយនោះ គឺអាល្លឺម៉ង់ ។

តែប្រទេសខ្លាំងមួយនោះ ប្រកាន់យកសីលធម៌ផ្សេងមួយដែលមនុស្សទូទៅគោរពមិនបាន គឺការស្រលាញ់ជាតិសាសន៍ខ្លួន ឯងហួសហេតុថា ជាជនជាតិបរិសុទ្ធលើសគេ គឺការប៉ុនប៉ង ពង្រីកទឹកដី និងឥទ្ធិពលរបស់ខ្លួនទៅលើជាតិសាសន៍ដទៃ ដោយកម្លាំង អាវុធ ។ ទស្សនៈជាគោលជំហរសំខាន់របស់បារាំង គឺ"សាធារណរដ្ឋ" រដ្ឋដែលចេះស្តាប់យោបល់ពលរដ្ឋរបស់ខ្លួនបានត្រូវឃ្លាតដោយ សារខ្លាចបាត់បង់ជីវិត និងទ្រព្យសម្បត្តិរបស់ខ្លួន ដូច្នេះរដ្ឋបារាំងពុំបានប្រឈមមុខប្រឆាំង នឹងអាល្លឺម៉ង់ទេ ផ្ទុយទៅវិញ ពលរដ្ឋគេនៅ រក្សាគោលជំហរដើមស្មើគ្រប់គ្នា ហើយបញ្ជូនកូនចៅ ប្តី ឬប្រពន្ធឲ្យចូលរួមចលនារំដោះគ្រប់កន្លែងដែរ ។ កាប្រទូស្តរាយនេះនាំឲ្យ មានការបង្ក្រាប ហើយចាប់អ្នកតស៊ូយកទៅបាញ់ចោលយ៉ាងក្រៃលដែរ ។

ចុះឥទ្ធិពលនេះ ជះមកប្រទេសកម្ពុជារបៀបណា ? នៅភាគអាស៊ីវិញ ប្រទេសជប៉ុន ក៏ដូចអាល្លឺម៉ង់ដែរ មានទស្សនៈអាត្មា និយមនឹងពង្រីកដីឥទ្ធិពលដូចគ្នា ។ ឥណ្ឌូចិនរបស់បារាំងឃើញកម្លាំងទ័ពដ៏មហិមាយ៉ាងនោះ ក៏ប្រកាន់ឥរិយាបទដូចប្រទេសដើមរបស់ ខ្លួនចងសម្ព័ន្ធមិត្តជាមួយជប៉ុន ហើយកាន់កាប់ឥណ្ឌូចិនជំនួនជប៉ុន តាមមហិច្ឆិតារបស់ជប៉ុនចាប់ពីថ្ងៃទី៣០ សីហា ឆ្នាំ១៩៤០នោះមក ។ តែមុនមកដល់ថ្ងៃនេះ បារាំងនៃ"សាធារណរដ្ឋ"បានផ្តល់ការអប់រំដល់យុវជនខ្មែរមួយចំនួន ឲ្យក្លាយទៅជាបញ្ញវន្តខ្មែរ មានលោក សឺង ង៉ុកថាញ់ លោក ប៉ាច ឈឿន ទ្រង់យុត្តិវង្ស ស៊ីវត្ថិ លោក អៀវ កើស លោក ជាម វ៉ែ លោក ស៊ឹម វ៉ា...។ល។ យុវបញ្ញាវន្តទាំងនោះពុំសូវ ចូលចិត្តបារាំងទេ ដោយសារតែទស្សនៈចង់បានឯករាជ្យឲ្យកម្ពុជាវិញ ហើយពួកគេបានទទួលចំណេះដឹង និងការអនុវត្តទ្រឹស្តីសេរីក្នុងការបញ្ចេញមតិនោះគ្រប់គ្រាន់ ។

ក្នុងការមិនចូលចិត្តបារាំងរបស់យុវបញ្ញាវន្ត សឺង ង៉ុកថាញ់ ក៏សម្តែងការចូលចិត្តជប៉ុន ហើយលើកដំកើងនយោបាយវាទី ឥទ្ធិពលជប៉ុនលើអាស៊ី នៅទៀកយៀ ថ្ងៃទី២៦ ធ្នូ ឆ្នាំ១៩៤២ ហើយដើម្បីរំដោះកម្ពុជាពីបារាំងនេះ លោក ហែម ជាវ, នួន ឌួង, សឹងង៉ុក មិញ, (ឬអាចារ្យមាន)និងចលនាបាតុកម្មនាវត្តឧណ្ណាលោម ថ្ងៃទី២០ កក្កដា ១៩៤២ ជាដើម ។ ពេលជាមួយគ្នានោះ នៅព្រះបរមរាជ វាំងឯណោះ ក៏មានចលនាមិនចូលចិត្តបារាំងដែរ មានព្រះអង្គម្ចាស់ស៊ីសុវត្ថិមុនីរ៉េត ជាយុវបញ្ញាវន្តក្នុងវាំងជាដើម តែបារាំងនៃរបប ណាស៊ីបានសម្រេចប្រគល់រាជ្យសម្បត្តិ ថ្វាយព្រះអង្គម្ចាស់នរោត្តម សីហនុ ទៅវិញ ដោយសារភាពក្មេងខ្ចី និងទស្សនៈរបស់ព្រះអង្គ ទោទន់ទៅរកបារាំង ។ ព្រះបាទ សីហនុ វរ្ម័ន បានឡើងគ្រងរាជ្យដោយសាររបបវិស៊ី លើកនាឆ្នាំ១៩៤១ លោក សឺង ង៉ុកថាញ់ បាន ឡើងជានាយករដ្ឋមន្ត្រីខ្មែរ ដោយសារបារមីនៃ"របបជប៉ុនព្រះអាទិត្យរះ"ឆ្នាំ១៩៤៥ ក៏ប៉ុន្តែអាទិទេពនៃកម្ពុជានាពេលនោះ សុទ្ធសឹងតែ យោជានិយម ប្រកាន់ពូជសាសន៍និយម និងវាត់ទឹកដីនិយមទាំងពីរប្រទេស ។ មកទល់ត្រឹមនេះយើងគួរមានចម្ងល់មួយថា "នេះគឺជា ជោគជ័យនៃមនុស្សពីរនាក់ដែលគេដឹងថា ជាវរជនខ្មែរ តើនេះអាចនិយាយបានទេថា ជាជោគជ័យនៃកម្ពុជា ?"។

ចម្ងល់នៅពេលនេះ ធ្វើឲ្យយើងយល់ថា ការស្រលាញ់លើវីរភាពដ៏ខ្ពង់ខ្ពស់ នៃមគ្គុទេសទាំងពីរក្នុងឧទាហរណ៍ ប្រវត្តិសាស្ត្រ ពិភពលោក យើងនាំគ្នាភ្លេចផ្គូរផ្គង ស្នាដៃរបស់វីរបុរសខ្មែរយើងទៅនឹងសីលធម៌ដែលពិភពលោក រាប់ទាំងខ្មែរយើងផងធ្លាប់ទទួលយក បាន ។ ការយោគយល់មិត្តដែលជាមគ្គុទេសដ៏ប្រសើររបស់យើង អាចនឹងធ្វើឲ្យយើងឃ្លាតឆ្ងាយពីសីលធម៌ ជាច្បាប់ធម្មជាតិ ដែលនាំមកនូវសេចក្តីចំរើន ។ តើពិភពលោកក្នុងប្រវត្តិសាស្ត្រគេដោះស្រាយបញ្ហា"យល់ញាតិឃ្លាតច្បាប់ "នេះរបៀបណា ? សូមអញ្ជើញតាម ដានវិភាគលើប្រវត្តិសាស្ត្រនៅលេខក្រោយ ។/

*(តមកពីទំព័រទី 1ក)*

ដល់ឆ្នាំ ១៩៧៩ ដែលជារបបដែលពួកគេបានគ្រប់គ្រង ប្រទេសកម្ពុជាទាំងមូលនោះ ពេលនោះគេបានបង្ខិតបង្ខំប្រជាជន តែគេបែរជាគិតថា យុត្តិធម៌ហើយសំរាប់ប្រជាជនទាំងនោះ ។

អៀង សារី ដែលជានិស្សិតកម្មុយនីស្តដែលសិក្សានៅបារាំងបានលេចមុខមាត់ នឹងមានមុខល្បីនៅសាធារណៈនេះ គឺនៅពេលដែលរូបគេបានចូលរួមក្នុងចលនាសម្ងាត់ខ្មែរក្រហម ដែលនៅក្នុងខណៈនោះដែរ ប្រពន្ធរបស់គាត់ក៏បានក្លាយទៅជាអ្នកដែលមានឈ្មោះល្បីនៅក្នុងរបបវាលពិឃាតនោះដែរ ដែលកាលនោះគាត់គឺជាមន្ត្រីសង្គមកិច្ច និងជាអ្នកអប់រំសិក្សាធិការនៅក្នុងរបបនយោបាយនោះ រហូតដល់របបនេះរលាយ បាត់ទៅវិញ ។ មានប្រជាជនជាង២លាននាក់ ដែលត្រូវបានស្លាប់ដោយការអត់អាហារ និងធ្វើការហួសកម្លាំង តែបើមិនដូច្នេះទេ គឺត្រូវស្លាប់ ដោយការកាត់ទោស ។ នៅក្នុងរបបខ្មែរក្រហមនេះ គឺជារបបមួយដែលលុបបំបាត់សាសនា សាលារៀន ហើយក៏គ្មានរូបិយប័ណ្ណអ្វីទាំងអស់ ។ ប្រជាជនរាប់លាននាក់ត្រូវបានគេជំលៀសឲ្យទៅធ្វើស្រែ ចំការ នៅតាមជនបទដែលគេគិតថា អភិឌ្ឍន៍ផ្នែកកសិកម្ម និងធ្វើឲ្យប្រទេសនេះ នឹងក្លាយ ជាដែនដីដ៏សែនសុខសាន្ត ។


អៀង សារី ខៀវ សំផន

មេដឹកនាំកំពូលរបស់របបនេះ គឺលោក ប៉ុល ពត ដែលបានស្លាប់កាលពីឆ្នាំ ១៩៩៨ ប៉ុន្តែអ្នកជំនួយការរបស់គាត់គឺ នួន ជា និង ឌុច ដែលអ្នកទាំងពីរនេះ ដែលជាអ្នកមើលការខុសត្រូវនៅមជ្ឈមណ្ឌលធ្វើទារុណកម្មនៅឯគុកទួលស្លែង ហើយពួកគេពីរនាក់នេះ ក៏ត្រូវបានតុលាការ ចេញដីកាឲ្យចាប់ខ្លួនកាលពីដើមឆ្នាំនេះ ពីបទបង្កឧក្រិដ្ឋកម្មសង្គ្រាម ហើយឧក្រិដ្ឋកម្មប្រឆាំងសិទ្ធិមនុស្ស ។

អ្នកដែលសង្ស័យទី៥នោះ គឺកំពុងតែស្ថិតនៅក្រោមការស៊ើបអង្កេតនៅឡើយ ហើយក៏មិនទាន់កំណត់ឈ្មោះនៅឡើយដែរ ប៉ុន្តែមាន អ្នកខ្លះគេជឿជាក់យ៉ាងខ្លាំងថា អ្នកទី៥ ដែលត្រូវចាប់ខ្លួនបន្ទាប់មកទៀតនោះ គឺលោក ខៀវ សំផន អាយុ៧៦ឆ្នាំ កាលពីនៅក្នុងរបបចលនាខ្មែរក្រហមនោះគាត់មានតួនាទីជាប្រមុខរដ្ឋ ។ តុលាការបានបើកធ្វើការកាត់ក្តីនេះគឺតាំងពីឆ្នាំមុន គឺបន្ទាប់ពីមានការចរចាគ្នារួចមករវាង UN និងរដ្ឋាភិបាលរបស់កម្ពុជា ។

ការកាត់ក្តីទៅលើអតីតមេដឹកនាំកំពូល ទាំងនេះ គឺរំពឹងថា នឹងបានប្រព្រឹត្តិទៅនៅក្នុងឆ្នាំ ២០០៨ ។ ចំពោះការកាត់ក្តីនេះ ក៏ធ្វើឲ្យមានការខ្វល់ខ្វាយផងដែរ ចំពោះអាយុវ័យរបស់ចុងចោទទាំងនោះ គឺអាចនឹងស្លាប់មុនពេលដែលបាន ឃើញតុលាការកាត់ទោសនៅក្នុងបន្ទប់តុលាការនោះ ។ ឌុច ដែលមានអាយុ៦៥ ឆ្នាំ ដែលមានអាយុក្មេងជាងគេ ក្នុងចំណោមអ្នកទោសដែលជាអតីតខ្មែរក្រហមនោះគឺបានសាច់ញាតិប្រាប់ថា គាត់គឺមានសុខភាពល្អទេ ។ អ្នកទោសដែលជាអតីតមេគុក ត្រូវបានចាប់ឃុំឃាំងតាំងពីខែកក្កដាកន្លងមកនេះ ។ ប៉ុន្តែ សំរាប់ នួន ជា វិញ គឺនៅមានលោកវេជ្ជបណ្ឌិតពីរបីនាក់ ដែលបានចេញចូលពិនិត្យសុខភាពគាត់តាំងពីគាត់ត្រូវបានចាប់ខ្លួន កាលពីខែកញ្ញាមកនោះ ។ លោក អៀង សារី គឺជាមនុស្សដែលត្រូវបានគេជឿថា គាត់មានអាយុ៧៨ឆ្នាំហើយ ហើយថែមទាំងសុខភាពនោះក៏មិនសូវជាធានាប៉ុន្មានដែរ ដោយសារតែសុខភាពកាន់តែទន់ខ្សោយ ហើយរួមផ្សំជាមួយនឹងការមានជម្ងឺបេះដូង លើសពីនេះទៅទៀតនោះ គឺគាត់ត្រូវឧស្សាហ៍ធ្វើដំណើរ ទៅកាន់ទីក្រុងបាងកក ដើម្បីព្យាបាលជម្ងឺព្រោះទីនោះមានឧបករណ៍ពេទ្យគ្រប់គ្រាន់ សំរាប់ព្យាបាលជម្ងឺរបស់គាត់ ។ ចុះបើគាត់ជាប់ឃុំឃាំង វិញ តើសុខភាពគាត់ទៅជាយ៉ាងណា? ។

ថ្វីបើ អៀង សារី ត្រូវបានលើកលែងទោសពីព្រះមហាក្សត្រពីបទដែលគាត់បានធ្វើឲ្យមនុស្សស្លាប់ជាច្រើន បន្ទាប់ពីការចុះចូលជាមួយ នឹងរដ្ឋាភិបាលនៅឆ្នាំ ១៩៩៦ នោះក៏ដោយ តែលោក អៀង សារី នូវតែត្រូវបានគេព្យាយាមចោទប្រកាន់ទៅលើបទឧក្រិដ្ឋ ផ្សេងៗទៀតដោយ យោងទៅលើកច្បាប់នោះ ។

នៅក្រោមរបបខ្មែរក្រហម អៀង សារី បានក្លាយជាមនុស្សដែលមានទំនុកចិត្ត ។ មានអ្នកចេះដឹងជាច្រើននាក់ ដែលទទួលស្គាល់ថាលោក អៀង សារី គឺជាមនុស្សដែលមានចំណេះដឹងជ្រៅជ្រះណាស់ ហើយនឹងចេះប្រើចិត្តសាស្ត្រ និយាយជាមួយប្រជាជនកម្ពុជាដែលបានចាក ចេញពីប្រទេសឲ្យត្រលប់មកវិញបាន ។ ពេលពួកគេទាំងនោះមកវិញ ក៏ត្រូវបានសម្លាប់ចោល ដោយមិនរើសមុខដោយគ្រាន់តែអ្នកទាំងនេះ មានមុខសញ្ញាខុសបន្តិចបន្តួចនោះ ។

**ជីវតពិត អៀង សារី ហៅ សមមិត្ត វ៉ាន់**

អៀង សារី កើតឆ្នាំ១៩៣០ នៅខេត្តត្រាវិញ ប្រទេសវៀតណាមខាងត្បូង ។ អៀង សារី បានរៀបការជាមួយ ខៀវ ធីរិទ្ធ ហៅ អៀង ធីរិទ្ធ ឆ្នាំ ១៩៥០ អៀង សារី បានទទួលអាហាររូបករណ៍ទៅសិក្សានៅប្រទេសបារាំង ហើយបានក្លាយទៅជាសមាជិកបក្សកុម្មុយនីស្តបារាំង ។ អៀង សារី បានវិលត្រលប់មកប្រទេសកម្ពុជាវិញនៅឆ្នាំ១៩៥៧ ហើយបានចូលជាសមាជិកបក្សប្រជាជនបដិវត្តន៍ខ្មែរ ។ អៀង សារី បង្រៀននៅវិទ្យាល័យកម្ពុជបុត្រ រហូតដល់ឆ្នាំ១៩៦៣ ដែលនៅពេលនោះបានរត់ចូលព្រៃតស៊ូ។

*(តទៅទំព័រទី 8 ក)*

# ការវិវឌ្ឍន៍សេដ្ឋកិច្ចកម្ពុជាមិនទៅមុខបើអំពើពុករលួយនៅតែមាន

នៅឯកិច្ចប្រារព្ធឡើងនូវវេទិកាសេដ្ឋកិច្ចពិភព លោក កាលពីថ្ងៃទី៣១ តុលា អ្នកសេដ្ឋកិច្ច បានប្រមើលឃើញថា អំពើពុករលួយក្នុងកម្ពុជា នៅតែជាបញ្ហារាំងស្ទះ ដល់ដំណើរវិវឌ្ឍន៍សេដ្ឋ កិច្ចក្នុងប្រទេសក្រីក្រមួយនេះដដែល ថ្វីបើមាន ការកែទម្រង់ និងមានការរីកចំរើនជឿនលឿនខ្លះ ក្នុងវិស័យនេះក្នុងរយៈចុងក្រោយនេះក៏ដោយ ។

វាគ្មិននៅឯវេទិកា ដែលជាអ្នកជំនាញ អភិវឌ្ឍន៍សេដ្ឋកិច្ច មកពីវិទ្យាស្ថានសេដ្ឋកិច្ច កម្ពុជា បានលើកឡើងថា តាមការស្ទាបស្ទង់ មួយដែលសិក្សាទៅលើក្រុមហ៊ុន១០៥ ដោយ វិទ្យាស្ថាននេះកាលពីក្នុងអំឡុងខែមិនា និងមេ សាដើមឆ្នាំ បានទទួលចម្លើយ៧៩% តបថា អំពើពុករលួយនៅតែជាឧបសគ្គ ក្នុងការ អភិវឌ្ឍន៍សេដ្ឋកិច្ចនៅកម្ពុជា ហើយថា ចំនួន នេះបានកើនបន្តិចជាងឆ្នាំ២០០៦ ដែលចម្លើយ ដដែលនេះមានដល់៨០% ។

លោក ហង្ស សំបូរពិសិដ្ឋ នៅក្នុងការចាត់ ថ្នាក់លើកទី៤ ក្នុងការប្រកួតប្រជែងសន្ទស្សន៍ សេដ្ឋកិច្ចលើពិភពលោក កម្ពុជាស្ថិត ក្នុង លំដាប់ទី១១០ ពីក្នុងចំណោមប្រទេស១៣១ ដែលគេធ្វើការសិក្សា ។ លំដាប់នេះបើធៀបនឹង ឆ្នាំមុន កម្ពុជានៅលេខរៀងទី១០៦ តែឆ្នាំ ២០០៦មានប្រទេសតែ១២២ទេ ដែលគេធ្វើការ សិក្សានៅក្នុងពិភពលោក ។ តាមលំដាប់នេះ កម្ពុជា គឺនៅដាច់ឆ្ងាយពីប្រទេស ក្នុងតំបន់ មានប្រទេសសិង្ហបុរី នៅលំដាប់ទី៧ ប្រទេសថៃ នៅលំដាប់ទី២៨ ឥណ្ឌូនេស៊ី ទី៥៤ និងវៀត ណាម ទី៦៨ ។ សហរដ្ឋអាមេរិក ស្ថិតនៅលើ គេ ចំណែកប្រទេស ឆាត គឺនៅលំដាប់ក្រោមគេ បំផុត ។ ពិន្ទុរបស់កម្ពុជា ដែលបានពីការស្ទាប ស្ទង់ទៅលើទិន្នន័យសេដ្ឋកិច្ច ទៅលើហេដ្ឋា រចនាសម្ព័ន្ធ សុខាភិបាល អប់រំ ការបណ្តុះ បណ្តាល ការច្នៃប្រឌិត និងស្ថេរភាពម៉ាក្រូសេដ្ឋ កិច្ច គឺកម្ពុជាមាន៣,៤៨ពិន្ទុ បានកើនបន្តិច ជាងឆ្នាំ២០០៦ ដែលមានតែ ៣,៤៤ ពិន្ទុ ។

នៅក្នុងសុន្ទរកថាមួយ ពីដើមអាទិត្យនេះ សម្តេចអគ្គមហាសេនាបតីតេជោ (គោរម្យងារ ថ្មី) ហ៊ុន សែន នាយករដ្ឋមន្ត្រី បាន ជំរាបទៅ ក្រុមនិស្សិតនៅវិទ្យាស្ថានជាតិអប់រំថា កម្ពុជា ហាក់ដូចជាមានហុងស៊ុយល្អ តាំងពីព្រះមហា ក្សត្រថ្មីឡើងគ្រងរាជ្យពីឆ្នាំ ២០០៤ មក ។ សម្តេចតេជោ ហ៊ុន សែន ថ្លែងថា តាំងពីព្រះ ករុណា សម្តេចព្រះបរមនាថ នរោត្តមសីហមុនី ឡើងគ្រងរាជ្យសន្ទស្សន៍កំណើន សេដ្ឋកិច្ចបាន កើនឡើងពីរខ្ទង់រហូត ថ្វីបើឆ្នាំនេះលោកមិន ទាន់ហ៊ានទិទស្សន៍ឲ្យជាក់លាក់ក៏ដោយ។

លោក ហ៊ុន សែន ឲ្យមានប្រសាសន៍ថា ឆ្នាំ ២០០៤ កំណើនសេដ្ឋកិច្ចជាតិ (GDP) កើន ដល់១០% មកដល់ឆ្នាំ២០០៥ មានកំណើន ១៣,៥% ហើយនៅឆ្នាំ ២០០៦ សន្ទុះកំណើន សេដ្ឋកិច្ចនៅក្នុងកំរិត១០,៨%ដដែល ។ លោក បានព្យាករណ៍ទុកថា ឆ្នាំ២០០៧ កំណើនសេដ្ឋ កិច្ច គឺមិនទាបជាង ៩,៥%ទេ។

នៅក្នុងពិធីចែកសញ្ញាប័ត្រ និស្សិតវិទ្យាស្ថាន ឯកទេសនៃកម្ពុជាពីថ្ងៃទី៣០ តុលានេះដែរ លោក ហ៊ុន សែន បង្ហាញពីការចង់ជម្រុញ ល្បឿនអភិវឌ្ឍន៍ ក្នុងវិស័យឧស្សាហកម្មដើម្បី នឹងបន្តឲ្យកម្ពុជា មានកំណើនសេដ្ឋកិច្ចជា ប្រចាំ ។ លោកថា កន្លងមកមានតែ អនិកជន ទេដែលបំពីងលើវិស័យពាណិជ្ជកម្ម និងសេវា កម្មនានាក្នុងប្រទេស តែឥឡូវចំនួនជនជាតិខ្មែរ រកស៊ីលក់ដូរបានកើនច្រើនៗ ហេតុ នេះលោក ចង់ឲ្យមានការជំរុញខាងវិស័យឧស្សាហកម្មវិញ ពីព្រោះវិស័យនេះ នឹងធ្វើឲ្យសេដ្ឋកិច្ចជាតិកើន លឿនជាងវិស័យកសិកម្ម ។

លោក ហ៊ុន សែន បង្ហាញទិន្នន័យអំពី កំណើននេះថា ឆ្នាំ១៩៩៣ វិស័យកសិកម្មរួម វិភាគទានក្នុងក្នុង GDP ដល់៤៥% វិស័យ ឧស្សាហកម្មមាន១២% និងសេវាកម្មនានា ១១%(ឆ្នាំ១៩៩៤)។ ដែលបច្ចុប្បន្នចំនួននេះ បានកើនច្រើន គឺវិស័យកសិកម្មមកនៅត្រឹម ២៥% ឧស្សាហកម្មកើនដល់២៥% និងសេវា កម្មនានាកើនដល់៣៦% ។ តទៅលោក ហ៊ុន សែន គិតថា លោកចង់ឲ្យវិស័យកម្ពុជាមាន ១០% ក្នុង GDP វិស័យឧស្សាហកម្មកើនដល់ ៤០%ក្នុង GDP ហើយផ្នែកសេវាកម្មកើនដល់ ៥០% ក្នុង GDP នៅក្នុងអនាគត ។

តាមសេចក្តីប្រកាសនៅក្នុងសន្និសីទ សហ ប្រជាជាតិអំពីពាណិជ្ជកម្ម កំណើនវិនិយោគទុន ផ្ទាល់ពីបរទេសនៅឆ្នាំ២០០៦មាន ២៧% គឺ ស្មើនឹងទឹក៤៨៣លានដុល្លារអាមេរិក ។

តែទោះជាយ៉ាង តាមពិន្ទុះបានផ្តល់ឲ្យផ្នែក លើសំយោគនៃការស្ទាបស្ទង់សេដ្ឋកិច្ច ពិភព លោក ពិន្ទុះល្អរបស់កម្ពុជាដល់១ គឺខាង ចំណាយយកកម្លាំងពលកម្ម ដោយគ្មានប្រាក់ ឈ្នួល ឬគ្មានសំណងដល់និយោជិក នឹងបាន ជាប់លេខ៥អំពីអត្រាបង់ពន្ធសរុប និង ការចូល រួមរបស់ស្ត្រីក្នុងការងារពលកម្ម ។

មន្ត្រីក្រសួងពាណិជ្ជកម្ម បានហៅការចាត់ ថ្នាក់ប្រទេសកម្ពុជានេះថា អាចជាការរាំងដល់

(តទៅទំព័រទី 12 ង)



ខ្ញុំខ្មែរ
ម៉ែខ្មែរ
អានកាសែត
ខ្មែរ

OUR READER ENJOYS READING THE KHMER POST NEWS

(តមកពីទំព័ទី 6 ក)

ក្រោយមក អៀង សារី បានក្លាយជាមេបញ្ជាការកង ទ័ពនៅភូមិភាគឥសាន ។

ឆ្នាំ១៩៧៦ អៀង សារី ត្រូវបានតែងតាំងជាឧបនាយករដ្ឋមន្ត្រីទីមួយ ទទួលបន្ទុកកិច្ចការបរទេស ។ អៀង សារី ក៏ជាសមាជិកគណៈកម្មាធិការមជ្ឈិម និងគណៈកម្មាធិការអចិន្ត្រៃយ៍បក្សផងដែរ ។ អៀង សារី បានចុះចូលជាមួយរាជរដ្ឋាភិបាលកម្ពុជានៅឆ្នាំ ១៩៩៦ ។ បច្ចុប្បន្ន អៀង សារី រស់នៅយ៉ាងមានសេរីភាពនៅក្នុងប្រទេសកម្ពុជា ហើយកូនប្រុសឈ្មោះ អៀង វុធ គឺជាអភិបាលរងទី១ក្រុងប៉ៃលិន ។

តាមការស្រាវជ្រាវបន្ថែមរបស់លោក ឡុង ដានី ពីប្រវត្តិរបស់ អៀង សារី ហើយបានចុះផ្សាយដោយ ទស្សនាវដ្ដីស្វែងរកការពិតលេខ ៨១ ខែ កញ្ញា ២០០៦ បានឲ្យដឹងថា អៀង សារី មានស្រុកកំណើតនៅភូមិ ហ៉ រឡាក់ព ឃុំ លឿងហ៉ រ ស្រុកចូវថាញ់ ខេត្តត្រាវិញ ។ ផ្ទះកំណើតរបស់ អៀង សារី សង់ពីថ្មផ្ទាល់ដីដំបូលប្រក់ហ្វីប្រូស៊ីម៉ង់ត៍ ។ បច្ចុប្បន្នផ្ទះនេះ ក្មួយស្រីរបស់ អៀង សារី កំពុងរស់នៅ ។ យើងបាន ជួបក្មួយប្រុសរបស់ អៀង សារី ឈ្មោះ ថាច់ វុត្ថា និងក្មួយប្រសាឈ្មោះ ហ៊ុម (ថាច់ វុត្ថា និងប្រពន្ធ ហ៊ុម ត្រូវជាកូនរបស់បងស្រី អៀង សារី ) ។ វុត្ថា បានឲ្យដឹងថា ឪពុករបស់ អៀង សារី ឈ្មោះ គឹម រៀម ជាជនជាតិខ្មែរកម្ពុជា


អៀង សារី

ក្រោម និងម្ដាយឈ្មោះ ច្រិន ធិឡូយ Tran Thi Loi ជនជាតិចិន ដែលរត់មកពីស្រុកចិន តាំងពីតូចៗជាមួយឪពុកម្ដាយ ។

អៀង សារី មានបងប្អូន៣នាក់ ។ បងទី១ ឈ្មោះ គឹម ចូវ ភេទប្រុស នៅក្នុងរបបខ្មែរក្រហមពីឆ្នាំ១៩៧៥-១៩៧៩ មានឋានៈជាប្រធានផ្សារអូរឫស្សី ។ នៅអំឡុងទសវត្សរ៍ឆ្នាំ ៨០ ចូវ និងក្រុមគ្រួសារបានភៀសខ្លួនទៅរស់នៅរដ្ឋផ្លរីដាសហរដ្ឋអាមេរិក ។ បងទី២ឈ្មោះ គឹម ធីកូវ ភេទស្រី មានប្ដីឈ្មោះ ថាច់ សុង (បច្ចុប្បន្នស្លាប់ទាំងពីរនាក់ប្ដីប្រពន្ធ) ។ កូវ មានកូន៧នាក់រស់នៅប្រទេសកម្ពុជា និង៣ នាក់ទៀតរស់នៅភូមិកំណើត ។

អៀង សារី ជាកូនពៅ ដែលមានឈ្មោះកំណើតថា គឹម ស្រ៊ី ។ អៀង សារី បានមករស់នៅស្រុកខ្មែរតាំងពីកុមារភាព ។ អៀង សារី ធ្លាប់បានទៅលេងស្រុកកំណើតម្ដង មុនពេលទៅសិក្សានៅប្រទេសបារាំង ។ ពេលនោះ ថាច់ សុង បានលក់ស្រូវ២០០ថាំង ដើម្បីយកថវិកាមកជួយឧបត្ថម្ភ និងជូនដំណើរ អៀង សារី ទៅរៀននៅប្រទេសបារាំង ។

ឪពុករបស់ អៀង សារី ក្រោយមកមានជម្ងឺ ហើយពិការភ្នែកមួយចំហៀង ។ ដោយក្ដីនឹករលឹកចំពោះកូនម្ដាយរបស់ អៀង សារី តែងតែសួរនាំអំពីសុខទុក្ខ អៀង សារី ជានិច្ច ។ ប៉ុន្តែ

(តទៅទំព័រទី 9ក)

(តមកពីទំព័រទី ៨ក)

អៀង សារី មិនដែលប្រាប់ពីសុខទុក្ខរបស់ខ្លួន ឬទៅលេងស្រុកកំណើតសោះឡើយ ។

វុត្ថា បានឲ្យដឹងថា នៅអំឡុងឆ្នាំ១៩៧៦ រដ្ឋាភិបាលវៀតណាមបានទៅលេង និងនាំយកទឹកដោះគោ តែ ស្ករ ទៅជូនឪពុកម្ដាយរបស់ អៀង សារី បាន៥ទៅ៦ដងដែរ ប៉ុន្តែចាប់ពីឆ្នាំ១៩៧៧ បន្តមក រដ្ឋាភិបាលវៀតណាមមិនដែលទៅសួរសុខទុក្ខ និងឧបត្ថម្ភទឹកដោះគោ តែ ស្ករ ទៀតឡើយ ។

**-ជីវិតពិត អៀង ធីរិទ្ធ ឬ ខៀវ ធីរិទ្ធ**

ចេតិយមួយ ដែលត្រូវបានកសាងឡើងនៅក្នុងវត្តស្វាយពពែ ហើយដែលគេស្គាល់តាមរយៈនៃការចារឹកលើចេតិយនោះ គឺបានកសាងនៅថ្ងៃទី២៨ មេសា ឆ្នាំ២០០០ ។ បើតាមការចារឹកនោះ គេបានចារហៅ អៀង សារី ជាឯកឧត្តម និង ហៅ អៀង ធីរិទ្ធ ថា លោកជំទាវ ដែល ងារខ្ពង់ខ្ពស់នេះមិនដឹងជា២នាក់ប្តីប្រពន្ធនេះមានឋានៈជាអ្វីនោះទេ ។ ទោះបីជាបែបណា អៀង ធីរិទ្ធ បានបង្ហាញឈ្មោះពិតថា ខៀវ ធីរិទ្ធ ដូច្នេះការហៅ អៀង ធីរិទ្ធ នោះគឺហៅតាមត្រកូលប្តី អៀង សារី តែឈ្មោះពិតគឺត្រកូលខៀវ ។ ការចារឹកលើចេតិយនោះ គឺមានការឧទ្ទិសដល់មនុស្សជាច្រើននាក់ជាឪពុកម្ដាយ បងប្រុស បងស្រី ត្រកូលខៀវ ។ ឈ្មោះដែលចារឹកក្រោមបង្អស់ បានធ្វើឲ្យមានការភ្ញាក់ផ្អើល គឺ លោកជំទាវ ខៀវ ប៉ុណ្ណារី ។ តាមពិតទៅឈ្មោះនេះ គឺជាភរិយារបស់ ប៉ុល ពត ហៅ សាឡុត ស ។

យោងតាមការផ្សាយរបស់ទស្សនាវដ្តី ស្វែងរកការពិតលេខ៤៥ សំរាប់ខែកញ្ញា ឆ្នាំ២០០៣ បន្ទាប់ពី ខៀវ ប៉ុណ្ណារី ប្រពន្ធ ប៉ុល ពត បានស្លាប់អត្ថបទទាក់ទិននឹង ខៀវ ប៉ុណ្ណារី ក៏បានរៀបរាប់ពី ខៀវ ធីរិទ្ធ ឬ អៀង ធីរិទ្ធ នេះដែរ ។ អត្ថបទនោះបានកត់សំគាល់ថា ប៉ុណ្ណារី និង ធីរិទ្ធ រៀនចប់នៅវិទ្យាល័យស៊ីសុវត្ថិ ។ ប៉ុណ្ណារី គឺជាស្ត្រីទីមួយដែលបានទទួលសញ្ញាប័ត្រ បាក់ឌុបមកពីប្រទេសបារាំង ។ ចំណែកឯប្អូនស្រីរបស់ ប៉ុណ្ណារី គឺជាស្ត្រីទីមួយដែលទទួលបានសញ្ញាប័ត្រអក្សរសាស្ត្រអង់គ្លេស ។ សមិទ្ធផលទាំងនេះមានកិត្យានុភាព តិចជាងកាលពីដំណាក់កាលដំបូង។ សញ្ញាប័ត្របាក់ឌុបរបស់ ប៉ុណ្ណារី មានតម្លៃស្មើនឹងសញ្ញាប័ត្រថ្នាក់វិទ្យាល័យនៅក្នុងប្រព័ន្ធអប់រំមួយ ដែលមានលក្ខណៈខ្សោយតែ ប៉ុណ្ណោះ ។ មិនតែប៉ុណ្ណោះ កិត្យានុភាពរបស់ ប៉ុណ្ណារី និង ធីរិទ្ធ ដែលបានមកពីការអប់រំថ្នាក់សង្រែមបែបនេះ គឺបានមកក្រោយពីបក្សកុម្មុយ និស្តកម្ពុជាទទួលបានភាពល្បីល្បាញ ។ ប្រការនេះមិនមែនមានន័យថា ប៉ុណ្ណារី មិនឆ្លាតនោះទេ ប៉ុន្តែគឺចង់បញ្ជាក់ថា ឋានៈដែល ប៉ុណ្ណារី ទទួលបានមិនគួរជាការបញ្ជាក់អំពីជោគជ័យរបស់ ប៉ុណ្ណារី នោះឡើយ ។

នៅឆ្នាំ១៩៥៩ ខៀវ ប៉ុណ្ណារី ធ្វើដំណើរជាមួយប្អូនស្រី (អៀង ធីរិទ្ធ) ទៅកាន់ក្រុង ប៉ារីស ដើម្បីយកសញ្ញាប័ត្រខាងអប់រំ។ បំណងរបស់ ខៀវ ធីរិទ្ធ នៅទីក្រុងប៉ារីស គឺចង់ចូលរៀននៅសាកលវិទ្យាល័យ និងរៀបការជាមួយ អៀង សារី ដែលជាមេដឹកនាំកុម្មុយនីស្ត ទើបតែលេចមុខ និងរៀនមុនរៀន ធីរិទ្ធ មួយឆ្នាំនៅវិទ្យាល័យស៊ីសុវត្ថិ ។ ឱកាសនេះធ្វើឲ្យ ប៉ុណ្ណារី ជួបគ្នាជាមួយនឹង សាឡុត.ស ដែលជាមេដឹកនាំកុម្មុយនីស្ត ម្នាក់ ដែលក្រោយមកមិនយូរប៉ុន្មានមានរហស្សនាមថា "ប៉ុលពត" មានអាយុប្អូន ប៉ុណ្ណារី ៥ឆ្នាំ ។

ប្អូនស្រីរបស់ ប៉ុណ្ណារី ឈ្មោះ អៀង ធីរិទ្ធ និយាយថា នៅសម័យនោះខ្លួន និងប្រពន្ធរបស់អ្នកដទៃៗទៀត ត្រូវតែខិតខំធ្វើការងារដើម្បីឧបត្ថម្ភគ្រួសារ និងបក្ស ពីព្រោះប្តីៗរវល់ចាត់ចែង ហើយអ្នកដទៃទៀតមិនទទួលបានការងារមានប្រាក់កំរៃខ្ពស់ទេ ។ អៀង ធីរិទ្ធ សរសេរថា ខ្ញុំឈប់ធ្វើការងារនយោបាយ ដើម្បីយកពេលទៅបង្រៀននៅសាលារដ្ឋ ។ បងស្រីនិងខ្ញុំទាំងពីរនាក់បងប្អូនជាគ្រូបង្រៀននៅ វិទ្យាល័យសាលារដ្ឋ ។ ដើម្បីរស់ខ្ញុំត្រូវតែមានការងារធ្វើ ។ អ្នកទាំងពីរប្រហែលជាផ្តល់ថវិកាដល់បក្ស ។ ភស្តុតាងថ្មីៗបង្ហាញថា ថវិកាភាគច្រើនបានមកពីប្រទេសចិន មិនមែនបានមកពីវិទ្យាល័យដែល ប៉ុណ្ណារី និងប្អូនស្រីបង្រៀនឡើយ ។/





**-អ្វីទៅដែលហៅថា គ្រួសារ :**

បុគ្គលពីរនាក់ឡើងទៅ ដែលស្មោះស្ម័គ្របួរផ្ដាច់នឹងគ្នាចូលរួមសុខទុក្ខទាំងផ្លូវចិត្តនឹងកាយរួមគ្នាទទួលខុសត្រូវ រួមចំណែកប្រកបអាជីវកម្ម ស្វែងរកនិងរក្សាធនធានជាមួយគ្នាធ្វើការសម្រេចចិត្ត និងរួមយោបល់គ្នា គោរព និងឱ្យតម្លៃគ្នាទៅវិញទៅមកដោយគ្មានល័ក្ខខ័ណ្ឌ ។

ការិយាល័យជំរឿនប្រជាជនសហរដ្ឋអាមេរិក បានកំណត់ន័យនៃគ្រួសារថា : បុគ្គលពីរនាក់ឡើងទៅ ដែលមានទំនាក់ទំនងនឹងគ្នា ហើយរស់នៅក្នុងផ្ទះតែមួយ ។

**-អាពាហ៍ពិពាហ៍ (ដែលហៅថា ប្តីប្រពន្ធ )ជាអ្វី :**

កិច្ចសន្យាខាងផ្លូវច្បាប់ និងមនោសញ្ចេតនាដ៏ស្មោះនៃគូស្នេហ៍ពីរនាក់ប្ដេជ្ញារួមរស់ជាមួយគ្នាលុះគ្រាអវសាន្ត ចូលរួមចំណែករក្សានូវភាពជិតស្និទ្ធផ្លូវចិត្ត និងកាយតស៊ូស្វិតស្វាញដោះស្រាយគ្រប់ឧបសគ្គ និងទទួលភារកិច្ចថែទាំ និងរក្សាទ្រព្យសម្បត្តិយ៉ាងគង់វង់នឹងគ្នា ។

អាពាហ៍ពិពាហ៍ (ប្តីប្រពន្ធ) អាចធ្វើឱ្យគ្រួសារទាំងពីរមានការជិតស្និទ្ធនឹងគ្នារឹតតែប្រសើរឡើង ។ នៅពេលណាអ្នកទាំងពីររៀបការ គឺមានន័យថា គេមិនគ្រាន់តែរៀបការខ្លួនគេទាំងពីរទេ គឺគេថែមទាំងរៀបការជាមួយសមាជិកក្រុមគ្រួសាររបស់គេទាំងពីរនាក់ថែមទៀត ។

អាពាហ៍ពិពាហ៍មុនអាយុ ២០ ឆ្នាំ គឺជាកត្តាគ្រោះថ្នាក់មួយខ្ពស់បំផុតនៃការលែងលះគ្នានេះប្រហែលមកពីក្មេងខ្ចីពេក ខ្វះការពិសោធន៍ក្នុងខ្លួនដើម្បីយល់ដឹងអំពីខ្លួនឯងគ្មានការជ្រើសរើសដ៏ឈ្លាសវៃមួយ ថាតើអ្នកណាជាគូរត្រូវរៀបការជាមួយ លាយឡំនឹងការប្រឈមមុខកិច្ចការជាក់ស្តែងប្រចាំថ្ងៃ ដើម្បីកសាងរៀបចំអាពាហ៍ពិពាហ៍ឱ្យមានដំណើរការល្អព្រមទាំងប្រកបដោយភាពចាស់ទុំ(យល់ដឹង) ផងដែរ នៅពេលដែលមនុស្សបានឈានដល់អាយុ ២០ ឆ្នាំ ។

ចំពោះនរណាដែលបានរៀបអាពាហ៍ពិពាហ៍លើសពីអាយុ២០ឆ្នាំ និងមានឱកាសល្អច្រើនក្នុងការជៀសវាងការលែងលះគ្នា ។ គ្រោះថ្នាក់នេះបានចុះថយលឿន ចាប់ពីអាយុ២០ឆ្នាំឡើង ។ ចំពោះអ្នកណាដែលរងចាំដល់អាយុច្រើនជាង២០ ឬ ៣០ ឆ្នាំ ទើបរៀបការនោះ ក៏ពុំបានទទួលអំណោយផល (អធិភាព) ដ៏គួរឱ្យកត់សម្គាល់ណាមួយជាងអ្នកដែលរៀបការមុនអាយុ ឬក្នុងអាយុ២០ឡើយ ។ ដូច្នេះហើយការស្រាវជ្រាវខ្លះបានឱ្យយោបល់ថា រៀបការក្រោយអាយុ ២០ ឬមុន៣០ឆ្នាំ ប្រហែលជាការមិនល្អទៅវិញទេ ។ ការលែងលះគ្នានៅអាមេរិកបានឡើងខ្ពស់នៅឆ្នាំ១៩៨០ ហើយក៏ចុះថយមកវិញក្នុងរយៈពេល២៥ឆ្នាំកន្លងមកនេះ ។ អ្នកស្រាវជ្រាវបានធ្វើការប៉ាន់ប្រមាណថា : ៤០ ឬ ៥០ ភាគរយ នៃអាពាហ៍ពិពាហ៍លើកដំបូងត្រូវបញ្ចប់ដោយការលែងលះគ្នា ។ ហើយចំពោះអ្នកមានប្រាក់ចំណូលតិចក៏បានប្រឈមមុខនឹងកិច្ចការជាច្រើនដែលជំរុញឱ្យមានការលែងលះគ្នា ។

**-ការប៉ះទង្គិចគ្នារវាងប្រពៃណីនិងវប្បធម៌ផ្សេងៗគ្នា ដែលមាននៅក្នុងរង្វង់គ្រួសារប្តីប្រពន្ធ**

បើពិភាក្សាអំពី ប្រពៃណី វប្បធម៌ ក្នុងរង្វង់គ្រួសារនៃប្រទេសយើង តើមានការខុសប្លែកបែបណាពីសហរដ្ឋអាមេរិក? :

ទំនាក់ទំនងដ៏ស្និទ្ធស្នាលរវាងគូស្នេហ៍គឺជាប្រភពនៃកង្វល់ទុក្ខព្រួយក្រៀមក្រំក្នុងផ្លូវចិត្តនៃស្ត្រីអាស៊ីយើង (តួនាទីរបស់ស្ត្រី គឺចិញ្ចឹមថែទាំប្រដែប្រដៅកូនចៅ និងប្រកាន់នូវឥរិយាបថតាមរបៀបស្វាមីចង់បាន) ។ ជឿនិងទំនៀមទំលាប់ដែលបានបន្ទាបតម្លៃស្ត្រីជាពិសេសនៅក្នុងសហគមន៍អាស៊ី និងស្តែនីស បានត្រូវកកើតជាអន្ទាតភ្លើងហឹង្សាឆេះឆួលក្នុងរង្វង់គ្រួសារ ។ **តទៅលេខក្រោយ**

(តមកពីទំព័រ 1 ខ)

អះអាងថា ជនជាតិខ្មែរមិនទាន់ឃើញ មានធ្លាក់ចូលទៅជាជនគ្មានទីជម្រក (Homeless) ដាច់ម្ហូបអាហារ និងការរស់នៅបែបអនាធិបតេយ្យតាមថ្នល់ ឬតំបន់សាធារណៈ នៅឡើយទេ ។ បើទោះបីជនជាតិអាស៊ីខ្មែរមួយនេះ ដែលរបាយការណ៍បញ្ជាក់ថានៅមានខ្មែរជាច្រើន មានបញ្ហាពិការភាពខាងប្រព័ន្ធខួរក្បាល និងសរសៃប្រសាទ ដែលចាំបាច់ត្រូវការផ្តល់ជំនួយថវិកា និងប្រព័ន្ធថែទាំសុខមាលភាពពីរដ្ឋនោះ ។

មន្ត្រីកាន់ការរដ្ឋាភិបាល County of Los Angeles បានប្រាប់ខ្មែរប៉ុស្តិ៍ឲ្យដឹងថា ក្នុងតំបន់២៧ស្រុក នៃ County of Los Angeles, Fourth District ចត ដែលមានចំនួនដល់ទៅ ៧៣,០០០នាក់នោះ ដោយតំបន់ Long Beach ដែលសំបូរទៅដោយបងប្អូនខ្មែររស់នៅ មិនតិចជាង៦ម៉ឺននាក់ មិនមានស្ថិតិណាមួយបង្ហាញថា មានជនជាតិខ្មែរជាជន Homeless នោះទេក្រៅតែពីជន បរទេសដែលមានចំនួន៨០០០នាក់ ជាជនអនាថាគ្មានទីជម្រក ។

ក្នុងជំនួបបាយថ្ងៃត្រង់មួយ ដែលមានមនុស្សជាង ១០០០នាក់ចូលរួមចម្រុះទៅដោយពួករដ្ឋការ, ពួកសេដ្ឋី, អ្នកពាណិជ្ជករ ជំនួញអង្គការក្រៅរដ្ឋាភិបាល កាលពីថ្ងៃទី១ វិច្ឆិកា កន្លងទៅ២សប្តាហ៍នេះ បាននាំគ្នាស្តាប់នូវរបាយការណ៍ និងគម្រោងរដ្ឋបាល Los Angeles ក្នុងការអភិវឌ្ឍន៍សង្គមរបស់ខ្លួន ដែលផ្តោតទៅលើប្រព័ន្ធសិក្សាធិការ, សង្គមកិច្ច, សុខាភិបាល, បរិស្ថាន, កសិកម្ម ដើម្បី រក្សាជីវិតមនុស្ស ឲ្យមានភាពប្រសើរដល់ការរស់នៅ។ ពិសេសបញ្ហាជំនួយគាំទ្រដល់ជនក្រីក្រផ្នែក Welfare, Medical និងជន អនាថាគ្មានទីជម្រក (Homeless) រួមនឹងការជួយសង្គ្រោះទារកដែល រហូតមកដល់ឥឡូវមានចំនួន ៦៣នាក់ហើយក្នុង







ត្រូវឪពុកម្តាយបោះបង់ចោលតាមទីសាធារណៈក្នុងធុងសំរាមឬមន្ទីរពេទ្យជាដើម។ អ្នកគ្រប់គ្រងតំបន់ស្រុកទី៤ នៃ County of Los Angeles លោក Don Knabe បានអះអាងថា ដំណោះស្រាយត្រូវ បានគ្រោងឡើងដើម្បីប្រតិបត្តិការណ៍នៅតំបន់ស្រុកទាំង២៧ បំណងកែប្រែជីវិតជនគ្មានទីជម្រករស់នៅបែបអនាធិបតេយ្យ(Home-less)ឲ្យរស់នៅមានភាពប្រសើរមានអាហារហូបគ្រប់គ្រាន់ ។

លោក Don Knabe បានបន្តថា ជាមួយករណីរកដំណោះស្រាយដល់ជនគ្មានទីជម្រក អត់ឃ្លាននោះ ។ រដ្ឋអំណាចក៏បាន បង្កើតឲ្យមានកម្មវិធីចិញ្ចឹមទារកដែលឪពុកម្តាយបោះបង់ចោល ដែលរយៈពេល២-៣ ឆ្នាំចុងក្រោយនេះ ។

បើទោះបីស្ថិតិមនុស្សគ្មានទីជម្រក និងគ្មានអាហារគ្រប់គ្រាន់ក្នុងការហូបចុក សំរាប់ការរស់នៅមានកំរិតតិចតួច បើប្រៀប ធៀបទៅនឹងកំណើនប្រជាជននៅរដ្ឋ California ជាង៣០លាននាក់ក៏ដោយ ។ ប៉ុន្តែសំរាប់ការរក្សាជីវិតមនុស្សដែលក្រខ្សត់គ្មានទី ជម្រកនៃប្រទេសមហាអំណាចសេដ្ឋកិច្ចយោជាមួយនេះ មិនមែនជារឿងធម្មតានោះទេ សំរាប់ជនជាតិគេដែលរដ្ឋត្រូវតែមានភារកិច្ច កាតព្វកិច្ចរកដំណោះស្រាយ និងជួយសង្គ្រោះជាបន្ទាន់។ ក្នុងរបាយការ បានបង្ហាញជាគម្រោងថវិការដ្ឋប្រចាំ

(តទៅទំព័រទី 12 ខ)

# អ្នកទទួលលុយរដ្ឋអាចធ្វើការបាន ដោយមិនកាត់លុយ

## ក្រុងខ្មែរ Long Beach

ដោយ ៖ ទិត្យ សុវណ្ណារ័ត្ន

មន្ត្រីសាលាសង្កាត់លេខ៦ និយាយថា អ្នកដែលទទួលលុយពិការ និងមនុស្សចាស់ពីរដ្ឋ ដែលមានអាយុចាប់ពី៥៥ឆ្នាំឡើងទៅ អាចត្រូវអាជ្ញាធររដ្ឋ ឬអង្គការសង្គមស៊ីវិល (Non profit) ជួយរកការងារឲ្យធ្វើដើម្បីបន្ថែមប្រាក់ចំណូលដោយមិនកាត់ប្រាក់ដែល បានទទួលពីការឧបត្ថម្ភរបស់រដ្ឋឡើយ ។

អ្នកស្រី ព្រឹក ណាន់ស៊ុ មន្ត្រីទំនាក់ទំនងសហគមន៍នៃសាលាសង្កាត់លេខ៦ បានប្រាប់ខ្មែរប៉ុស្តិ៍ឲ្យដឹងថា មានក្រុមហ៊ុន៣៦ ទាំងស្ថាប័នរដ្ឋ ឯកជន ឬអង្គការនានាបានជួបជាមួយលោកចៅសង្កាត់ Dee Andrews ដើម្បីសហការគ្នាស្វែងរកការងារឲ្យមនុស្ស ធ្វើ ដូចជានៅតាមមន្ទីរពេទ្យ, ក្រុមហ៊ុន Verizon, Home Depot, L.A. Community and Senior Services ជាដើម ។

ដោយតាមសំដីមន្ត្រីទំនាក់ទំនងសហគមន៍រូបនេះបានឲ្យដឹងថា ស្ថាប័នរដ្ឋមួយឈ្មោះ L.A Community and Senior Services ត្រូវការមនុស្សធ្វើការ ឬបង្ហាត់បង្រៀនជំនាញដែលពួកគេអាចទទួលប្រាក់ពលកម្មតាមស្តង់ដាររដ្ឋកំណត់ ។ ដោយអ្នក ស្រី ព្រឹក ណាន់ស៊ុ បានអំពាវនាវឲ្យបងប្អូនខ្មែរដែលទទួលប្រាក់ពីរដ្ឋជាលុយពិការ ឬមនុស្សចាស់ សូមទាក់ទងទៅសាលាសង្កាត់លេខ៦ ឬរូបនាងប្រសិនបើមានបំណងចង់ធ្វើការងារបន្ថែមលុយចំណូលដោយកុំភ័យព្រួយថា រដ្ឋអំណាចកាត់លុយឧបត្ថម្ភពីពិការភាព ឬមនុស្ស ចាស់ឲ្យសោះ ។

យោងតាមរបាយការណ៍ដែលខ្មែរប៉ុស្តិ៍មានពីវិទ្យាស្ថានអាមេរិកមួយឈ្មោះ RAND បានបង្ហាញថា តាមការស្រាវជ្រាវ ចំពោះសហគមន៍ខ្មែរនៅ Long Beach បានឲ្យស្ថិតិពីមនុស្សទទួលនូវភាពមិនប្រក្រតីក្នុងអារម្មណ៍ និងខួរក្បាលផ្នែកប្រព័ន្ធសរសៃ ប្រសាទនូវអត្រាខ្ពស់គួរឲ្យកត់សម្គាល់ ព្រោះតែភាពអតីតកាលនៃរបបកាប់សម្លាប់ខ្មែរក្រហម ដែលបានធ្វើទារុណកម្ម និងរងទុក្ខ វេទនា ។ ដែលស្លាកស្នាមប្រវត្តិសាស្ត្រនេះ បងប្អូនខ្មែរត្រូវរងនូវភាពពិការទាំងកាយ ទាំងចិត្ត ដែលតម្រូវធ្វើឲ្យពួកគាត់មិនអាចធ្វើ ការងារបាន ក្រៅតែពីការទទួលនូវជំនួយរដ្ឋក្នុងរបបជាលុយពិការ ឬមនុស្សចាស់ ។

ក្រុមបងប្អូនខ្មែរមួយចំនួនបានបង្ហាញភាពស្ទាក់ស្ទើរប្រាប់ខ្មែរប៉ុស្តិ៍ថា ពួកគាត់ខ្លាចដល់ពេលទៅធ្វើការរដ្ឋនឹងកាត់លុយគាត់ពី របបពិការ ឬមនុស្សចាស់ ។ ដោយពួកគាត់រង់ចាំមើលគ្នាបន្ត ប្រសិនមានអ្នកណាទៅធ្វើមុនមិនកាន់លុយ ពួកគាត់ទៅរកការងារធ្វើ តាមក្រោយ ។ រីឯអ្នកខ្លះទៀតនិយាយថា ពិតជាមិនកាត់មែនឬ ? អ្នកណាមិនចង់បានចំណូលបន្ថែម ព្រោះយើងស្ថិតក្នុងជីវភាពក្រីក្រ ផងនោះ តើអ្នកណាមិនត្រូវការលុយ ។/

(តមកពីទំព័រទី 7 ង)

ដំណើរការវិនិយោគទុននៅកម្ពុជា ពីព្រោះវានឹងធ្វើឲ្យពិបាកសម្រេចពីក្រុមវិនិយោគិន ក្នុងការចូលមករកស៊ីនៅកម្ពុជា ដែលនឹងផ្តោតទៅលើអ្វីដែលគេគ្រាន់តែនិយាយជា ទូទៅអំពីអំពើពុករលួយ ខណៈដែលឱកាសប្រកួតប្រជែងស្ថិតក្នុងបរិកាសល្អប្រសើរ ។ អ្នកតំណាងរាស្ត្រនៃគណៈកម្មការហិរញ្ញវត្ថុ ធនាគារ បានចាប់អារម្មណ៍ថា កំណើន និងការប្រកួតប្រជែងរបស់ប្រទេសកម្ពុជា ដែលទើបតែងើបពីសង្គ្រាម គឺនៅមានកំរិតនៅឡើយ ហេតុនេះគេមិនអាចយកកម្ពុជាទៅធៀបជាមួយប្រទេសអភិវឌ្ឍន៍នានបានទេ ។ តែថា យ៉ាងណាក៏កម្ពុជាបាននិងកំពុងតែយកចិត្តទុក ដាក់អនុម័តច្បាប់ប្រឆាំងនឹងអំពើពុករលួយ និងក្រមព្រហ្មទណ្ឌថ្មី ដើម្បីជួយពង្រឹងឲ្យប្រទេសក្លាយជានីតិរដ្ឋក្នុងពេលអនាគតដែរ ។/

(តមកពីទំព័រទី 10 ខ)

ឆ្នាំចំនួនជាង $ 21 Billion សំរាប់គាំទ្រ និងអភិវឌ្ឍន៍សង្គម, ចិញ្ចឹម ជីវិតមនុស្សផ្នែក Welfare អប់រំ, សុខមាលភាពរបស់ County of Los Angeles, Fourth District ។

មនុស្សជិត៣លាននាក់ដែលគ្មាន Insurance និង Medical និងអ្នកជំងឺជិត១លាននាក់ត្រូវការកិច្ចសង្គ្រោះពីរដ្ឋាភិបាល ។ រីឯអ្នកមានជំងឺសតិអារម្មណ៍ និងផ្លូវសរសៃប្រសាទ មានរហូតដល់ ៣៥% ដែលជាបន្ទុករបស់រដ្ឋត្រូវដោះស្រាយក្នុងតំបន់ Fourth District មួយតែប៉ុណ្ណោះ ។

ក្រុមអ្នក Homeless ជាជនជាតិបរទេសបានប្រាប់ខ្មែរប៉ុស្តិ៍ឲ្យដឹងថា ទាំងរដ្ឋាភិបាលសហព័ន្ធ, រដ្ឋ ឬតំបន់ គឺអ្នកនយោបាយ សុទ្ធតែសន្យាដើម្បីរកសន្លឹកឆ្នោតសំរាប់ពួកគេ ប៉ុន្តែទីបំផុតការសន្យាជួយ និងរកវិធីសាស្ត្រ កែប្រែជីវិតពួកគេពុំមានឃើញអ្វីប្លែកនោះ ទេ ។ នេះជាសំដី Dexter Knox ប្រធាន Birds Eye Medical ដែលធ្លាប់ធ្លាក់ខ្លួនទៅជាអ្នក Homeless ជាង១០ឆ្នាំ ។ រូបលោកបានបន្តថា ជាជនគ្មានទីជម្រកមានដំណើរជីវិតលំបាកទុក្ខសោកខុសៗគ្នាមកពីហេតុបច្ច័យរបស់ពួកគេ។ ដូច្នេះពួកអ្នកនយោបាយឬអ្នកដឹកនាំសង្គម គួរយល់ឲ្យច្បាស់ដើម្បីដាក់ប្រធានបទរកដំណោះស្រាយ ។

Cassic Lee ជាស្ត្រីអាមេរិកាំងសម្បុរខ្មៅបាននិយាយថា ការធ្លាក់ខ្លួនជាអ្នក Homeless មិនមែនមកពីគាត់ខ្ជិលធ្វើការ ដើម្បីផ្តេកផ្តួលសុំជំនួយរដ្ឋទេ ។ គាត់បានធ្វើការបង់តាក់ជូនរដ្ឋកន្លងមក លុះអត់ការងារធ្វើ គ្មានលុយបង់ផ្ទះ រហូតដល់ទៅសុំលុយរដ្ឋ ត្រូវគេបដិសេធ ។ ដោយរស់នៅគ្មានបងប្អូនផងនោះ រូបគាត់ក៏ធ្លាក់ខ្លួនទៅជាជន Homeless ។

ស្ត្រីរូបនោះដែលកំពុងធ្លាក់ខ្លួន ពិការជើងឆ្វេងបានស្នើឲ្យអ្នកដឹកនាំ ត្រូវស្វែងយល់ពីជនអនាថាគ្មានទី

(តទៅទំព័រទី 14ខ)

# K2J: ហាងកាហ្វេខ្មែរ ទីសាសង ស្នេហ៍ឆ្លងទ្វីប

ដោយ ៖ សុវណ្ណរិទ្ធិ

បុរសម្នាក់សុំមិនប្រាប់ឈ្មោះ បានប្រាប់កាសែតខ្មែរប៉ុស្តិ៍ថា ការមកអង្គុយក្រោមខ្ទមដំបូលប្រក់ស្បូវនៃហាងកាហ្វេ K2J Café ធ្វើឲ្យគាត់នឹករលឹកឃើញដល់គូស្នេហ៍ស្រីកំណាន់ចិត្តគាត់នៅឯប្រទេសកម្ពុជា ដែលគាត់បានជួបនារីនោះជាស្នេហាដំបូង ក្រោម ដំបូលស្បូវនៃហាងព្រែកលាភ ម្ខាងជងទន្លេមេគង្គត្រើយខាងកើតភ្នំពេញ ។

បុរសនោះបន្តថា ឥឡូវស្រីស្នេហ៍គាត់កំពុងនៅស្រុកខ្មែរនៅឡើយ គាត់បានជួបមុខនារីនោះមួយឆ្នាំម្តង ។ ប៉ុន្តែការសន្ទនា ឆ្លើយឆ្លងដាក់ត្រចៀកគ្នាកើតមានជារៀងរាល់ថ្ងៃ ដោយគាត់យកហាងកាហ្វេ K2J ជាទីណាត់ជួបសាសងស្នេហាស្មោះស្ម័គតាមរលក ធាតុអាកាស ដើម្បីផ្តោះផ្តងពាក្យពេចន៍ដល់ការលួងលោមចិត្តថ្លើម រុញច្រានបេះដូងកុំឲ្យក្បត់ចិត្តគ្នានៅក្រោមដំបូលខ្ទមស្បូវពីម្ខាង ឯនាយសមុទ្ររៀងៗខ្លួន ។

នៅក្នុងហាងកាហ្វេនេះ យើងឃើញការរៀបចំតុបតែងបានធ្វើល្អស្អាត ទាក់អារម្មណ៍មនុស្ស មានផាសុកភាព ជាលក្ខណៈស្ទីល ខ្មែរ និងបរទេស ដូចជាមានតាំងផ្រ័ត ដែលបង្ហាញឲ្យយើងនឹកដល់ក្រុមខ្មែរ គួយ កូឡា ដែលបានរស់នៅក្នុងជីវភាពជាអ្នករកស៊ីត្បូង ពេជ្រ ក្នុងអតីតទឹកដីចៅចិត្រ ឃុននារី ក្នុងរឿងកុលាបប៉ៃលិន នៃក្រុងប៉ៃលិន ។ ដោយនាសម័យនោះ កូនក្រមុំៗអ្នកស្រុកពេលចេញ ដំណើរទៅដើរលេង ឬទៅវត្តអ៊ាជាមួយការបាំងឆ័ត្របន្ទំសម្បុរ ។

ភ្លើងរំលេចឡើងជាលក្ខណៈស្រទន់ និងចម្រុះពណ៌បង្ហើរដោយសម្លេង បែបមនោសញ្ចេតនានៃបទចម្រៀងខ្មែរ និងរូបភាព ខារ៉ាអូខេ ផ្សំដោយផ្ទាំងរូបភាពជាព័ត៌មានចេញពីតាមកញ្ចក់ទូរទស្សន៍ភ្ជាប់ជញ្ជាំង៥ទិសផងដែរ ។ មនុស្សម្នាប្រមាណ៩៩% ជាភ្ញៀវ ខ្មែរ ពួកគេបានទៅទីនោះ(ហាងកាហ្វេខ្មែរ K2J)ជាហូរហែរ បំណងប្រាថ្នារបស់ពួកគេមានរៀងៗខ្លួនថា តើការទៅកាន់ទីនោះដើម្បី អ្វី គឺការគិតមានរួចទៅហើយ ។ ជាមួយម៉ាស៊ីនត្រជាក់កាយា មានតុ កៅអី សាឡុង សំរាប់ ទទួលភ្ញៀវ គេឃើញមានមនុស្សភាគច្រើន មានវ័យកណ្តាល ចាប់ពីអាយុ៣០ឆ្លាយ ដល់ជាងអាយុ៥០ឆ្នាំ បានណាត់គ្នាជួបជុំ មិនថា ការជជែកក្នុងផលរបររកស៊ី បញ្ហានយោបាយស្រុកទេស ស្រីញីអូនបង ឬក៏សំរាកពីការងារជាមួយការផឹកស៊ី លេងល្បែងកំសាន្ត អារម្មណ៍ជារៀងរាល់ថ្ងៃ ។ ភាពរាក់ទាក់របស់ចៅកែខ្មែរ ដែលទ្រង់ទ្រាយជាកូនកាត់ចិនឈ្មោះ ចិត្ត យ៉ាន បាននិយាយថា ហាងកាហ្វេ K2J Café បើកទើបតែ៣ខែប៉ុណ្ណោះ ដោយឃើញមានការចាប់អារម្មណ៍ពីបងប្អូនខ្មែរ ពិសេសមិត្តភ័ក្តិគេមកលេង ផឹក ញុំា ជជែកគ្នាលេងជាហូរហែ។ យើងសប្បាយចិត្ត នៅពេលឃើញខ្មែរចេះជួយអ្នកធ្វើសេដ្ឋកិច្ចជាខ្មែរដូចគ្នា ដោយយើងសង្ឃឹមថា ទីនេះនាំឲ្យបងប្អូនមកជួបគ្នា ដើម្បីការសប្បាយដោយគ្មានហិង្សា ជម្លោះ ពោលគឺបង្កើតមិត្តភាពខ្មែរតែកខ្មែរ ក្នុងនាមអតីតជនភៀសខ្លួនដូចគ្នា ។

ពួកបរទេស នៅពុំទាន់ផ្តល់ការលើកទឹកចិត្តឲ្យអ្នកជំនួញខ្មែរនៅឡើយទេ ដោយចៅកែស្រីឈ្មោះ ស្រី មុំ អះអាងថា ជន បរទេសមានតែ ១% ប៉ុណ្ណោះជាភ្ញៀវមកកាន់កន្លែងយើង។ ពួកគេហាក់ពុំទាន់ចាប់អារម្មណ៍នៅឡើយទេ ។

ស្រី មុំ សម្បុរខ្មៅស្រអែម ក្នុងភាពនិយាយស្ទីទន់ភ្លន់ជាមួយសម្រស់ញញឹមស្រស់ស្រាយ ខ្លួនតូចច្រឡឹង គេចមុខពីកញ្ចក់ Camera ថតរបស់អ្នកកាសែតខ្មែរប៉ុស្តិ៍យើង ដោយនាងគ្រាន់តែបង្ហើបសំដីថា ភ្ញៀវខ្មែរចម្រុះមកកាន់ហាងរបស់នាងជាលក្ខណៈ គ្រួសារ គូស្នេហ៍ថ្មីថ្មោង Boyfriend, Girlfriend និងពួកមិត្តភ័ក្តិប្រុសៗ ជួបជុំគ្នាសប្បាយព្រោកប្រាជ្ញនូវអ្វីដែលមានអារម្មណ៍ សប្បាយ ។ បងប្រុសឈ្មោះ ជា និយាយថា គាត់ធ្វើការហត់នឿយដើមសប្តាហ៍ ដូច្នេះចុងអាទិត្យ យើងត្រូវការសប្បាយជួបជុំមិត្តភ័ក្តិ និយាយគ្នាលេងពីរឿងរ៉ាវអតីតកាល បច្ចុប្បន្នកាល ឬអនាគត ដើម្បីផ្តុំគំនិតគ្នាថា តើត្រូវធ្វើអ្វីដើម្បីឲ្យជីវិតជោគជ័យ ។ និយាយរួម ទាំងអ្នកសប្បាយ ឯអ្នកកើតទុក្ខមានបែកប្តី និងផ្លូវស្នេហាបរាជ័យ ឬឧបសគ្គជំនួញជួញដូរ ពួកគេបានទៅកាន់ទីនោះ ដើម្បីចាប់យកភាពសប្បាយក្រោមការជជែកដោះស្រាយ ពិគ្រោះយោបល់ និងមិត្តភ័ក្តិ ញាតិសន្តានក្នុងការដោះស្រាយអារម្មណ៍ទុក្ខសោកនានា ។ ហើយក៏មានគ្រួសារដែលមានសុភមង្គល ក្នុងមួយជីវិតមិនធ្លាប់ជួបឧបសគ្គផងដែរ បានទៅកាន់ទីនោះ ដើម្បីជួបជុំការសប្បាយជាមួយកូនចៅ ប្តីប្រពន្ធ ឪពុកម្តាយនោះ ។ ហាងកាហ្វេនេះមានលក់បង្អែម បំណិតផ្លែឈើ នំបុ័ងសាំងវិច ល្បែងកំសាន្ត និងស្រាបៀរ ភ្លេងជាមួយ ពងទាកូនផងដែរ ។ ក្រុងខ្មែរ Long Beach នៅជងផ្លូវអាណាហែម កំពុងតែរៀបចំធ្វើសេដ្ឋកិច្ច ជំនួញបន្ថែមដោយបងប្អូនខ្មែរ បន្ទាប់ ពីតំបន់នេះបានក្លាយជាក្រុងខ្មែរមកជាង៩ខែ ។/






(តមកពីទំព័រទី 12៖)

ជម្រកឲ្យច្បាស់លាស់ ដើម្បីទប់ស្កាត់ជីវិតមនុស្សក្នុងជីវិតលំបាកវេទនាយ៉ាងនេះ ។

ក្នុងសំដីយំអួលដើមក Cassic Lee បន្តថា កាលពីសប្តាហ៍មុន មិត្តស្រីគាត់ឈ្មោះ Shay អាយុជាង៤០ឆ្នាំ បានដេកស្លាប់ នៅសួនច្បារផ្លូវលេខ១៤ ជាមួយ Pacific Ave ព្រោះតែគ្មានការជួយសង្គ្រោះ គ្មានទីជម្រកជ្រកកោន ដែលមិត្តស្រីនាងមានរោគ ខ្សោយបេះដូង ត្រូវគាំងស្លាប់ ។

បញ្ហានេះវាជាដំណោះស្រាយ និងការទទួលខុសត្រូវ ឬក៏យ៉ាងណា ជាតួនាទីរបស់រដ្ឋាភិបាលអាមេរិក ។ ប៉ុន្តែអ្វីដែលរីករាយ និងមោទនភាពនោះ គឺសហគមន៍ខ្មែរ ឬក្រុងខ្មែរ Long Beach មិនទាន់ត្រូវបានប្រទះភ្នែកឃើញជនវេទនាអនាថា រស់នៅតាម ទីសាធារណៈ នៅឡើយទេ ។ ក្រៅតែពីក្មេងខ្មែរ២នាក់ ដែលមានអាយុជាង២០ឆ្នាំ ដើរតាមផ្លូវ Anaheim សុំលុយតាមផ្សារ, កន្លែងធ្វើឡានដើម្បីបានលុយទិញថ្នាំជក់តែប៉ុណ្ណោះ ។/



CALIFORNIA



LifeLine

TELEPHONE PROGRAM

# កម្មវិធីចុះថ្លៃទូរស័ព្ទនៅផ្ទះ

## តម្លៃតែ $6 ឬតិចជាងនេះ!



អ្នកអាចមានគុណសម្បត្តិទទួលសេវាទូរស័ព្ទនៅផ្ទះក្នុងតំបន់ មានតម្លៃថោកជាង $6 ក្នុងមួយខែ ។ * សូមទូរស័ព្ទទៅក្រុមហ៊ុនទូរស័ព្ទរបស់អ្នក ឬទូរស័ព្ទទៅលេខ 1-866-272-0352 ។ LifeLine អាចនឹងជាសំរាប់អ្នក ទោះបើអ្នកត្រូវបានគេបានកាត់ផ្ដាច់ក៏ដោយ ។ ចូរសាកសួរនៅថ្ងៃនេះ ក្រែងលោអ្នកមានសិទ្ធិទទួល!

ប្រសិនបើនៅបច្ចុប្បន្ននេះ អ្នកកំពុងទទួលកម្មវិធីមួយក្នុងចំណោមនៅខាងក្រោម :

- Medicaid/Medi-Cal
- Low Income Home Energy Assistance Program (LIHEAP)
- Supplemental Security Income (SSI)
- Federal Public Housing Assistance or Section 8
- Food Stamps
- Temporary Assistance for Needy Families (TANF)
- Healthy Families Category A
- National School Lunch's FREE Lunch Program (NSL)
- Tribal TANF
- Bureau of Indian Affairs General Assistance
- Women, Infant and Children Program (WIC)
- Head Start Income Eligible (Tribal Only)

ឬប្រសិនបើប្រាក់ចំណូលរបស់អ្នកមាន :

| មនុស្សពេញវ័យ និង ក្មេងៗ ដែលរស់នៅក្នុងក្រុមគ្រួសារ | ប្រាក់ចំណូលសរុបប្រចាំឆ្នាំ នៃក្រុមគ្រួសារ (ពី 6/1/07 រហូតដល់ 5/31/08) |
|---|---|
| សមាជិក 1-2 នាក់ | $22,000 ឬ តិចជាង |
| សមាជិក 3 នាក់ | $25,900 ឬ តិចជាង |
| សមាជិក 4 នាក់ | $31,200 ឬ តិចជាង |
| សមាជិកម្នាក់ៗទៀត | បន្ថែម $5,300 |

**1-866-272-0352**

(លេខឥតគិតថ្លៃ)

* ដើម្បីមានគុណសម្បត្តិទទួលបាន អ្នកត្រូវតែមានអាយុតិចបំផុត 18 ឆ្នាំ ហើយស្របតាមកំរិតប្រាក់ចំណូលទាំងនេះ ។ ថ្លៃពន្ធដារ និងតម្លៃការបន្ថែមផ្សេងទៀត អាចនឹងមាន ។ ត្រូវមានភស្តុតាងនៃសិទ្ធិទទួល ។

កម្មវិធីទូរស័ព្ទ LifeLine កាលីហ្វ័រនីញ៉ា (California LifeLine Telephone Program) គឺបានឧបត្ថម្ភដោយ គណៈកម្មការឧបករណ៍សាធារណៈកាលីហ្វ័រនីញ៉ា (California Public Utilities Commission) ។




# ផ្ញើប្រាក់ទៅកាន់ខេត្តណាមួយនៅកម្ពុជា តាមរយៈ Western Union

## ជាមួយថ្លៃ* សេវាកម្មផ្ញើប្រាក់ទាប $11.99 ដុល្លារ

សម្រាប់ការផ្ញើប្រាក់ទៅកាន់ខេត្តក្រុង** ដែលបានជ្រើសរើសក្នុងចំនួនតិចជាង 500 ដុល្លារ

## ជាទូទៅប្រាក់អាចទទួលបានតែប៉ុន្មាននាទី*** ប៉ុណ្ណោះ

- ✓ ថ្លៃ*សេវាកម្មផ្ញើប្រាក់មិនមានការប្រែប្រួលទៅតាមទីកន្លែងរបស់ភ្នាក់ងារទទួលប្រាក់ឡើយ
- ✓ មានភ្នាក់ងារផ្ទេរប្រាក់ជាង 100 កន្លែងនៅ 24 ខេត្តក្រុងទូទាំងប្រទេសកម្ពុជា
- ✓ មិនចាំបាច់មានគណនីនៅធនាគារទាំងអ្នកផ្ញើ និងអ្នកទទួល
- ✓ មិនមានការគិតថ្លៃសេវាកម្មផ្ទេរប្រាក់ពីអ្នកទទួលឡើយ




សេវាកម្មផ្ទេរប្រាក់ទូទាំងពិភពលោក រហ័សទាន់ចិត្ត និងគួរឲ្យទុកចិត្ត

**សូមទាក់ទងទូរស័ព្ទ**
**1-800-325-6000**

**ភ្នាក់ងារផ្ទេរប្រាក់នៅកម្ពុជាដែលទទួលបានការអនុញ្ញាតពី Western Union:**





SBC Bank

| | | | | |
|---|---|---|---|---|
| **NHA THUOC THIEN NHIEN**<br>1299 E. ANAHEIM ST<br>LONG BEACH, CA 90813<br>TEL: 562-218-2328 | **MONEY MART #0772**<br>1001 E. PACIFIC COAST HWY<br>LONG BEACH, CA 90806<br>TEL: 562-599-0991 | **MONEY MART #0767**<br>2375 LONG BEACH BLVD<br>LONG BEACH, CA 90806<br>TEL: 562-427-0253 | **CONTINENTAL CURRENCY #704**<br>3106 SAN GABRIEL BLVD<br>ROSEMEAD, CA 91770<br>TEL: 626-280-0380 | **TOPANGA CHECK CASHING**<br>7239 TOPANGA CANYON BLVD<br>CANOGA PARK, CA 91303<br>TEL: 818-594-0057 |
| **CONTINENTAL CURRENCY #408**<br>1301 LONG BEACH BLVD<br>LONG BEACH, CA 90813<br>TEL: 562-599-1550 | **ANTOJITOS LATINOS LIQUOR**<br>25381 ALICIA PKWY STE N<br>LAGUNA HILLS, CA 92653<br>TEL: 949-215-9708 | **NADERS MARKET**<br>25227 REDLANDS BLVD # I<br>LOMA LINDA, CA 92354<br>TEL: 909-796-1660 | **CONTINENTAL CURRENCY #413**<br>237 LONG BEACH BLVD<br>LONG BEACH, CA 90802<br>TEL: 562-432-5883 | **SIAM MARKET**<br>2505 E. ANAHEIM ST<br>LONG BEACH, CA 90802<br>TEL: 562-607-8970 |

*សម្រាប់ការផ្ទេរប្រាក់ចុះឈ្មោះតែប៉ុណ្ណោះ។

**ថ្លៃសេវាកម្មផ្ញើប្រាក់នេះមានសុពលភាពចាប់ពីថ្ងៃទី 22 ខែ តុលា ឆ្នាំ 2007 នេះនៅតាមបណ្តាភ្នាក់ងារនានាដែលបានចូលរួមក្នុងកម្មវិធីរបស់ខ្លួននៅតំបន់ប្រជុំជន Los Angeles និង Philadelphia ។ Western Union សូមរក្សាសិទ្ធិក្នុងការកែប្រែដោយមិនចាំបាច់ជូនដំណឹងជាមុន។ ថ្លៃសេវាកម្មផ្ញើប្រាក់អាចត្រូវបានគិតច្រើនជាងនេះសម្រាប់ការផ្ញើប្រាក់តាមរយៈទូរស័ព្ទ និង តាមរយៈគេហទំព័រ www.westernunion.com ។

***រយៈពេលនៃការទទួលប្រាក់អាស្រ័យទៅលើកត្តាមួយចំនួននៃសេវាកម្មរួមទាំងម៉ោងធ្វើការ និងទីតាំងរបស់ទីភ្នាក់ងារផ្ទេរប្រាក់ព្រមទាំងភាពខុសគ្នារវាងម៉ោងនៅក្នុងតំបន់នីមួយៗផងដែរ។ ពិនិត្យមើលលក្ខខណ្ឌ និងល័ក្ខខ័ណ្ឌនានានៅក្នុងបែបបទ "ផ្ញើប្រាក់"។

## Dee Andrews និងការបោះឆ្នោត ចៅសង្កាត់ឆ្នាំ២០០៨






Dee Andrews (Right) Photo by: Vantha El

*ដោយ: មាជសុវណ្ណារ៉ា*

ដំណើរឆ្ពោះទៅរកការបោះឆ្នោត នៅសហរដ្ឋអាមេរិកកាន់តែខិតចូលមកដល់ នាឆ្នាំក្រោយ គេតែងឃើញអ្នកនយោបាយគ្រប់ ស្រទាប់តែងតែគៀងគររកសម្លេងឆ្នោតក្រោមរូបភាពប្រជាភិថុតនយោបាយនិយាយស្តីលួងលោមចិត្តប្រជាជនជាមួយការសន្យាដាក់ ប្រធានបទជាគម្រោងនេះគម្រោងនោះ ដើម្បីអភិវឌ្ឍន៍មូលដ្ឋានដល់សហគមន៍ប្រជាជន ។ ទិដ្ឋភាពនេះ

(តទៅទំព័រទី 23 ខ)

## វិមានមាសផុសកណ្តាលក្រុងខ្មែរ



Grand Opening Golden Villa Restaurant & Night Club Photo by: Vantha El

*ដោយ ៖ មាជ សុវណ្ណារ៉ា*

កាលពីរាត្រីថ្ងៃ ច័ន្ទ ដែលខ្មែរយើងជំនឿថា ថ្ងៃដើមទ្រព្យលាភជ័យរបស់ខ្មែរនោះរង្គសាល និងភោជនីយដ្ឋានមួយឈ្មោះ *វិមានមាស* ត្រូវបានបើកសម្ពោធធ្វើជំនួញនៅកណ្តាល ទីក្រុងខ្មែរដែលជាដង្ហើមបេះដូងសហគមន៍ខ្មែរ Long Beach ជាលើកដំបូងបន្ទាប់ពីតំបន់ខ្មែរមួយនេះបានសម្រេចឲ្យពីរដ្ឋាភិបាល ស.រ.អា ក្រុង Long Beach កើតជាក្រុងខ្មែរជាផ្លូវការនោះ ។

(តទៅទំព័រទី 23 ឆ)

សំរាប់ការផ្សាយចេញ

ភ្លាមៗ




ទាក់ទង : Renny Jackson
WESTERN UNION ®
(201) 263-5173

Lidia Yai
Inter Trend Communication
(562) 733-1877

# WESTERN UNION ® សូមប្រកាសអំពីតម្លៃថ្មី សំរាប់អតិថិជនដែលផ្ញើប្រាក់ទៅប្រទេសកម្ពុជា

## ថ្លៃឈ្នួលថ្មីសំរាប់ការផ្ទេរប្រាក់ គឺមាននៅក្នុង*Los Angeles* និងតំបន់ក្រុង*Philadelphia*

ENGEWWOOD, Colo. ។ -(ខែ តុលា ៣១ ឆ្នាំ ២០០៧) -(ក្រុមហ៊ុន Western Union: Western Union Company (NYSE:WU) គឺជា អ្នកនាំមុខគេនៅពាសពេញសាកលលោក ក្នុងការផ្តល់សេវាផ្ទេរប្រាក់បានប្រកាសពីការផ្លាស់ប្តូរចំពោះថ្លៃឈ្នួល សំរាប់កិច្ចការផ្ទេរប្រាក់ដែលផ្ញើទៅប្រទេសកម្ពុជា ។ ថ្លៃឈ្នួលថ្មីនៃការផ្ទេរប្រាក់ គឺអនុវត្តចំពោះកិច្ចការផ្ទេរប្រាក់ Western Union Money Transfer® ដែលផ្ញើទៅស្រុកខ្មែរ ចេញពីកន្លែងភ្នាក់ងារ Western Union ដែលរួមសហការនៅក្នុង Los Angeles និងតំបន់ក្រុង Philadelphia ។

នាង Karen Lithgow ជាអនុប្រធាន និងអ្នកចាត់ចែងការទូទៅនៃ Western Union បាននិយាយថា "យើងដឹងថា មានអតិថិជនខ្មែរជាច្រើន កំពុងតែ រស់នៅសហរដ្ឋអាមេរិក មានការពូកិច្ចខុសៗគ្នា ដើម្បីផ្ញើប្រាក់ទៅមាតុភូមិ សំរាប់មិត្តភ័ក្តិ និងអ្នកជាទីស្រឡាញ់របស់គេ "។ "ថ្លៃឈ្នួល ថ្មីការផ្ទេរប្រាក់របស់ Western Union និងអនុញ្ញាត់ឲ្យអតិថិជនរបស់យើងនៅក្នុង Los Angeles និងតំបន់ក្រុង Philadelphia ផ្ញើប្រាក់ទៅកម្ពុជាបានដោយមានតម្លៃថោកគួរសម និងយក ផលប្រយោជន៍យ៉ាងឆាប់រហ័សអាចពឹងផ្អែកបាន និងងាយស្រួលនៃសេវាការផ្ទេរប្រាក់របស់ Western Union " ។

វាគឺជាសារៈសំខាន់ដើម្បីចំណាំថា ថ្លៃឈ្នួលមិនប្រែប្រួលបានយោងទៅលើកន្លែងភ្នាក់ងារដែលទទួលប្រាក់នៅក្នុងកម្ពុជាទេ គឺ $10.99* សំរាប់ការផ្ញើចំនួនដើម ដល់ទៅ $500 ហើយ $16.99 សំរាប់ការផ្ញើចំនួនប្រាក់ដើមរវាងពី $500.01 ទៅ 1,000 ហើយនិង 2% នៃចំនួនប្រាក់ដើមសំរាប់ការផ្ញើដែលលើសពី $1,000 ចេញពីកន្លែងភ្នាក់ងារដែលរួមសហការ ។

Western Union បានចាប់ផ្តើមសេវាការផ្ទេរប្រាក់ទៅកម្ពុជា នៅក្នុងឆ្នាំ ១៩៩៩ ។ នៅសព្វថ្ងៃនេះ Western Union មានភ្នាក់ងារជាង ១០០ កន្លែង ក្នុង ២៤ ទីក្រុង នៅតាមខេត្តនានាទូទាំងប្រទេស តាមរយៈអ្នកតំណាងរបស់ខ្លួនដែលបានអនុញ្ញាត គឺធនាគារ Acleda Bank , Cambodia Asia Bank និង Singapore Banking Corporation ។

ជាមួយនឹង Western Union អតិថិជនអាចពិនិត្យមើលស្ថានការណ៍កិច្ចការបញ្ជូនប្រាក់របស់គេ ដោយប្រើលេខម្យ៉ាងហៅថា លេខត្រួតត្រាការផ្ទេរប្រាក់ (Money Transfer Control Number – MTCN )។ តាមធម្មតាប្រាក់គឺមានសំរាប់មកយកភ្លាមៗ ** ។ ហើយការផ្ទេរប្រាក់តាមរយៈ Western Union គឺមិនត្រូវការនូវកុងធនាគារ សំរាប់អ្នកផ្ញើ ឬសំរាប់អ្នកទទួលឡើយ ។ អ្នកទទួលមិនត្រូវបានទារថ្លៃឈ្នួលបន្ថែមទេ ហើយថ្លៃឈ្នួលការផ្ទេរប្រាក់មិនប្រែប្រួលបាន យោងទៅលើកន្លែងភ្នាក់ងារដែលទទួល នៅក្នុងកម្ពុជាឡើយ ។ អ្នកផ្ញើត្រូវការតែបំពេញនូវក្រដាសបំពេញ "ដើម្បីផ្ញើលុយ" នៅឯកន្លែងភ្នាក់ងារ Western Union ណាមួយ រួចប្រគល់ប្រាក់ដើម និងថ្លៃឈ្នួលផ្ញើរបស់គេ សំរាប់ការផ្ញើប្រាក់ទៅមាតុភូមិ ។ អតិថិជនក៏អាចប្រើប័ណ្ណឥណទាន គឺប័ណ្ណទិញជឿ សំរាប់កិច្ចការផ្ញើប្រាក់តាម ទូរស័ព្ទ ដោយទូរស័ព្ទទៅលេខ 1-800-CALL-CASH ឬក៏តាមអ៊ិនធ័រណិត នៅឯ WesternUnion.com ។

###

*សំរាប់បើកឲ្យជាដុល្លារអាមេរិកតែប៉ុណ្ណោះ ។ ថ្លៃឈ្នួលនៃការផ្ទេរប្រាក់ មានចាប់តាំងពីថ្ងៃទី ២២ ខែ តុលា ឆ្នាំ ២០០៧ ចេញពីកន្លែងភ្នាក់ងារដែលរួម សហការ នៅក្នុង Los Angeles និងតំបន់ក្រុង Philadelphia ។ តម្លៃនឹងត្រូវផ្លាស់ប្តូរដោយគិតជូនដំណឹងជាមុន ។ ថ្លៃឈ្នួលនៃការផ្ទេរប្រាក់អាចនឹងថ្លៃជាង នៅពេលផ្ញើតាមរយៈទូរស័ព្ទ ឬតាមអ៊ិនធ័រណិត នៅ WesternUnion.com ។

**តាមធម្មតា ប្រាក់គឺមានសំរាប់មកយកភ្លាមៗ ដោយយោងទៅលើម៉ោងធ្វើការនៃកន្លែងភ្នាក់ងារ វេលាម៉ោងខុសគ្នាក្នុងតំបន់ ហើយនិងល័ក្ខខ័ណ្ឌ និង លក្ខណៈនៃសេវា ។

### អំពី *Western Union*

ក្រុមហ៊ុន Western Union ( NYSE : WU ) គឺជាអ្នកនាំមុខគេនៅក្នុងពិភពលោក ក្នុងការផ្តល់សេវាផ្ទេរប្រាក់ ។ ដោយការសាមគ្គីគ្នាជា មួយនឹងសាខារបស់ខ្លួន ដូចជា Orlandi Valuta និង Vigo បានជា Western Union អាចផ្តល់ជូនអតិថិជននូវរបៀបយ៉ាងងាយស្រួល ឆាប់រហ័ស និងអាចពឹង ផ្អែកបាន ដើម្បីផ្ញើ និងទទួលប្រាក់នៅជុំវិញសាកលលោក ព្រមទាំងអាចបញ្ជូនការបើកប្រាក់ និងទិញរូបិយអាណត្តិផងដែរ ។ យើងធ្វើការតាមរយៈបណ្តាញមួយ ដែលមានភ្នាក់ងារជាង 320,000 កន្លែង ច្រើនជាង 200 ប្រទេស និងនៅតាមស្រុកចុងកាត់មាត់ញកនានា ។ ល្បីល្បាញសំរាប់ការរកឃើញរបស់ខ្លួន ខាងសេវា ទូរលេខមុនគេបង្អស់ ដែល Western Union មានដើមកំណើតតាំងពីឆ្នាំ 1851 មកម្ល៉េះ ។ សំរាប់ព័ត៌មានបន្ថែម សូមមើលនៅ WesternUnion.com ។

# ទៀ បាញ់ បង្ហាញពីឆាកជីវិត និង ឈ្មោះ "បាញ់"

នៅដើមខែកក្កដា ឆ្នាំ២០០៧នេះ នៅតាមសាកលវិទ្យាល័យមួយចំនួន ក្នុងទីក្រុងភ្នំពេញ គេបានឃើញសៀវភៅមួយសរសេរអំពី ដំណើរឆាកជីវិតរបស់លោក ទៀ បាញ់ ដែលគេស្គាល់ថា ជាឧបនាយករដ្ឋមន្ត្រី និងជារដ្ឋមន្ត្រីក្រសួងការពារជាតិ ដែលកាន់កាប់តំណែងនេះ ជាង២០ឆ្នាំកន្លងមកនេះ(១៩៨៧-២០០៧)។ សៀវភៅនេះបាននិពន្ធឡើងដោយលោក ណឹម សុវត្ថិ ដែលជាទីប្រឹក្សា និងជានាយកខុទ្ទកាល័យ របស់លោក ហើយក៏ជាអគ្គលេខាធិការរងក្រសួងការពារជាតិផងដែរ ។ សៀវភៅនេះសរសេរជាភាសាខ្មែរកំរាស់១៧២ទំព័រ និងចែកចេញជា ៥ជំពូក ។ បើទោះបីជានៅក្នុងជំពូកទាំងនេះ បានរៀបរាប់អំពីឆាកជីវិត និងការតស៊ូដ៏លំបាកវេទនា ក្នុងការរួមចំណែករំដោះប្រទេសពីរបប ជិះជាន់ និងរបបប្រល័យពូជសាសន៍កម្ពុជាប្រជាធិបតេយ្យ ទៅលើទឹកដីខេត្តកោះកុងពីទសវត្សរ៍ទី ៤០-៧០ ក៏ដោយចុះ ក៏ប៉ុន្តែចំណង ជើងក្រប សៀវភៅនេះបានរំលេចនូវការចាប់អារម្មណ៍ធំៗពីរទៀត ។ ក្នុងនោះ ចំណងជើងធំទី១លើកថា "ជនដែលត្រូវគេបាញ់" និងចំណងជើងធំទី២ លើកថា "រដ្ឋមន្ត្រីការពារជាតិ ទៀ បាញ់ ជាជនជាតិថៃ?"។

ការលើកឡើងនូវចំណងជើងបែបនេះ ត្រូវបានគេគិតថា អ្នកនិពន្ធសៀវភៅនេះចង់ទាក់ទាញចិត្តអ្នកអានអំពីឈ្មោះ "បាញ់" ដ៏ចម្លែកថា តើហេតុអ្វីក៏រដ្ឋមន្ត្រីការពារប្រទេសខ្មែររូបនេះដាក់ឈ្មោះ "ទៀ បាញ់?" ហើយរឿងចម្លែកដែលប្រជាពលរដ្ឋខ្មែរ បានងឿងឆ្ងល់ពីយូរមកហើយទៀតនោះថា តើហេតុអ្វីក៏រដ្ឋមន្ត្រីក្រសួងការពារជាតិរបស់កម្ពុជា និយាយសំនៀងខ្មែរមិនច្បាស់ ។ ពេលគឺនិយាយសំនៀងប៉ាយ ឡាំរបៀប សំនៀងថៃ តើលោកជាជនជាតិថៃ ឬ? ។ ទាក់ទិនទៅនឹងឈ្មោះនេះ បើយោង


ទៀ បាញ់

តាមខ្លឹមសារក្នុងសៀវភៅនេះ អាចឲ្យគេយល់បានថា ឈ្មោះនេះ មិនមែនមានន័យថា រូបលោកនៅពីតូចទាមទារឪពុកម្តាយ ដើម្បីបាញ់អ្វីមួយនោះទេ ។ ពេលគឺ "បាញ់"នេះ មានជាប់ពាក់ព័ន្ធទៅនឹងឆាក ជីវិតតស៊ូដ៏កំសត់ និងពោរពេញទៅដោយភាពគ្រោះថ្នាក់បំផុត ។ ហើយរូបលោកបានជួបជីវិត ដ៏គួរឲ្យឈឺចាប់ និងរន្ធត់ទាំងនោះ ចាប់តាំងពី លោកទើបមានអាយុបាន១១ឆ្នាំរហូតមកម្ល៉េះ ។ ខ្លឹមសារនៅក្នុងសៀវភៅនេះបានពន្យល់ឈ្មោះ "បាញ់"នេះថា គឺជាជនដែលគេបាញ់មិនស្លាប់ ហើយ គេតាមបាញ់ ជារៀងរហូតកាលក្នុងសម័យតស៊ូនោះ ។ រឿងនេះបានធ្វើឲ្យគេហៅរូបលោកថា "បាញ់" និងបូកបន្ថែមនឹងត្រកូលរបស់ លោក


លោក ទៀ បាញ់ និង ភរិយា

ឈ្មោះ "ទៀ" គឺបង្កើតទៅជា ឈ្មោះចម្លែកមួយរហូតដល់សព្វថ្ងៃ គឺ "ទៀ បាញ់" ។

តើដំណើរជីវិតលោក ទៀ បាញ់ យ៉ាងណាបានជាកើតទៅជាឈ្មោះដូចខាងលើនេះ? ។

**ទៀ បាញ់ ឈ្មោះពិតពីកំណើត ទៀ សង្វាន**

ការពិតទៅលោក ទៀ បាញ់ ឈ្មោះពិតប្រាកដ ដែលឪពុកម្តាយដាក់ឈ្មោះឲ្យលោកពីកំណើតនោះ ឈ្មោះថា"ទៀ សង្វាន"នោះទេ ។ លោក ទៀ បាញ់ ឬ ទៀ សង្វាន កើតនៅថ្ងៃទី ០៥ ខែវិច្ឆិកា ឆ្នាំ១៩៤៥ នៅភូមិកោះស្រឡៅ ឃុំតាពិ ស្រុកកោះកុង ខេត្តកោះកុង ។ លោក គឺ ជាកូនកសិករក្រីក្របំផុត ដែលមានឪពុកឈ្មោះ ទៀ តិក មុខរបរធ្វើស្រែ និងកាប់អុស លក់ម្តាយឈ្មោះ នូ ផេងចិន្តា មុខរបរកសិករ មានបង ប្អូនបង្កើត៥នាក់ បងប្រុសទីមួយឈ្មោះ ទៀ សុវត្ថិ បងប្រុសទីពីរឈ្មោះ ទៀ សុទ្ធ កូនទី៣គឺរូបលោក (ទៀ បាញ់ ឬ ទៀ សង្វាន) ប្អូនស្រីទី៤ ទៀ នីវ និងប្អូនប្រុសពៅឈ្មោះ ទៀ វិញ ។ រស់នៅភូមិកោះស្រឡៅបានអាយុ៨ឆ្នាំ ដោយសារគ្រួសារក្រីក្រខ្លាំងពេក និងលំបាកក្នុងការ រកស៊ីគ្រួសាររបស់កុមារ ទៀ សង្វាន ក៏បានផ្លាស់ប្តូរមករស់នៅភូមិក្បែរគ្នានោះដែរ គឺភូមិ គីរីវង្ស និងក្នុងឆ្នាំដដែល (១៩៥៣) គ្រួសារនេះ ក៏បានផ្លាស់មករស់នៅភូមិតាចាត នៅក្បែរផ្ទះម្តាយមីងគេ ក៏ដោយ ក៏គ្រួសារ សង្វាន មិនធូរធារទេ គឺនៅតែយ៉ាប់ខ្លាំងដដែល ។ ពេលគ្រួសារ សង្វាន មានថ្ងៃហូបបាយតិចជាងថ្ងៃហូបបបរ ។ រស់នៅក្នុងភូមិនេះបានបីឆ្នាំឪពុកបង្កើតរបស់កុមារ សង្វាន គឺ ទៀ តិក ដែលមានជម្ងឺពីយូរ មកហើយនោះ ក៏ធ្លាក់ខ្លួនឈឺកាន់តែខ្លាំង ហើយទទួលអនិច្ចកម្មចោលម្តាយ គេឲ្យនៅជាស្ត្រីមេម៉ាយ និងបងប្អូនគេឲ្យនៅកំព្រាអត់ឪពុក ។ រឿង នេះពិតជាមិនធម្មតាឡើយគ្រួសារក្រីក្រ ដែលបាត់បង់ឪពុកជាបង្គោលគ្រួសារ ហើយ

(តទៅទំព័រទី 24 ជ)

## នាទីព្រះពុទ្ធសាសនា

# ថ្ងៃដែលអ្នកកាន់សាសនាចម្រុះមកគាំទ្រព្រះពុទ្ធសាសនា



ដោយ ៖ ពិន សំខុន

Philadelphia

ដោយ ៖ ពិន សំខុន

**តើពិធីវិបស្សនានោះធ្វើដោយរបៀបណា ?**

ខ្មែរយើងជាច្រើន មានជុះនៅក្នុងផ្នត់នៃ "អាត្មា" នូវសេចក្ដីស្រលាញ់ដ៏ធំធេង ក្ដីសណ្ដោសដោយឥតរើសមុខ ចិត្តសទ្ធារហូតដល់ហ៊ានលះបង់ទាំងអស់នូវអ្វីដែល ខ្លួនធ្លាប់មាន ធ្លាប់ស្រលាញ់...។ គឺជាសង្គមមួយដែលភាពប្រសើរនេះបានក្លាយជាទម្លាប់ ហើយទម្លាប់នេះបានធ្វើឲ្យយើង ភ្លេចអនុវត្តជាប្រចាំនូវសីល៥ ដែលធ្វើឲ្យ បុណ្យកើតឡើងបានម៉្លោះហើយលក់ស្រា យកលុយមកធ្វើទានក៏បាន លួចលុយគេយកទៅសង់វិហារក៏បាន បំបាត់ជីវិតអ្នកដទៃ ដើម្បីរក្សាសាសនាក៏ធ្វើបាន ហេតុនេះ ហើយបានជាមានសំណួរតៗគ្នាមកថា "ហេតុអ្វីក៏អាត្មាអញធ្វើបុណ្យស្ទើរស្លាប់ហើយ មិនកើតបុណ្យអ្វីបន្តិចសោះដូច្នោះ ?"

ហេតុនេះវិបស្សនា បានបង្រៀនឲ្យចេះរក្សាសីល៥ នៅក្នុងជីវិតយ៉ាងហោចណាស់ឲ្យបាន ១០ថ្ងៃ ជាដំបូងបង្អស់ គឺការមិនលួច ការមិនកុហក ការមិនសេពកាម ការមិនសម្លាប់ ការមិនប្រើគ្រឿងស្រវឹង ។ បរិយាកាសនេះស្រួលកើតណាស់ កាលពីជំនាន់ព្រះលោកធ្វើពិធីសំណាក់ធម៌នៅក្នុងព្រៃ ដោយគ្មានសម្លេងអ្វីចម្លែក គ្មានក្លិន ថ្មី គ្មានមនុស្សនិយាយគ្នា គ្មានអ្វីដែលត្រូវចង់ ហើយគ្មានមនុស្សភេទផ្សេងគ្នានៅជាមួយដែលអាចសេពកាមបាន...។ល។ ដើម្បីជាជំនួយដល់ការបង្កើតបរិកាសសីល៥ នេះ មជ្ឈមណ្ឌលវិបស្សនានីមួយៗត្រូវឲ្យមានកន្លែងប្រតិបត្តិធម៌ ប្រុសដាច់គ្នាពីស្រី វិន័យបង្គាប់មិនឲ្យនិយាយគ្នា មិនឲ្យមើលហួសពីដំហានរបស់ខ្លួន ឬក្រ័តូវអង្គុយ បិទភ្នែកទាំងស្រុង មិនឲ្យមានកង្វល់នឹងម្ហូបអាហារ ដោយមានមនុស្សផ្សេងមករៀបចំបំរើបាយទឹក មិនឲ្យមានទំនាក់ទំនងទូរស័ព្ទ ឬជួបបងប្អូន ឬមើលកាសែត ស្ដាប់ វិទ្យុ ឬមើលទូរទស្សន៍បានទេ ។ គឺត្រូវមករស់នៅក្នុងមជ្ឈមណ្ឌលចំនួន១០ថ្ងៃពេញលេញដោយផ្ដាច់ទំនាក់ទំនងនៅខាងក្រៅទាំងអស់ ។

ចាប់ពីថ្ងៃដំបូងដល់ថ្ងៃបញ្ចប់ សិស្សវិបស្សនាទាំងអស់ត្រូវមកអង្គុយពែនភ្នែន ឬប្រកាន់ឥរិយាបថណាមួយ ដែលសម្រួលកាយបានយូរ (ខ្លះអង្គុយលើកៅអីក៏ បាន) តែត្រូវអង្គុយបិទភ្នែកទាំង១០ថ្ងៃនោះ គឺចាប់ពីម៉ោង៤:៣០ទៀបភ្លឺ រហូតដល់ម៉ោង៩យប់វិញទើបត្រឡប់ទៅកាន់ដំណេកវិញ នៅរៀងរាល់មួយម៉ោងម្ដងគ្រូបង្ហាត់អនុញ្ញាតឲ្យសម្រាកបន្ធូរកាយ ចំនួន៥នាទី ។ រីឯម្ហូបទាំង៣ពេលក្នុងមួយថ្ងៃបានត្រូវសិស្សដែលធ្លាប់បានរៀនសូត្រមុនៗស្ម័គ្រចិត្តបំរើបាយទឹកអ្នកអង្គុយទាំង ១០ថ្ងៃដូចគ្នា ។

ការអង្គុយបិទភ្នែក បានត្រូវណែនាំដោយលោកគ្រូ គោអិនកា ដោយផ្ទាល់គ្រប់ៗគ្នាតាមរយៈខ្សែអាត់ថតសម្លេង ឬបញ្ចាំងរូបវីដេអូ ដើម្បីចៀសវាងការបក ប្រែ ឬប្រែប្រួលទៅតាមកាលៈទេសៈនូវបទបញ្ជា ឬអត្ថន័យណាមួយឡើយ ។ គ្រូបង្ហាត់នៅទីមជ្ឈមណ្ឌលនោះ គ្រាន់តែជាអ្នកជួយពន្យល់ និងណែនាំបច្ចេកទេសដែល សិស្សយល់មិនច្បាស់ ឬចាប់មិនបានតែប៉ុណ្ណោះ ។

នាថ្ងៃទី១ ទី២ និងទី៣ សិស្សត្រូវរៀនដកដង្ហើមចេញចូលតែប៉ុណ្ណោះ ដែលហៅថា "អនាប៉ា" ជាផ្នែកដ៏លំបាកមួយ ដែលការតម្រង់អារម្មណ៍ឲ្យមូលមកលើ ដង្ហើមចេញចូលមកលើខ្យល់ដែលចេញពីរន្ធច្រមុះ មកប៉ះបបូរមាត់ខាងលើរបស់យើង ។ គឺជាសញ្ញាដ៏តិចតួចបំផុត ដែលមកប៉ះស្បែកបបូរមាត់ តែយើងត្រូវតែផ្ដោត អារម្មណ៍ឲ្យបានច្រើនទៅវិញ ។ មនុស្សជាច្រើនមិនអាចផ្ដោតអារម្មណ៍ឲ្យបានលើសពី៥នាទីទេ អារម្មណ៍នោះវាហោះហើរទៅគិតអ្វីថ្មីបាត់អស់ ទៅតាមរូបស្រមៃដែល វាផុសចេញមកនៅពេលយើងធ្មេចភ្នែកយូរទៅ ហើយជារៀងរាល់ពេល យើងត្រូវផ្ដាច់អារម្មណ៍ ហើយទាញវាមកដាក់ក្បែរខ្នង់ច្រមុះ ដែលមានសញ្ញាខ្យល់ចេញចូលដ៏ តិចតួចនោះវិញ ។



ក្នុងរយៈពេល២ថ្ងៃនោះ ថ្វីត្បិតតែយើងឃើញក្រុមមនុស្សអង្គុយយ៉ាងយូរ យ៉ាងស្ងៀមស្ងាត់ ហើយស្ងប់បំផុតនោះ ក៏ប៉ុន្តែនៅក្នុងស្មារតី នៅក្នុងអារម្មណ៍នៃ សិស្សវិបស្សនាម្នាក់ៗកំពុងតែធ្វើការយ៉ាងខ្លាំងក្លា ដោយគ្មាននរណាបង្ខំ ឬជួយបានទេ ។ ខ្លះបាននិយាយថា មានខ្យល់កួចនៅក្នុងក្បាលយ៉ាងស្មុគស្មាញ ខ្លះទៀតថា អារម្មណ៍សោកសៅ បានហូរចេញមកទប់មិនបាន ខ្លះថាខ្លួនមានកំដៅហូតដល់លោកដៃជើង ដោយគ្មានភ្លើងឆេះទីណាសោះ ខ្លះទៀតកើតមានមោសពេញខ្លួន ដែលគ្រូ ហាមមិនអាចអេះអ្វីទាំងអស់...ទាំងនេះជាអារម្មណ៍ដែលសិស្សម្នាក់ៗតែងមាន ហើយខុសៗគ្នាទាំងអស់ តែកំណើតនៃព្រឹត្តិការណ៍ផ្ទៃក្នុងទាំងនោះ បានត្រូវលោកគ្រូ គោអិនកា និងគ្រូជំនួយទាំងអស់ណែនាំថា"កុំធ្វើអ្វីទាំងអស់ កុំឲ្យប៉ះពាល់ កុំឲ្យប្រឹងទប់ទល់ វានឹងបាត់ទៅវិញដោយឯកឯងស្របទៅតាមច្បាប់ធម្មជាតិ របស់ដែលកើតឡើង នឹងរលត់ទៅវិញទាំងអស់"។ ឧប្បត្តិហេតុផ្ទៃក្នុងនេះមានឈ្មោះថា "វេទនា" ដែលទៅពុះជាក់នៃក្នុងខ្លួនមនុស្សម្នាក់ៗ នៅពេលណាដែលយើងផ្ដោតអារម្មណ៍ជាប់ ចិត្តស្រលាញ់ខ្លាំង ឬស្អប់ខ្លាំង បង្កើតឲ្យចង់បានកាន់តែច្រើន ឬក៏គុំគួនកាន់តែជាំទៅ ដែលវានឹងបញ្ចូលរូបរាងកាយឲ្យធ្វើសកម្មភាព ដែលអាចនឹងហួសហេតុណាមួយ ដែលគេហៅថា"ទុក្ខ"នោះបាន ។ "វេទនា" នោះគឺគេហប់ទាំងការអង្គុយយូរ ធ្វើឲ្យចុកស្រពន់ជើងជាខ្លាំង បើយើងមិនរវល់នឹងការស្រពន់ចុកចាប់នោះទេ វានឹងបាត់ទៅ វិញដោយឯកឯង ។

ថ្ងៃទី៣ គឺគេផ្ដើមផ្លាស់អំពីអ្វីដែល "វេទនា" បានបញ្ចេញមកក្រៅតែនៅតែក្សាការផ្ទង់ស្មារតីទៅលើដង្ហើម"អនាប៉ា" ដដែល ។ ថ្ងៃទី៤ ទី៥ ទី៦ និងទី៧ គឺការចាប់ពិនិត្យរូបរាងកាយខ្លួនឯងទាំងខាងក្នុង និងខាងក្រៅខ្លួន ដោយប្រើអារម្មណ៍ផ្ទាល់ ។ គឺចាប់ពីថ្ងៃទី៤នោះហើយ ដែលសព្វសរពាង្គកាយមាន ភាពរសើបយ៉ាងខ្លាំង គ្រប់គ្រាន់ចាប់ទទួលនូវចលនានៃចន្លោះអត្ថិសនីតស់លើស្បែក តស់ពីក្បាលដល់ចុងជើង ពីចុងជើងឡើងមកក្បាលវិញ ហើយតស់កាត់ទទឹងខ្លួនក៏មាន។ ចំណែកអារម្មណ៍អ្នក"អង្គុយធម៌" គេយល់ថា ដូចជាមានអ្វីមួយមកបបោសអង្អែលខ្លួនគេ ក្នុងពេលកំពុងប្រតិបត្តិវិបស្សនានោះដែរ ។ ការពិនិត្យ រូបរាងកាយរបស់បុគ្គល ក៏ត្រូវប្រើវិធីដកដង្ហើម "អនាប៉ា" ជាបន្តទៅដែរ ដូច្នេះគឺជាការផ្ទង់អារម្មណ៍ឡើតតែមួយលមកលើរូបរាងកាយ ហើយដង្ហើមដែលដើរជា ស្វ័យប្រវត្តិក៏តែងតែដកខ្លីទៅៗថែមទៀត ដោយពុំមានខានដល់សុខភាពអ្វីទេ ។ បន្ថែមពីលើនេះទៀត សញ្ញា"វេទនា"នៅតែបន្តហូរចេញមកតាមរយៈការ ប្រៀនប្រដៅរបស់ព្រះពុទ្ធថា"ឧបេក្ខា"ដែលមានន័យថា អ្វីដែលឃើញបានដឹងនៅពេលអង្គុយនោះ ទោះជាស្រលាញ់ក្ដី ស្អប់ក្ដី ដូចជាឃើញរូបសង្សារជាទី ស្រលាញ់ ដូចជាឃើញរូបអ្នកដែលធ្លាប់ធ្វើបាបខ្លួន ដូចជា ការចុកចាប់រោយស្រពន់ក្ដី មិនត្រូវទទួលដឹងឮ ឬ រក្សានៅឲ្យបានយូរជាប់នឹងអារម្មណ៍នោះទេ ត្រូវ បណ្ដែតឲ្យវាឆ្លងផុតទៅដោយឯកឯង ទើប រំងាប់ "ទុក្ខ" ហើយសេចក្ដី "ស្ងប់" អាចកើតមកបាន ។ ការហាត់រៀនយល់ពីខ្លួនឯងអស់រយៈពេល៦ថ្ងៃ សេចក្ដីស្ងប់ សន្មត់ថា បានមកសណ្ឋិតនៅក្នុងខ្លួនបុគ្គល ភាពភ្លឺថ្លានៃអារម្មណ៍ បានមកដល់នៅថ្ងៃទី១០ ជាថ្ងៃចុងបញ្ចប់នោះ ជាថ្ងៃសិស្សទាំងអស់ នាំគ្នាប្រារព្ធពិធីផ្សាយមេត្តាធម៌ ។ គឺជាវិធីមួយដែលជាលក្ខណៈសម្បត្តិដ៏សំខាន់នៃព្រះពុទ្ធសាសនា ការចែករំលែកព្រះធម៌ដែលម្នាក់ៗទទួលបានឲ្យទៅដល់អ្នកដទៃ បើទោះជាយើង ស្រលាញ់ ឬស្អប់ក៏ដោយក្ដី ក្នុងភាពបរិសុទ្ធ ។ "សូមឲ្យសេចក្ដីសុខ សេចក្ដីស្ងប់ បានកើតដូចគ្នាដល់មាតាបិតា បងប្អូន ជូនតា មាមីង សូមឲ្យ"ទុក្ខ" បានត្រូវ រំងាប់ដល់ពូសុខ ពូសៅ ដែលធ្លាប់ជាគូសត្រូវរបស់ខ្ញុំ សូមឲ្យមានសេចក្ដីសុខសប្បាយក្នុងចិត្ត ចិត្តសទ្ធាកើតមានដល់អ្នកទាំងអស់គ្រប់ៗគ្នា" ។ល។

**ចុះអ្នកបំរើម្ហូបចំណីវិញ មានតួនាទីអ្វីដែរក្នុងការវិបស្សនាកម្មដ្ឋាននោះ ?** គឺជាផ្នែកមួយរបស់វិបស្សនាដែរ ដែលអ្នកបំរើត្រូវមានឱកាសដែលនៅសល់ មកអង្គុយដូចគេឯងដែរ ។ អ្នកបំរើទាំងនោះត្រូវបំរើក្នុងគោលការណ៍ជួយឲ្យសិស្សវិបស្សនាអាចបំពេញធម៌ឲ្យបានប្រសើរបំផុតនេះម្យ៉ាង ហើយម្យ៉ាងទៀត បុគ្គលម្នាក់ៗធ្លាប់ធ្វើធំប៉ុណ្ណាក៏ដោយ ឧបមាថា មានឈ្នួលបំរើរបស់ខ្លួនមកអង្គុយធម៌ដែរនោះ ត្រូវបំរើឈ្នួលវិញដោយគ្មានអារម្មណ៍អល់អែកអ្វីឡើយ ។ គឺជា អត្ថន័យនៃការបំរើដោយគ្មានរើសឋានៈជាអ្វីក៏ដោយ ។

១០ថ្ងៃនៃការចូលអាស្រម គ្មានដំណឹងពីបងប្អូនកូនចៅ គ្មានព័ត៌មានពីសង្គមណាមួយ គ្មានសម្លេងមនុស្ស ក្រៅពីខ្យល់បក់ និងសម្លេងជួងដ៏គ្រលួចរំលឹក ពីពិធីដែលត្រូវធ្វើជាបន្ទាន់ ។ សម្លេងមនុស្សតែម្នាក់គត់ដែលគេបានទទួល គឺការប្រៀនប្រដៅ និងពន្យល់របស់លោកគ្រូគោអិនកា ដែលជាសាវករបស់ ព្រះពុទ្ធ ក្រោយជំនាន់ព្រះគ្រូ អ៊ូបាឃិន នៃប្រទេសភូមា នៅ ២៥០០ឆ្នាំ បន្ទាប់ពីព្រះពុទ្ធចូលទីវង្គត់មក ។

លើកក្រោយយើងនឹងនិយាយអំពីថា "អង្គុយធម៌" នឹងមានប្រយោជន៍អ្វីខ្លះដល់អ្នកប្រតិបត្តិតាមព្រះធម៌ ? ។/

# របប លន់ នល់ បរាជ័យព្រោះតែទាហានពុករលួយ ?

ដោយ ៖ មាជ សុវណ្ណារ៉ា

កាលពីរាត្រីថ្ងៃសៅរ៍ ក្រោមអាកាសធាតុត្រជាក់នៅក្នុងភោជនីយដ្ឋាន ហាន់សួគ៌ថ្មី



LY, KALMINE



Harrison Lee

កណ្ដាលក្រុង Long Beach គេឃើញក្រុងអតីតយុទ្ធជននៃរបប សាធារណរដ្ឋប្រមាណជាង២០០នាក់ បានជួបជុំគ្នារំលឹកនូវខួបអនុស្សាវរីយ៍បន្តពីឆ្នាំ១៩៧៥ រហូតមកនៃក្រុមអតីតយុទ្ធមិត្តពួកគេ ។

សម្លេងស្នូរផ្ទុះគ្រាប់ បានលាន់ឮឡើងក្នុងឈុតឆាកឯកសារវីឌីអូ ដែលកងទ័ពជាតិខេមរភូមិន្ទក្នុងរបប លន់ នល់ និងពួកខ្មែរក្រហមបានប្រយុទ្ធប្រឆាំងដើម្បី ជំនជំនះគ្នាក្នុងការក្ដោបអំណាច ។

វីរភាពដ៏អង់អាចដោយគ្មានតក់ស្លុតរត់តម្រង់បាញ់ខ្មាំងរបស់ពួកកងទ័ព លន់ នល់ នាសម័យកាលទសវត្សរ៍ឆ្នាំ៧០ តាមការឆ្លុះបញ្ចាំងនៅលើកញ្ចក់ Video ឯកសារ ដែលរូបភាពមនុស្សខ្លះកំពុងនៅរស់ជួបមុខក្នុងពិធីយប់នោះ ទំនងមើលទៅពួកគេហាក់មិនរុញរា ក្នុងការយកជីវិតទៅប្ដូរលើសមរភូមិ ដែលកំពុងតែបាចសាច ដោយគ្រាប់កាំភ្លើងដៃ និងគ្រាប់ផ្លោងពីខ្មាំង រាំងពួកខ្លួនជាមួយខ្មាំង ដើម្បីបុព្វហេតុការពារមាតុភូមិ មិនឲ្យខ្មាំងឈ្លានពានដល់ជីវិតទីបញ្ចប់នៃពួកគេ ។

ទោះបីឯកសារប្រវត្តិសាស្ត្រ បានអះអាងថាក្នុងសង្គ្រាមប្រយុទ្ធនាពេលនោះ កងទ័ព លន់ នល់ បានស្លាប់លើសមរភូមិក្នុងថ្ងៃមិនតិចជាង ១០០០នាក់ទេ។

ដោយភាពតស៊ូស្វិតស្វាញរបស់អតីតយុទ្ធជន នាអតីតកាលដ៏ជូរចត់នៃការកាប់សម្លាប់រង្គាលនោះ។ ក្រុមអតីតយុទ្ធជន ដែលបានទទួលនូវភាពបរាជ័យ(បាក់ ទ័ព) ក្នុងការប្រយុទ្ធជាមួយខ្មាំង បានស្ដីបន្ទោសអ្នកដឹកនាំកំពូលៗ របស់ខ្លួនដែលបង្កបញ្ហាពុករលួយខាងផ្នែកយោធា រហូតបន្សល់នូវពាក្យចោទប្រកាន់មិនរើសមុខថា ទាហាន លន់ នល់ សុទ្ធតែជាទាហានពុករលួយ បានជាចាញ់ខ្មាំង ។ ការចោទប្រកាន់មិនរើសមុខនេះ ត្រូវបានប្រានចោលដោយប្រធានសមាគម អតីតយុទ្ធជន លោក Ly, Kalmine ជាអតីតកងទ័ពអាកាស បានបដិសេធថា កាលជំនាន់នោះមានតែពួកអស់លោកមេទាហានធំៗគ្រាក់ៗទេ ដែលបានប្រព្រឹត្តនូវអំពើពុករលួយ រឿងអាស្រូវអស់នោះ ។ ចំណែកពួកយើងជានាយទាហាន នាយទាហានរង ពលទាហាន ដែលជាអ្នកប្រយុទ្ធផ្ទាល់ដៃលើសមរភូមិ ដោយមិនស្ដាយជីវិតប្រឆាំងក្រុមខ្មែរប្រល័យពូជសាសន៍ និងបរទេសឈ្លានពានទឹកដី(យួន វៀតកុង)។



ក្រុមប្រឹក្សាភិបាល អតីតសមាគមយុទ្ធជន

លោក Kalmine បន្តថាពួកយើងមិនបានប្រព្រឹត្តនូវអំពើស្មោគគ្រោគ អស់ទាំងនោះទេ ដោយពួកយើង នៅតែមានសតិសម្បជញ្ញៈខ្ពង់ខ្ពស់ជានិច្ច ។ ទោះបី យើងចាញ់សង្គ្រាម, ព្រាត់ប្រាស់គ្រួសារ ឪពុកម្ដាយ បងប្អូន ជីដូនជីតា រហូតដល់ភៀសខ្លួនមករស់នៅស្រុកគេដើម្បីសាងជីវិតថ្មីក៏ដោយ ក៏ពួកយើងនៅតែពើងទ្រូង ញញឹមទុកក្នុងចិត្តជានិច្ច ដោយយល់ឃើញថា បានច្បាំងតស៊ូផ្ទាល់ដើម្បីការពារជាតិប្រឆាំងនឹងការស្លាប់រង្គាលនៃមនុស្សជាតិ របស់ពួកខ្មែរក្រហម និងបរទេស យួន ឈ្លានពានទឹកដី ។ លោក តាត សារ៉េត អតីតនាយទាហានស័ក្តិ២ ផ្នែកការិយាល័យបញ្ជូនសារនិងវិទ្យុទាក់ទងនៃតំបន់យោធាសឹក ខេត្តបាត់ដំបង ក្នុងរបបសាធារណរដ្ឋ និង វិទ្យុទាក់ទងនៃតំបន់យោធាសឹកខេត្តបាត់ដំបង ក្នុងរបបសាធារណរដ្ឋបាននិយាយថា ការបរាជ័យរបស់ទ័ព លន់ នល់ ព្រោះតែមានអ្នកក្បត់រាយការណ៍ឲ្យខ្មាំង (ខ្មែរក្រហម) ព្រោះនៅតំបន់សមរភូមិបាត់ដំបង ការចល័តទ័ពត្រូវខ្មាំងដឹងដោយវាយស្កាត់ ធ្វើឲ្យទាហានស្លាប់និងបរាជ័យក្នុងសមរភូមិ ។

តាត សារ៉េត បន្តថា យើងបានដឹងពីផែនការខ្មាំងតាមវិទ្យុទាក់ទង ដោយពួកខ្មាំងក៏គេបានដឹងពីយុទ្ធសាស្ត្រយើងដែរ ។ អ្នកប្រវត្តិសាស្ត្រនិយាយថា ការបរាជ័យរបស់របប លន់ នល់ ព្រោះតែនយោបាយពួកមហាអំណាច ប្ដូររបត់ដឹកនាំ ពីរបបសាធារណរដ្ឋ ទៅជារបបលទ្ធិប្រជាធិបតេយ្យ ដែលធ្វើឲ្យជំនួយគាំទ្រដល់របប លន់ នល់ ត្រូវបានគាត់ផ្ដាច់ពីសហរដ្ឋអាមេរិកទាំងស្រុង ដែលជាឱកាសធ្វើឲ្យចលនាខ្មែរក្រហមមានប្រៀបរហូតដល់ទទួល ជ័យជំនះថ្ងៃ ១៧ មេសា ១៩៧៥ ។

ផាំង សុង អតីតនាំពាក្យទីបញ្ជាការជាន់ខ្ពស់ក្នុងរបបសាធារណរដ្ឋខ្មែរ បានអះអាងថា ជាការធម្មតា អ្នកតែងមានឱកាស ឬមធ្យោបាយច្រើនជាងអ្នកតូចក្នុងការធ្វើល្អ ជួយជាតិ ឬធ្វើអាក្រក់បំផ្លាញជាតិ ។ រឿងល្អ-អាក្រក់វាអាស្រ័យទៅលើសតិសម្បជញ្ញៈ របស់បុគ្គលម្នាក់ៗ មិនមែនជាអភ័យឯកសិទ្ធិរបស់អ្នកធំ-អ្នកតូច ផ្ដាច់មុខឡើយ ។ នៅក្នុងសង្គ្រាមដែលឆាបឆេះនៅលើទឹកដីខ្មែរ, ជួរដឹកនាំខ្មែរ ទាំងស៊ីវិល ទាំងទាហាន ត្រូវប្រឈមមុខមួយរំពេចភ្លាមទល់នឹងការវាយប្រហារ ដូចផ្លេកបន្ទោររបស់វៀតកុង និងយួនខាងជើង ។ សូមកុំភ្លេចសោះឡើយថា យុទ្ធជនរាប់ម៉ឺននាក់ ដែលបានធ្វើពលិកម្មនៅសមរភូមិមុខដំបូងបង្អស់ ភាគច្រើនជាយុវជនស្ម័គចិត្តចូល បំរើជាតិ ដែលគេតែងហៅថា "ទាហាន២៤ម៉ោង" ។ យុវជនទាំងនេះទើបតែបានហាត់កាន់កាំភ្លើង បន្តិចបន្តួចប៉ុណ្ណោះ។ ចំណែកនាយទាហានជាអ្នកដឹកនាំ-បញ្ជាការសឹកវិញ ភាគច្រើនជានាយទាហាន ចេញពីអតីតសាលាយោធាបារាំងភ្នំពេញ ដោយពុំសូវមានការពិសោធន៍នៅក្នុងសមរភូមិនៅឡើយផង ។

មួយស្របក់ក្អែកដំបូងនេះ កងយោធពលខេមរជាតិ ត្រូវកើនចំនួនពី២៥,០០០នាក់ កាន់អាវុធចាស់ៗច្រេះចាប់ ការប្រើប្រាស់អាវុធយុទ្ធភណ្ឌថ្មីៗ ក៏ត្រូវតម្រូវ ឲ្យមានការរៀបចំហ្វឹកហ្វឺនយ៉ាងបន្ទាន់ថែមទៀត ។

លោក ផាំង សុង បន្តថា នៅពេលដែលគេត្រូវវាយសឹកយ៉ាងសាហាវគ្រប់ទិស ដើម្បីការពារទឹកដីប្រឆាំងសត្រូវ ពីក្រៅប្រទេសផង និងសត្រូវពីក្នុងប្រទេសផង គេក៏ត្រូវរៀបចំស្ថាប័នកំពូលរបស់ជាតិ ឯទៀតយ៉ាងមមាញឹក, មានការបោះឆ្នោតជាដើម...ឲ្យចេញពីរបបរាជានិយមទៅជារបបសាធារណរដ្ឋ ថែមទៀត ។

ការគ្រប់គ្រងប្រទេស យ៉ាងតក់ក្រហល់ប្រកបដោយគ្រោះថ្នាក់ គ្រប់បែបយ៉ាងទាំងនេះបាននាំមកនូវការខ្វះខាត, ឆ្វេសប្រហែស, ទន់ខ្សោយជាច្រើនអន្លើរ ។ ការខ្វះខាតខ្លះអាចចាត់ទុកថា ជាការពុករលួយក៏បាន ។ ប៉ុន្តែពិត

(តទៅទំព័រទី 29 ឈ)

# ប្រវត្តិពិធីបុណ្យអុំទូក បណ្តែតប្រទីប និង សំពះព្រះខែ អកអំបុក

តាមឯកសារស្រាវជ្រាវរបស់អ្នកស្រី កែវ ណារុំ នៅក្នុងសៀវភៅគន្ថី និងជីវិត បោះពុម្ពឆ្នាំ ១៩៩៥ បានសរសេរថា បុណ្យអុំទូក លយប្រទីប និងសំពះព្រះខែ អកអំបុក គឺជាបុណ្យប្រពៃណីធំមួយរបស់ប្រជាពលរដ្ឋខ្មែរ និងតែងប្រារព្ធឡើងជារៀងរាល់ឆ្នាំ ក្នុងរយៈពេល៣ថ្ងៃ គឺនៅថ្ងៃទី១៤ -១៥ កើត និង ១រោច ខែ កត្តិក ដោយពិធីនីមួយៗធ្វើប្លែកពីគ្នា តាមរយៈពេលកំណត់នោះ ។



១/-បុណ្យអុំទូក ៖

បុណ្យអុំទូកតាមប្រវត្តិពីបុរាណមក មានតំណាលខុសទិដ្ឋភាពនៃការប្រណាំងទូកគ្នា ។ ប៉ុន្តែគេអាចឃើញភស្តុតាងជាក់ស្តែង នៅក្នុងចម្លាក់ នាំផែងប្រាសាទបាយ័ន និង

(តទៅទំព័រទី 27 ញ)

# សារព័ត៌មានសេរីត្រូវបានរឹបអូសខណៈដែលកម្ពុជាឈរនៅលំដាប់លើគេខាងសេរីភាព សារព័ត៌មាន

ទស្សនាវដ្តីសារព័ត៌មានសេរី ដែលទើបតែលេចមុខលើទីផ្សារព័ត៌មានដំបូងក្នុងលេខទី១ ឆ្នាំទី ១ ប្រចាំខែវិច្ឆិកា ត្រូវអាជ្ញាធរ ស្លៀកស៊ីវិលដើរប្រមូលពីតូបលក់កាសែតនានាក្នុងក្រុងភ្នំពេញ និងហាមប្រាមមិនឲ្យចែកចាយបន្ត កាលពីថ្ងៃ ៣១ តុលា ២០០៧ ។ ចាងហ្វាងការផ្សាយទស្សនាវដ្តីនេះ បានហៅការរឹបអូសនោះថា ជាការរំលោភដល់សេរីភាពសារព័ត៌មានក្នុងប្រទេសប្រកាន់លទ្ធិប្រជា ធិបតេយ្យ ។

រដ្ឋមន្ត្រីក្រសួងព័ត៌មានលោក ខៀវ កាញារីទ្ធ បានឲ្យដឹងថា លោកបានទទួលព័ត៌មានពីការរឹបអូសទស្សនាវដ្តីនេះពីសមត្ថកិច្ច ដោយសារថា បានរំលោភទៅលើព្រះមហាក្សត្រ ដែលច្បាប់កំណត់មិនឲ្យធ្វើការរំលោភបំពានជាដាច់ខាត ។

ទស្សនាវដ្តីសារព័ត៌មានសេរី បានប្រើគ្លុកនៅលើក្របដែលគេអាចមើលយល់ថា សម្តេចនរោត្តម សីហនុ អតីតព្រះមហាក្សត្រ និងជាអតីតប្រធានរដ្ឋកម្ពុជាប្រជាធិបតេយ្យរហូតដល់ឆ្នាំ១៩៧៦នោះ កំពុងត្រូវការពារដោយរដ្ឋាភិបាលភ្នំពេញរបស់លោក ហ៊ុន សែន មិនឲ្យតុលាការចំរុះសាសន៍កាត់ទោសពួកមេខ្មែរក្រហម បែបកូនកាត់នេះកោះហៅទៅសាកសួរឡើយ ។ អមជាមួយរូបគ្លុកនោះ ក៏មានអត្ថបទអត្ថាធិប្បាយក្រោមចំណងជើងថា ៖ "គ្មានអភ័យឯកសិទ្ធិសម្រាប់ ពាត្តមសីហនុ ដែលសរសេរដោយបណ្ឌិត ឡៅ ម៉ុងហៃ ជាអ្នកស្រាវជ្រាវរបស់គណៈកម្មាធិការសិទ្ធិមនុស្សអាស៊ីផង"។

ក្រៅពីអត្ថបទជាចំណុចរសើបក្នុងបទអត្ថាធិប្បាយ នៅមានអត្ថបទជាច្រើនទៀត ដែលសុទ្ធសឹងបង្ហាញពីចំណុចស្រៀវស្រើប របស់រដ្ឋាភិបាល ហ៊ុន សែន ដូចជាករណីឃាតកម្មលើមេដឹកនាំសហជីពសេរីកម្មករ លោក ជា វិជ្ជា ដែលសង្កត់ន័យអំពីខ្សែវីដេអូថា ជន អាមេរិកបង្ហាញពីផែនការខ្មៅរបស់រដ្ឋាភិបាល...។ អត្ថបទស្តាល់ឃាតកសម្លាប់តារាស្រីល្បីឈ្មោះ ពិសិដ្ឋ ពិលិកា តែមិនហ៊ាន ដោយ មានទាំងឯកសារអំពីករណីស្នេហ៍រវាងតួស្រីម្នាក់នេះជាមួយនិងលោក ហ៊ុន សែន ដែលមានលោក ហុក ឡង់ឌី ជាអ្នកមេអណ្តើក និង សំណេរកំណត់ហេតុរបស់នាងដែលទស្សនាវដ្តីបារាំង L`Express បានចុះផ្សាយ ។ ហើយនិងអត្ថ

(តទៅទំព័រទី 24)

(តមកពីទំព័រទី 17 ឆ)

ខណៈដែលភោជនីយដ្ឋានខ្មែរ ជាច្រើនទៀត បានកកើតមានមកព្រោងព្រាតជាយូរហើយដែរនោះ ។

បន្ទាប់ពីកាត់ខ្សែបូរ ក្រោមក្រសែភ្នែកមនុស្សជាភ្ញៀវចូលរួមអបអរសាទរ ដល់អ្នកបើកជំនួញថ្មីប្រមាណ២០០នាក់។ចៅហ្វាយរងក្រុង Long Beach អ្នកស្រី Bonnie Lowenthal ដែលចូលរួមជាគណៈបតី បានមានប្រសាសន៍ថា អ្នកស្រីនឹងនិយាយប្រាប់ ដល់មន្ត្រីសាលាក្រុង Long Beach ឲ្យមកកាន់ទីនេះ (ភោជនីយដ្ឋានវិមានមាស) ដើម្បីផ្លក់ម្ហូបខ្មែរក្នុងការជួយលើកស្ទួយផលរបររកស៊ីរបស់បងប្អូនខ្មែរ ក្នុងក្រុង Cambodia Town ។ អ្នកស្រីចៅហ្វាយរងក្រុងបន្តថា សូមឲ្យមានជោគជ័យពីថ្ងៃនេះទៅសំរាប់ផលរបររកស៊ីជួញដូររបស់បងប្អូនខ្មែរ ។

-អតីតអគ្គរដ្ឋទូតអាមេរិក ប្រចាំអង្គការសហប្រជាជាតិ និងជាឧបការីអតីតប្រធានាធិបតី George Bush លោក ស៊ីវ ស៊ីច័ន្ទ ដែលមានវត្តមាននាពេលនោះដែរ បានអះអាងថា ក្នុងនាមជាខ្មែរ យើងរីករាយដែលសហគមន៍ខ្មែរមានការអភិវឌ្ឍន៍រីកចំរើននៅពេលដែល តំបន់ខ្មែរយើងក្លាយជាក្រុងខ្មែរ ។

ម្ចាស់ភាគហ៊ុនទាំង៣នាក់ ថ្លែងក្នុងពិធីសម្ពោធបានបង្ហាញក្តីរីករាយ ក្នុងទឹកចិត្តរំភើប និងអរគុណចំពោះភ្ញៀវ ដែលមកចូលរួមអបអរសាទរ និងគាំទ្រក្នុងពិធីនេះ ។ ដោយពួកគេសង្ឃឹមទៅថ្ងៃមុខបងប្អូនខ្មែរ និងជួយគាំទ្រភោជនីយដ្ឋានវិមានមាសនេះ ក្នុងនាម "ខ្មែរជួយខ្មែរ" ដែលមានន័យថា យើងនាំគ្នាជួយអភិវឌ្ឍន៍ តំបន់សហគមន៍ខ្មែរទាំងអស់គ្នាតាមរយៈការបើកជំនួញរកស៊ីព្រោងព្រាតរបស់ខ្មែរ ។

រីឯចៅហ្វាយសង្កាត់លេខ៦ Dee Andrews ថ្លែងថា គាត់រីករាយដែលឃើញបងប្អូខ្មែរបើករបររកស៊ីដើម្បីរីកចំរើននៅក្នុងតំបន់ សង្កាត់យើងដែលសំបូរទៅដោយខ្មែររស់នៅ។ សូមឲ្យភាពរីកចំរើនបន្តកើតមានជារៀងរហូត សំរាប់ខ្មែរ។

តំបន់ខ្មែរផ្លូវ Anaheim ប្រមូលផ្តុំដោយអ្នកជំនួញគ្រប់សព្វសារពើដើម្បីកសាងជីវិត និងស្វែងរកភាពប្រសើរក្នុងជីវភាពរស់នៅជា ជនចំណាកស្រុក ។ ក៏ប៉ុន្តែ ការរីកចំរើននៃដំណើរជីវិតវាគាប់ប្រសើរជោគជ័យ ឬបរាជ័យវាអាស្រ័យទៅលើការប៉ិនប្រសព្វ របស់អ្នកជំនួញក្នុងរកស៊ីទាក់ទាញភ្ញៀវ ក្នុងជំនាញទំនាក់ទំនងសាធារណៈផ្សំជាមួយភព្វព្រេងវាសនា ឬទេវតាប្រទាន ។ តួយ៉ាងដូចជា រង្គសាល ឬភោជនីយដ្ឋាន វិមានមាស កាលពីមុនទីកន្លែងនេះ អ្នកបើកជំនួញ ៣-៤ ម្ចាស់ទៅហើយដែលបានដួលរលំ ព្រោះតែការរកស៊ីមិនកាក់កប ហើយត្រូវបានបិទទ្វារ ក្រោមផ្លាកឈ្មោះ " Green Mango " នោះ ។/

(តមកពីទំព័រទី 17 ច)

ខ្មែរប៉ុស្តិ៍ សូមលើកយកមកនិយាយពីជ្រុងមួយនៃនយោបាយដឹកនាំរបស់ចៅសង្កាត់ទី៦ នៃ



ក្រុង Long Beach, Dee Andrews ដែលបានជាប់ឆ្នោតពិសេសកាលពីពាក់កណ្តាលឆ្នាំនេះថា តើដំណើរប្រតិបត្តិការជាអ្នកដឹកនាំមួយដែលលក្ខណៈយ៉ាងណាសំរាប់ អូសទាញសន្លឹកឆ្នោត ឲ្យរូបលោកជាប់ឆ្នោតជាបន្តទៅទៀតនាឆ្នាំ២០០៨ ។

មហាជនខ្មែរយើងនិយាយថាប ចៅសង្កាត់ជនជាតិស្បែកខ្មៅមួយនេះ កំពុងប្រឹងប្រែងបំរើប្រជាជនដើម្បីបង្ហាញពីឥទ្ធិពលជាងអ្នក កាន់ការមូលដ្ឋានដែលសកម្មមួយ ក្នុងការអភិវឌ្ឍន៍សង្គម ក្នុងតំបន់ខ្លួនជាមួយគម្រោង ឬការសន្យា និងសំណូមពររបស់ប្រជារាស្ត្រខ្លួន ។

Dee Andrews បានរត់តាមគម្រោងចំនួន១៩ ក្នុងការស្តារអភិវឌ្ឍន៍ឡើងវិញ និងការស្ថាបនាសំណង់ថ្មីៗ ដែលទាក់ទងនឹងផ្នែកសង្គមកិច្ច, សណ្តាប់ធ្នាប់សាធារណៈ,បរិស្ថានការសង់ជម្រកសំរាប់មនុស្សចាស់ជាដើម។

គម្រោងនេះត្រូវការចំណាយថវិកាអស់ ២២ លាន ដុល្លារអាមេរិក ។ នៅក្នុងតំបន់សង្កាត់ទី៦ដែលក្តោបអំណាចដោយ Dee Andrews

(តទៅទំព័រទី 25 ច)

(តមកពីទំព័រទី 19 ជ)

សល់តែម្ដាយមេម៉ាយ ដែលក្នុងខ្លួនពុំទទួលបានចំណេះវិជ្ជា ខ្ពង់ខ្ពស់នោះ ពិតជាធ្វើឲ្យគ្រួសារនេះ ធ្លាក់កាន់តែខ្លាំងឡើងទៅរកភាពអត់ឃ្លាន ។ កាលណោះថ្វីត្បិតតែ សង្វាន ទើបមានអាយុ១១ឆ្នាំក៏ ដោយចុះ ក៏រូបគេមានភាពរឹងប៉ឹងជួយគ្រួសារក្រីក្រគេបានខ្លះៗ តាមលទ្ធភាពដែលគេនៅជាកុមារនោះ ។ កុមារ សង្វាន បានក្លាយជាអ្នកស៊ី ឈ្នួលឡើងបេះផ្លែស្លាឲ្យអ្នកភូមិ ដែលជារបរដ៏គ្រោះថ្នាក់មួយ ។ ក្រៅពីនោះគេបានជួយរកត្រីឲ្យម្ដាយ បើទោះបីគ្មានឧបករណ៍ក៏គេរកដែក ក្រាស់ខ្ទឹកមកដំនិងសំលៀងធ្វើព្រួញស្នបាញ់ត្រីឲ្យម្ដាយដែរ ។ មុខរបរនេះគេប្រតិបត្តិរាល់ថ្ងៃ ធ្វើឲ្យរូបគេក្លាយទៅជាអ្នកបាញ់ត្រង់បំផុត ប្រចាំភូមិនេះ ។ ដោយនៅក្នុងគ្រួសារ សង្វាន ជាមនុស្សឈ្លាសវៃជាងគេម្ដាយរបស់គេបានគិតថា មិនទុកឲ្យកូនទាំងអស់អវិជ្ជាបានទេ អាចនាំ ទៅដល់អនាគតមានវាសនាមិនល្អដូចគាត់ ។ អ្នកស្រី នូ ផេងចិន្ដា បើទោះបីគ្មានលទ្ធភាពបានយកកូនទាំងអស់ឲ្យចូលរៀនបានក៏ដោយ ក៏គាត់ បានយកកូនម្នាក់ដែរទៅរៀននៅវត្តលោក នោះគឺកុមារ ទៀ សង្វាន នេះឯង ។ កាលណោះគឺនៅឆ្នាំ១៩៥៧ កុមារ សង្វាន ត្រូវម្ដាយបញ្ជូនឲ្យ ទៅនៅក្នុងវត្តជាមួយព្រះសង្ឃដែលជាកូនធម៌គាត់ម្នាក់ទៀត ដែលគាត់ធ្លាប់បានចិញ្ចឹម គឺព្រះនាម សាវ ។ កាលណោះតំបន់តាចាតនោះពុំទាន់ មានសាលាបង្រៀនអក្សរ ខម "ខ្មែរ" ទេ គឺមានតែអក្សរថៃ ។ តែអ្នកបង្រៀនពុំមែនព្រះសង្ឃ សាវ ទេ គឺព្រះសង្ឃចំណាស់ព្រះនាម យ៉េន ។ ប៉ុន្ដែដោយឡែក សង្វាន បានទទួលការបង្រៀនអក្សរ(ខម) ដែលចារក្នុងស្លឹករឹត និងរៀនគម្ពីរធម៌បុរាណដែលសំខាន់ គឺសូត្រធម៌បុណ្យសព ច្រើនជាង ។ រយៈពេលជាង១ឆ្នាំ សង្វាន អាចចេះអក្សរ ខម និងថៃ អាចអានបានជាមធ្យម ។ លុះមកដល់ឆ្នាំ១៩៥៧ រដ្ឋាភិបាលខ្មែរបានជំរុញ ឲ្យក្មេងៗបានរៀនជាទូទៅក្នុងប្រទេស ។ ក្នុងនោះភូមិតាចាតបានទទួលការកសាង សាលាបឋមសិក្សាធ្វើអំពីឈើបានពីរបន្ទប់ ។ ការជ្រើសរើសសិស្សឲ្យចូលរៀនកាលណោះ ក៏មានការធ្វើសម្ភាសន៍ដែរ ។ ក្នុងនោះក្នុងចំណោមសិស្សក្នុងភូមិទាំងអស់ រួមមានទាំងកូនលោកប្រធានភូមិ ផង គឺកុមារ សង្វាន បានក្លាយទៅជាសិស្សលេខមួយប្រចាំភូមិ ។ រឿងនេះហើយបានធ្វើឲ្យប្រធានភូមិ មានការខឹងសម្បាចំពោះសង្វាន យ៉ាង ខ្លាំង ព្រោះមេ ភូមិគិតថា សង្វាន ធ្វើឲ្យបាក់មុខមាត់គ្រួសារគាត់ ហើយក៏ចងគំនុំនឹង សង្វាន រហូត ។ ឆ្នាំ១៩៥៩ សង្វាន រៀនដល់ថ្នាក់អទិកដ្ឋាន (បច្ចុប្បន្នថ្នាក់ទី៣) ពេលនោះគេបានជ្រើសយក សង្វាន ធ្វើជាគ្រូបង្រៀនអក្ខរកម្មសំរាប់មនុស្សចាស់ផងដែរ ។

**ការពារប្អូនស្រីកុំឲ្យគេចាប់បំរើការសប្បាយ**

មកដល់ឆ្នាំ១៩៦០ សង្វាន មានអាយុ១៥ឆ្នាំ ពេលត្រឡប់មកផ្ទះឃើញមនុស្ស៦-៧នាក់នៅមុខផ្ទះគេ ។ ពួកគេទាំងនោះ ជាប៉ូលិសនិងជីវពលភូមិមកសំឡុត គំរាមម្ដាយ សង្វាន ឲ្យប្រគល់ប្អូនស្រីរបស់គេ ដែលទើបមានអាយុ១៣ឆ្នាំ ដើម្បីយកទៅជូនលោកកុម្មុយសៀ ប៉ុលិសសម្រាប់សប្បាយខាងផ្លូវតណ្ហា ។

សង្វាន ប្រកែកតវ៉ា និងគំរាមពួកទាំងនោះមិនឲ្យយកប្អូនស្រីគេទៅទេដាច់ខាត ទោះគេប្ដូរជីវិតក៏ដោយ ក៏ពុំឲ្យពួកទាំងនោះ ធ្វើបាប ប្អូនស្រីគេដែរ ។

កាលណោះមន្ត្រីរាជការ ពីថ្នាក់ភូមិឡើងទៅតែងតែចាប់ក្មេងស្រី និងស្រីក្រមុំនៅភូមិស្រុកដើម្បីយកទៅផ្គាប់ចៅហ្វាយនាយរបស់ខ្លួន ។

ដោយសារមេភូមិចងគំនុំរឿង សង្វាន បានលេខ១ មេភូមិរួមគំនិតជាមួយរដ្ឋការអាក្រក់ដែលស្អប់ សង្វាន ការពារប្អូនមិនឲ្យគេសម្រេចបំណង ក៏នាំគ្នាព្រួតដៃគ្នាសងសឹក ។

**មេភូមិ និងប៉ូលិសរួមគ្នាចាប់ធ្វើទុក្ខទោស**

-ក្នុងពិធីបុណ្យមួយ សង្វាន ត្រូវប៉ូលិសប៉ុស្តិ៍មកចាប់ ដោយឥតហេតុផលទៅឃុំទុកក្នុងប៉ុស្តិ៍អស់មួយយប់ និងស្អែកឡើងយកទៅចងនឹងសសរហាលថ្ងៃ ។ ក្នុងយប់នោះពួកគេមក គំរាមដើម្បីឲ្យ សង្វាន យល់ព្រមនូវអំពើលាមករបស់ពួកគេតែ សង្វាន នៅតែរឹងមិនយល់ព្រម ។ តែសំណាងល្អមានព្រះសង្ឃ និងកូនមេភូមិខ្លួន ឯងទទូចអង្វរលោកមេភូមិឲ្យដោះលែង សង្វាន ដែលគ្មានកំហុស ។

**ដោយការជិះជាន់ចេញធ្វើការតស៊ូ**

ឆ្នាំ១៩៦១-៦២ រៀនចប់ថ្នាក់មធ្យមដ្ឋានទី១ រៀនអស់ថ្នាក់នេះ គេឲ្យធ្វើគ្រូបង្រៀនកុមារថ្នាក់បរិវច្ឆនដ្ឋាន (ថ្នាក់ទី១ និងទី២ សព្វថ្ងៃ) បន្ថែមលើគ្រូអក្ខរកម្ម ។ ពេលនោះស្របពេលដែលព្រឹត្តិការណ៍ប្រទេសជាតិ មាននិន្នាការនយោបាយច្រើន ។ សង្វាន បានចាប់ផ្ដើមទាក់ទងផ្ដល់ស្បៀង ដល់ចលនាតស៊ូក្នុងព្រៃ ទោះបីជាគេនៅជាគ្រូបង្រៀនវ័យក្មេងក៏ដោយ ។ ការជួយដល់ចលនាស្នេហាជាតិ ទោះជាសម្ងាត់យ៉ាងណា សង្វាន នៅតែត្រូវប៉ូលិសដឹង និងចាប់ចងយកទៅសួរចម្លើយដោយចោទថា "គេបានគាំទ្រឧបត្ថម្ភកម្លាំងតស៊ូក្នុងព្រៃ"។ ការចាប់ទៅនោះ សង្វាន ត្រូវគេយកទៅវាយសួរចម្លើយ និងធ្វើទារុណកម្មយ៉ាងព្រៃផ្សៃ ក៏ សង្វាន នៅតែពុំឆ្លើយ ។

-ថ្ងៃ១០ កក្កដា ១៩៦៥ គេដោះលែង សង្វាន ពីគុកដោយថ្នូរនឹងប្រាក់៥ពាន់រៀល បានពីការលក់ក្របី និងខ្សែ.កប្អូនស្រីគេ ដែលទៅ ស៊ីឈ្នួលមើលកូនឲ្យថៅកែឡុងយកទៅឲ្យអាជ្ញាធរ។

**ចាប់ចងយកទៅបាញ់ចោល**

មកដល់ថ្ងៃទី១៧ កក្កដា ១៩៦៥ ក្រោយពីរួចខ្លួនបាន៧ថ្ងៃក្រុមជីវពល៥នាក់ និងប៉ូលិស

(តទៅទំព័រទី 25 ជ)

(តមកពីទំព័រទី 22)

បទបង្ហាញអំពីករណីពុករលួយមួយចំនួនទៀត ដែលសុទ្ធតែបានបកអាក្រាត អំពីរឿងអាស្រូវរបស់មន្ត្រីរដ្ឋាភិបាលលោក ហ៊ុន សែន ។

ក៏ប៉ុន្តែសៀវភៅមួយនេះមិនបានចេញផ្សាយឲ្យទូលំទូលាយទេ គឺត្រូវបានរឹបអូសនិងហាមប្រាមចែកផ្សាយបន្តដោយយោងលើការប្រមាថ និងរំលោភបំពានដល់ព្រះមហាក្សត្រ ។

ក្នុងសេចក្តីថ្លែងការណ៍ថ្ងៃទី២ វិច្ឆិកា ដែលក្រុមអ្នកសារព័ត៌មាន ក្នុងស្រុកទទួលបានលោក សួន សេរីរដ្ឋា បានបង្ហាញអំពី លទ្ធភាពប្តឹងតបទៅនឹងការរឹបអូសទស្សនាវដ្តីរបស់លោកខុសនីតិវិធីច្បាប់ ។

ដោយឡែកពីនេះ លោករដ្ឋមន្ត្រីក្រសួងព័ត៌មានក៏អះអាងដែរថា កំពុងតែពិចារណាអំពីទស្សនាវដ្តីនេះ ហើយលោកនឹង បង្ហាញនូវវិធានការរបស់ក្រសួងនៅពេលក្រោយ ។

ប្រទេសកម្ពុជានៅឆ្នាំ២០០៧ ត្រូវបានអង្គការអ្នកសារព័ត៌មានគ្មានព្រំដែន មានមូលដ្ឋាននៅប្រទេសបារាំង ចាត់ថ្នាក់នៅ លំដាប់ទី៨៥ ជាប្រទេសមានសេរីភាព សារព័ត៌មានពីក្នុងចំណោមប្រទេសទាំង១៦០ ដែលគេធ្វើការចាត់ថ្នាក់ ។ លំដាប់នេះ កម្ពុជាបាន ឈរលើគេបំផុតក្នុងតំបន់អាស៊ានទាំង១០ប្រទេស គឺនៅពីលើប្រទេសហ្វីលីពីន ថៃ និងឥណ្ឌូនេស៊ី ដែលធ្លាប់តែនៅលើកម្ពុជាពីមុនមក នោះផង ។

អ្នកកាសែតក្រោមដើមអំពិលម្នាក់ ដែលអានអត្ថបទទស្សនាវដ្តីសារព័ត៌មានសេរី បានចាប់អារម្មណ៍ថា វាជាករណីធម្មតា ហើយឲ្យតែអ្នកណាក្លាហានហ៊ានសរសេរិះគន់ និងបង្ហាញភស្តុតាងអង្កេត អំពីរឿងអាស្រូវរបស់មន្ត្រីរដ្ឋាភិបាល និងមន្ត្រីអំណាច គឺតែងត្រូវគេព្រមាន និងគំរាមពីសុវត្ថិភាព និងត្រូវបិទការផ្សាយ ។ តែបើអ្នកព័ត៌មានណាសរសេរ ឬផ្សាយពីស្នាដៃរបស់ពួកគេវិញ នោះ ទើបអាចទទួលបានការសរសើរ និងមានរង្វាន់ ហេតុនេះបានជាប្រព័ន្ធផ្សាយក្នុងស្រុក ពិសេសវិទ្យុ និងទូរទស្សន៍ ស្ទើរតែទាំងអស់ គឺមានតែព័ត៌មានពិធីការ និងការអភិវឌ្ឍន៍របស់រដ្ឋាភិបាល ហើយមិនដែលហ៊ានផ្សាយបង្ហាញអំពីព័ត៌មានបែបអវិជ្ជមានម្តងណា ឡើយ ។ អ្នកកាសែតនោះបញ្ជាក់ថា នេះហើយជាសេរីភាពសារព័ត៌មានរបស់ប្រទេសកម្ពុជាសព្វថ្ងៃ ។/

(តមកពីទំព័រទី 24 ជ)

២នាក់បានមកតាមចាប់ សង្ហាន និងមនុស្សម្នាក់ទៀតឈ្មោះតា កៅ ទៀត ។ ពួកគេបានចាប់អ្នកទាំងពីរយកទៅបាញ់ចោល នៅជើងភ្នំកោះអណ្តែត ។ ពួកទាំងនោះបានចង សង្ហាន និងតា កៅបណ្តើរទាំងភ្លៀងមកដល់ក្បែរជើងភ្នំកន្លែងពិឃាត ពួកគេពុំទាន់ដឹករណ្តៅភ្លាមទេ ។ ជីវពលម្នាក់ឈ្មោះ សួ បានរុញតា កៅ និងជីវពល ម្នាក់ទៀតឈ្មោះ ដាំ បានរុញ សង្ហាន ឲ្យឃ្លាតឆ្ងាយពីគ្នាបន្តិច ។ ហើយភ្លាមនោះជីវពល សួ ដែលកាន់កាំភ្លើងបានលើកកាំភ្លើងបែរកាណុងមក រកតា កៅ មុនជាមួយនឹងដៃកេះកៃពុស្វរផ្ទួងផ្ទួង...ចំនួនពីរគ្រាប់ ធ្វើឲ្យតា កៅ ដួលខ្តោក ទៅដីមួយចំហៀងផ្កាប់មុខជិតប៉ះនឹងចង្កេះ សង្ហាន ។ សង្ហាន តក់ស្លុត និងភ្ញាក់ផ្អើលយ៉ាងខ្លាំង ។ ម្តងនេះដល់វេន សង្ហាន ហើយចុងកាណុងជីវពល ដាំបានរេមកចំដើម ទ្រូង សង្ហាន ធ្វើឲ្យ សង្ហាន ភ័យឥតឧបមា ។ បេះដូងលោតយ៉ាងខ្លាំងជើងញ័រទទ្រើក សង្ហាន បែរខ្នងគិតថា ទុកឲ្យ អា ដាំ បាញ់ខ្នង ព្រោះគេមិនចង់ឲ្យភ្នែកឃើញគ្រាប់កាំភ្លើងហើរប្រហារគេទេ ។ ព្រមគ្នានឹង សង្ហាន ងាកខ្លួនបែរខ្នង ស្រាប់តែគ្រាប់កាំភ្លើងផ្ទុះផ្ទួងផ្ទួងផងដែរ ហើយយុវជន សង្ហាន ក៏ដួលទៅនឹង ថ្លុកឈាមតា កៅ ដែរ ។

ខណៈពេលការបាញ់ប្រហារនោះ ធ្វើឡើងរួចហើយ ទើបពួកអ្នកពិឃាតទាំង៧នាក់នោះនាំគ្នាជីករណ្តៅ ដើម្បីកប់ខ្មោច តាកៅ និង សង្ហាន ទាំងនៅភ្លៀងខ្លាំងនៅឡើយ ។ សំណាងល្អដីនៅតំបន់នោះសំបូរដោយថ្ម និងដីរឹង ធ្វើឲ្យពួកគេជីក ត្រូវប្រើពេលយូរ ហើយខណៈនោះ ក៏ទុកឲ្យយុវជន សង្ហាន ដឹងខ្លួនឡើងវិញ ហើយក៏រត់ចូលព្រៃយ៉ាងជ្រៅ បាត់ឈឹងទាំងដៃជាប់ចំណងស្លាបសេករួចខ្លួនតាំងពីថ្ងៃនោះទៅ ។ ការ បាញ់ សង្ហាន មិនស្លាប់ ហើយងើបពីសន្លប់ដោយភ័យតក់ស្លុតខ្លាំង រត់ចូលព្រៃបានវិញ នោះ គឺមិនមែន សង្ហាន ចេះមន្តអាគមអ្វីទេ ។ ហើយ រឿងនេះ ក៏ សង្ហាន ខ្លួនឯងឆ្ងល់ដែរថា ហេតុអ្វីក៏ អាដាំ បាញ់ខ្លួនគាត់មិនត្រូវបែរជាចំចន្លោះភ្លៀកទៅវិញ? ។ សង្ហាន និយាយថា នេះទំនងមកពីទី១ អាដាំ មិនប្រសព្វបាញ់ ធ្វើឲ្យពេល សង្ហាន ងាកបែរខ្នងដូចបានគេចពីគ្រាប់ដែរ ។ តែរឿងសំណាងធំមួយទៀតនោះ គឺដោយសារ ទឹកដោះម្តាយ សង្ហាន ថ្លៃ ឬក៏មានវិញ្ញាណក្ខ័ន្ធខ្មោចឪពុកលោកតាមថែរក្សាក៏ពុំដឹង? ។

ទោះបី សង្ហាន រួចពីគ្រាប់កាំភ្លើង ដែលគេចងយកទៅបាញ់ចោលហើយមិនស្លាប់ក៏ដោយ ក៏ជីវិតនៅក្នុងព្រៃជ្រៅម្នាក់ឯងធ្វើឲ្យ គេអត់បាយក្រហាយទឹក៦ថ្ងៃ ទំរាំបានជួបក្រុមចលនាតស៊ូស្នេហាជាតិដែល នៅលាក់ខ្លួនក្នុងព្រៃដូចគ្នា។ ហើយចាប់ពីពេលនោះមក សង្ហាន នៅតែត្រូវរង្គអំណាចតាមរកមុខជាប់រហូតដដែល។

ហើយចាប់ពីពេលនោះមក ស្ថានភាពទាំងនោះបានជំរុញឲ្យគាត់ធ្វើចលនាតស៊ូក្នុងព្រៃជា បន្តបន្ទាប់ និងក្លាយជាមេទ័ពដ៏ខ្លាំងពូកែដឹកនាំទ័ពវាយប្រឆាំងសត្រូវនៅតំបន់ ខេត្តកោះកុង តាំងពីថ្ងៃទី១៧ ខែកក្កដា ឆ្នាំ១៩៦៥ រហូតចូល រួមសកម្មភាពរំដោះប្រទេស ខែមករា ឆ្នាំ១៩៧៩ ពីរបបប្រល័យពូជសាសន៍ ប៉ុល ពត ។ ហើយនៅចន្លោះ ឆ្នាំនៃការធ្វើចលនាតស៊ូដ៏ស្វិតស្វាញ នោះ មនុស្សជាច្រើនក្នុងភូមិ និងក្រុមអ្នកតស៊ូបានហៅឈ្មោះ លោកពី ទៀ សង្ហាន ទៅជាឈ្មោះ ទៀ បាញ់ ដោយលួចលាក់ ហើយឈ្មោះនេះ បានត្រូវប្រើរហូតសព្វថ្ងៃ ។ នៅក្នុងពេលកំពុងធ្វើចលនាតស៊ូ នោះដែរ លោក ទៀ បាញ់ ក៏ទទួលបានសំណាងល្អមួយដែរ នោះលោកបានរៀប អាពាហ៍ពិពាហ៍ជាមួយមិត្តនារីពេទ្យ ដ៏ស្រស់ស្អាតម្នាក់ឈ្មោះ តៅ តឿន នៅភូមិគីរីវង្ស នាថ្ងៃ ទី២៤ ខែមេសា ឆ្នាំ១៩៧៥ បើទោះបីពិធីរៀប ការកាលណោះធ្វើឡើងយ៉ាងកំសត់តក់ក្រហល់មានតែបងប្អូនចូលរួម ហើយគ្មានភ្ញៀវពីក្រៅក៏ដោយ ក៏ពួកលោកមានភក្តីភាពស្មោះស្ម័គ្រជា មួយគ្នាដែរ ។ ពិធីអាពាហ៍ពិពាហ៍ដែលធ្វើឡើងក្នុងព្រៃកាលណោះគឺមានមាន់តែ៧ក្បាល និងបបរស្ករតែប៉ុណ្ណោះ ដែលជាអាហារប្លែកបន្ថែម ពីលើអាហារបាយប្រចាំថ្ងៃនោះ ត្រូវបានធ្វើឡើងចប់សព្វគ្រប់ក្រោមការប្រកាសជា ផ្លូវការរបស់លោក សាយ ភូថង ដែលត្រូវជាចាស់ទុំ និងឪពុកមាផង ។ សូមបញ្ជាក់ថា ពេទ្យ តៅ តឿន ដែលក្រោយមកក្រុមចលនាតស៊ូរួមមាន វៀតណាមផង បានប្តូរឈ្មោះឲ្យគាត់តាម ភាសាវៀតណាម ដែលនៅតស៊ូជាមួយគ្នាជំនាន់នោះ ដោយដាក់ ឈ្មោះថា"ហ៊ិន"(ប្រែមកភាសាខ្មែរថា ថើប) គឺជាបុត្រីរបស់សមមិត្ត វ៉ន គណៈខេត្ត ហើយត្រូវជាក្មួយជីដូនមួយលោក សាយ ភូថង ផងដែរ ។ មកដល់ពេលនេះចំណងអាពាហ៍ពិពាហ៍របស់លោក ទៀ បាញ់ និង អតីតមិត្តនារី ពេទ្យ តៅ តឿន ប្រសូត្របានបុត្រាពីរនាក់ ដែលកូនច្បងទី១ឈ្មោះ ទៀ ស្វាម និងកូនប្រុសទី២ ឈ្មោះ ទៀ ទីហា។/



(តមកពីទំព័រទី 23 ច)

គឺជាភូមិខ្មែរមួយ ដ៏ធំបំផុតសំរាប់ឱកាសដែលចៅសង្កាត់រូប នេះ ត្រូវតែទាញយកប្រយោជន៍



ពីពួកគេ (ប្រជាជន) គឺសន្លឹកឆ្នោតដើម្បីបន្តធ្វើជាចៅសង្កាត់ នាឆ្នាំ២០០៨ ។

Dee Andrews កំពុងមើលឃើញទីប្រជុំនៃជនជាតិខ្មែរមួយដែលមូលផ្តុំ ដោយមនុស្សចាស់ៗក្នុង "កម្មវិធីអាហារថ្ងៃត្រង់សំរាប់មនុស្សចាស់" ដែលនេះជាចំណុចចុចចំកណ្តាលដេះបូងរបស់ក្រុមគ្រួសារខ្មែរ ដើម្បីទាញនូវសន្លឹកឆ្នោតសំរាប់គាត់ ។ ព្រោះថាមនុស្សចាស់ៗ ទាំងអស់នោះ ពួកគាត់មានកូនចៅគ្រប់អាយុដើម្បីទៅបោះឆ្នោត ហើយចង់ ឬចង់វាស្ថិតនៅលើការជួយឃោសនាឲ្យ មានការគាំទ្រដល់ Dee Andrews ។ ជាប្រពៃណី និងទំនៀមទំលាប់ខ្មែរ បើទោះបីយើងកំពុងតែរស់នៅក្នុងអរិយ្យបថ្មីមប្រទេសក្តី ក៏គេសង្កេតឃើញថា ពូជ ខ្មែរនៅតែរក្សាការគោរពស្តាប់ដំបូន្មានឪពុកម្តាយតាមការផ្តល់យោបល់ ឬបង្គាប់ឲ្យធ្វើតាម នៅមិនទាន់សាបសូន្យនៅឡើយទេ ។ ដែលនេះ ជាឥទ្ធិពលមួយដែលនឹងអាចរុញច្រានការសង្ឃឹមរបស់ Dee Andrews សំរាប់ការបោះឆ្នោតឆ្នាំ២០០៨ ឬក៏យ៉ាងណា ?។

បើគេចាំមិនភ្លេចទេ កាលពីពាក់កណ្តាលឆ្នាំ ២០០៧ ចៅសង្កាត់លេខ៦ Dee Andrews បានឈ្នះការបោះឆ្នោតពិសេសមួយ ក៏ ព្រោះតែការគាំទ្រខ្មែរផងដែរ ។ បើទោះបីស្ថានការណ៍នាពេលនោះ គេឃើញមានក្រុមខ្មែរបីក្រុមបានប្រកាន់គោលជំហរគាំទ្របេក្ខជន ចៅសង្កាត់៣រូបផ្សេងៗគ្នាក៏ដោយ ។

ក្រុមមនុស្សនិយមកណ្តាលប្រមើល៍ថា សំរាប់ឆ្នាំ២០០៨ ចៅសង្កាត់លេខ៦ Dee Andrews តើគួរបោះឆ្នោតគាំទ្រឲ្យគាត់បន្តបេសកកម្មតទៅទៀត ឬយ៉ាងណាសំរាប់សហគមន៍ខ្មែរ ដែលកកើតមានក្រុងខ្មែរហើយនោះ?។

បើយើងចាំមិនភ្លេចទេ កាលពីថ្ងៃទី៣កក្កដា មុនថ្ងៃបុណ្យឯករាជ្យជាតិអាមេរិកាំង មួយថ្ងៃនាឆ្នាំនេះ អាជ្ញាធរក្រុង Long Beach បានសម្រេចឲ្យក្រុងខ្មែរ លេចរូបរាងជាផ្លូវការដែលកាលនោះគេនៅចាំបានសំដីចៅសង្កាត់ Dee ដែលថ្លែងប្រាប់ក្រុមប្រឹក្សាភិបាលសាលា ក្រុង Long Beach ថា "គួរតែដល់ពេលវេលាជាចុងក្រោយដែលលោកអ្នកត្រូវតែសម្រេច តាមការស្នើសុំរបស់ខ្មែរហើយ, ខ្ញុំ Dee Andrews គាំទ្រទាំងស្រុងក្នុងការបោះឆ្នោតជូន, ខ្ញុំនៅជាមួយសង្គមខ្មែរតាំងពីឆ្នាំ១៩៧៥"។

អ្នកកណ្តាលនិយមបន្តថា តើខ្មែរយើងគួររួមគ្នាដើម្បីគាំទ្របន្តគោលនយោបាយ Dee មួយរយៈកាលទៅមុខទៀតថា តើដំណើរនយោបាយដឹកនាំរបស់លោក វានឹងមានសន្ទុះអភិវឌ្ឍន៍ទៅមុខ ឬថយក្រោយ សំរាប់សហគមន៍ខ្មែរ ។ ព្រោះថាក្នុងរយៈពេលខ្លីមកដល់មួយ ឆ្នាំ វាជាផ្លូវដ៏រលាក់មួយក្នុងការវាយតម្លៃពីសមត្ថភាពជាមួយសកម្មភាពលោកនោះ ។

Dee Andrews បានបង្ហាញមុខជាសាធារណៈរាល់សកម្មភាពកិច្ចការសង្គម ដែលថ្មីៗនេះ គេឃើញរូបលោកបានបង្កើតកម្មវិធីដំណើរកំសាន្តសំរាប់មនុស្សចាស់ ដែលមានខ្មែររាប់រយនាក់ ទៅជិះកប៉ាល់លេងមើលទេសភាពទឹករលកសមុទ្រ និងសំណង់ខ្ពស់ៗក្រុង Long Beach ក្នុងទិដ្ឋភាពសម្រស់ស្រស់ត្រកាលដល់ការយល់ចិត្តថ្លើមគ្នាមួយ ។

មានមតិលើកឡើងថា Dee Andrews ទំនងជាមិនអាចឈ្នះឆ្នោតទៅបានទេ ព្រោះរូបលោកក្រដែលគ្មានលុយកាក់សំរាប់ធ្វើ យុទ្ធនា

(តទៅទំព័រទី 28 ថ)

# ហាងខ្មែរផលិតនំក្រូហ្សង់

-ធានាគុណភាពទុកបាន៣០ថ្ងៃ
-ដឹកជញ្ជូនដោយមិនគិតថ្លៃពីថ្ងៃចន្ទ-សុក្រ
-ហាងយើងខ្ញុំមានលក់ដុំតែប៉ុណ្ណោះ
-អ្នកទិញត្រូវឲ្យដឹងមុន១ថ្ងៃ

## *C & B* CROISSANTS

WHOLESALE ONLY

ORDER BY PHONE:
(562) 495-5713
(800) 974-3888
Cell: (562) 607-3258
Fax: (562) 495-7544

FREE DELIVERY

We guarantee our products up to 30 days. Order must be made 1 day in advance.

WHOLE SALE ONLY





| Item | Net Wt Each | Packaging | Price/Package |
|---|---|---|---|
| Butter Croissant | 4.50 oz | 50 | $17.00 |
| Triangle Croissant | 5.00 oz | 50 | $17.00 |
| Square Croissant | 5.00 oz | 50 | $17.00 |
| Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Blueberry Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Strawberry Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Raisin Cinnamon Croissant | 6.00 oz | 50 | $22.00 |
| Raisin Custard Croissant | 6.00 oz | 50 | $22.00 |
| Apple Croissant | 6.00 oz | 50 | $22.00 |
| Chocolate Croissant | 6.00 oz | 50 | $22.00 |
| Chocotate Cream Cheese Croissant | 6.00 oz | 50 | $22.00 |
| Pineapple Cream Cheese Croissant | 6.00 oz | 50 | $22.00 |

1339 W. Gaylord Street• Long Beach, CA 90813

*(តមកពីទំព័រ 22 ញ)*

បន្ទាយឆ្មារ ។ តាមប្រវត្តិសាស្ត្រថា ក្នុងរាជជ័យវរ្ម័ន្ទទី៧ ប្រទេសកម្ពុជាមានសេចក្ដីសុខណាស់ ហើយប្រាសាទបាយ័ន គឺបានកសាងឡើងក្នុងរជ្ជកាលរបស់ទ្រង់ ដែលអាចចម្លាក់កងទ័ពយ៉ាងច្រើន ហើយនៅប្រាសាទបន្ទាយឆ្មារក៏ព្រះអង្គកសាងដែរ ថែមទាំងមានព្រះឆាយាល័ក្ខណ៍ គង់លើព្រះទីនាំងនាវាចម្បាំងប្រដាប់ដោយធ្នូ និង ដំបងនៅនឹងព្រះហស្ដយ៉ាងស្វាហាប់ផង ។ កាលនោះទ្រង់បានធ្វើសឹកសង្គ្រាម និង កងទ័ពចម្ប៉ា ហើយទទួលបានជោគជ័យយ៉ាងអស្ចារ្យក្នុងឆ្នាំ ១១៧៧ ដល់ ១១៨១ ។

ជាការរំលឹកនូវជ័យជំនះនេះ ប្រជាពលរដ្ឋខ្មែរនៅខេត្តឃ្លាំងទឹកដីកម្ពុជាក្រោម ដែលវៀតណាមគ្រប់គ្រងបច្ចុប្បន្ន តែងរក្សាប្រពៃណីអុំទូកពីដូន តានេះយ៉ាងប្តូរផ្តាច់ ហើយតែងប្រារព្ធធ្វើយ៉ាងអឺកកធឹកនៅថ្ងៃពេញបូរមី នៃខែ កត្តិក ដើម្បីរំលឹកពីការតស៊ូដ៏អង់អាចរបស់ខ្មែរ ដែលពូជអំបូរជាអ្នក ចម្បាំងដ៏ល្បីនៅក្នុងសម័យនោះ ។

តាមឯកសាររបស់ក្រុមជំនុំទំនៀមទំលាប់ របស់លោក ថាច់ ប៉ែន ហៅអាចារ្យ ប៉ាង ថា "សម័យលង្វែកសម័យស្តេចអង្គច័ន្ទទី១ ព.ស ២០៧១ គ.ស១៥២៩ ទ្រង់បានតាំងពញ្ញាសិទ្ធភូបាលជាស្តេចត្រាញ់នៅកម្ពុជាក្រោម ក្នុងស្រុកបាសាក់ ហើយស្តេចត្រាញ់អង្គនេះបានចាត់ចែងទ័ពជា ៣ ក្រុមគឺ:

*-ក្រុមទ័ពស្លូច* ៖ សំរាប់ហាត់ចម្បាំង ដោយប្រើទូកមានទ្រង់ទ្រាយដូចទូកប្រណាំងសព្វថ្ងៃ

**-ទ័ពជំនួយ** ៖ ហាត់ច្បាំង នឹងទូកចែវពីរ មានរាងដូចទូកប្រណាំងចែវសព្វថ្ងៃនេះដែរ។

**-ទ័ពបាសាក់** ៖ គឺក្រុមទូកធំមានដំបូលមានចែវ មានក្តោង ខ្លះហៅទូកបាសាក់ ឬហៅទូកប៉ុកចាយ រាងស្តួចវែងមានដំបូលមួយកំណាត់ឥតជញ្ជាំងសំរាប់ដឹកស្បៀងកងទ័ព ។

របៀបហាត់ច្បាំងនេះស្តេចត្រាញ់ បញ្ជាទៅមន្ត្រីធំទាំងបួនទិស ដែលមានឈ្មោះថា "ចតុស្តម្ភ" ឲ្យកេណ្ឌហានទាំងជើងទឹកជើងគោកឲ្យមកធ្វើ "សមយុទ្ធ"ពេញមួយថ្ងៃមួយយប់ ថ្ងៃពេញបូរមីខែកត្តិកនោះជារៀងរាល់ឆ្នាំ ។ ឯទាហានជើងទឹក ត្រូវនៅប្រលងឫទ្ធិគ្នាឯនៅទន្លេពាមកន្តោរ ក្នុងខេត្ត ឃ្លាំង ព្រោះទីនោះអាចឲ្យទូកចរទៅចរមកបានស្រួល ។

**២/- ប្រវត្តិពិធីលយប្រទីប ៖**

ដោយប្រជាពលរដ្ឋខ្មែរ ជាអ្នកកាន់ព្រហពុទ្ធសាសនា នឹងនៅមានព្រលឹង ព្រហ្មញ្ញសាសនាផងនោះ ពិធីបុណ្យអុំទូកលយប្រទីបនេះ ក៏មានជាប់ ទាក់ទិននឹងការគោរពដល់ជំនឿសាសនាទាំងពីរនេះផងដែរ ។

-ក្នុងជំនឿសាសនាមានដំណាលថា គេរៀបលយប្រទីប គឺដើម្បីបូជាព្រះពុទ្ធបាទ ដែលប្រតិដ្ឋាននៅឆ្នេរស្ទឹង ទម្មទា និងព្រះចង្កូមកែវជាដើម នៅពិភពនាគ ។ គម្ពីរ ទាថាវង្ស មានចែងថា ព្រះចង្កូមកែវទាំងបួនរបស់ព្រះពុទ្ធបានប្រតិដ្ឋាននៅបួនកន្លែង ឋានត្រៃត្រឹង ពិភពនាគ ស្រុកគន្ធារៈ និង ទន្តបុរៈកលិង្គរដ្ឋ ។ ឯនៅក្នុងភាណវារៈបាលី ត្រង់ពុទ្ធនមស្ការគាថាចែងថា ស្នាមព្រះបាណាព្រះពុទ្ធមានប្រតិដ្ឋាននៅប្រាំកន្លែង គឺនៅភ្នំសុវណ្ណមាលិក ភ្នំសុវណ្ណភ្នំសុមុនកូដ យោនកបុរី និង ស្ទឹងនម្មទា ។ មូលហេតុនេះហើយបានជាបុព្វបុរសយើងប្រារព្ធពិធីលយប្រទីប ដើម្បីឧទ្ទិសដ្ឋានតាមព្រះអង្គារ ទៅកាន់កន្លែងទាំងពីរ ។

ក្នុងជំនឿព្រហ្មញ្ញសាសនា មានដំណាលដែរថា ពិធីលយប្រទីបនេះ ក៏ជាការរំលឹកគុណដល់ព្រះអង្គារ និងព្រះធរណី ដែលបានផ្តល់ទឹកដីឲ្យ មនុស្សរស់នៅសុខក្សេមក្សាន្តរៀងមកផងដែរ ។

ខ្សែទឹកដែលប្រភពដ៏សំខាន់ក្នុងជីវភាពប្រជាជនខ្មែរ មានស្ទឹងសៀមរាប ដែលទទួលទឹកពីភ្នំគូលេន ទន្លេមេគង្គ បឹងទន្លេសាប នឹងខ្សែទឹកដទៃ ទៀត គឺជាប្រភពដ៏ប្រសិដ្ឋ ។ ជំនាន់ទន្លេមេគង្គ ក៏បាននាំទឹកទៅគ្រប់ច្រកល្ហកនៃប្រទេសនឹងហូរចូលបឹងទន្លេសាប ហើយនៅខែវិច្ឆិកា ទឹកក៏ចាប់ផ្តើម ហូរចេញពីទន្លេសាបមកវិញ ស្រូវស្រែកសិករក៏ចាប់ទុំ ហើយពេលនេះក៏ជាពេលដែលកសិករទទួលផល យ៉ាងច្រើនផងដែរ ។

អាស្រ័យកាលវេលាល្អបែបនេះ បុព្វបុរសដូនតាយើង ក៏បានចាត់ពីធីតាមទំនៀមទំលាប់និងជំនឿខាងលើ គឺអុំទូក លយប្រទីបអកអំបុក និង សំពះព្រះខែ ដើម្បីជាការសម្តែងនូវការដឹងគុណ នឹងសុំខមាលទោសលើអំពើមិនគប្បីជាយថាហេតុនានា ក្នុងការផ្តល់គ្រឿងស្មោគគ្រោកដល់លោក ទាំងពីរ គឺព្រះគង្គារ និងព្រះធរណី ។

**៣/- ប្រវត្តិពិធី សំពះព្រះខែ អកអំបុក ៖**

**-សំពះព្រះខែ** ៖ មានពណ៌នាថា បុណ្យសំពះព្រះខែ គឺជាការរំលឹកដល់ការ ដែលព្រះពោធិសាត់ យោងយកកំណើតជាសត្វទន្សាយ ។ ដោយ មាននិទានថា នៅថ្ងៃពេញបូរមីជាវេលាព្រះច័ន្ទពេញវង់មានពន្លឺល្អ ទ្រង់ទន្សាយពោធិសាត់ ក៏នឹកភ្លូកមានសេចក្តីជ្រះថ្លាថា "បើនរណាមួយ ត្រូវការ សាច់របស់ទ្រង់ (ទន្សាយពោធិសាត់) ជាអាហារទ្រង់នឹងលះបង់ជីវិតជាទានក្នុងវេលានោះភ្លាម" ។ អំណាចបុណ្យបារមីគ្រាន់តែនឹកពិភាល់ភ្លាម ក៏កើតក្តៅដល់ព្រះឥន្ទ្រសកទេវរាជ ព្រះឥន្ទ្រក៏មានចិត្តចង់បំពេញទានបារមីនេះ ទ្រង់ក៏កាឡាខ្លួនជាព្រាហ្មណ៍ចាស់ម្នាក់មក ក៏ប្រាប់តាព្រហ្មថា ឲ្យបង្កាត់ភ្លើងទៅឈោកនឹងលោតចូលភ្នក់ ដោយអង្គឯង ដើម្បីបានសាច់ ឲ្យតាព្រាហ្មណ៍បរិភោគ ។ ព្រះឥន្ទ្រក្លែងខ្លួន ក៏ធ្វើតាម ហើយទន្សាយពោធិសាត់ ក៏លោតចូលភ្លើងមែន ! តែគ្រានោះ ក៏កើតហេតុអស្ចារ្យឡើងដោយសារតែភ្លើងនោះ រលត់អស់ភ្លាម ហើយសូម្បីតែរោមទន្សាយមួយសរសៃក៏មិន ឆេះផង !..។

ឃើញអព្ភូតហេតុបែបនេះ ព្រះឥន្ទ្រ ក៏ហោះឡើងទៅ រួចយកដុំម្នាងសិលាទៅគូសរូបទន្សាយភ្ជាប់លើតួព្រះច័ន្ទទុកជាសក្ខី។ ដោយសារមាន តំណាលបែបនេះហើយ ទើបបានចាស់ៗ តែងតែហៅក្មេងៗឲ្យមើលរូបទន្សាយ ពេលខែពេញបូរមី (១៥កើត) ហើយខ្លះក៏ប្រតៀក្យថា ស្រមោល ព្រាលៗនៅក្នុងខែពេលបូរមីនោះ ជារូបទន្សាយពោធិសាត់នោះតែម្តង ។ អាស្រ័យហេតុនេះ ទើបមានពិធីសំពះព្រះខែនៅថ្ងៃពេញបូរមី នាខែកត្តិក តរៀងមកដល់សព្វថ្ងៃនេះ ។

**-ពិធីអកអំបុក** ៖ ក៏មានតំណាលពីព្រះពោធិសាត់យោនយកកំណើតជាសត្វទន្សាយដូចគ្នាដែរ ។ ហើយដោយខែកត្តិក ស្រូវចាប់ផ្តើមទុំនោះ ប្រជាអ្នកស្រុកតែងតែច្រូតស្រូវទុំដំបូងនោះមកធ្វើជាចំណីម្យ៉ាងហៅថា "អំបុក" ដោយគេយកស្រូវស្រគាលៗនោះមកលីង ហើយយកមកបុកឲ្យ សំប៉ែត អុំយកអង្កាមចេញ ។ វាក៏ក្លាយជាអាហារប្រចាំរដូវ មានរសជាតិឈ្ងុយផ្អែមបែបអាហារម្យ៉ាងពិសេសផងដែរ ។

ហេតុនេះទើបក្នុងពិធីសំពះព្រះខែ គេក៏យកអំបុកនេះទៅថ្វាយលោកខែ ហើយខ្លះមានថែមចេក ដូង ផង ដើម្បីឲ្យមានឱជារសឆ្ងាញ់ ។ ឯការដាក់ថ្វាយចេកនេះ ក៏ជាប់នឹងជំនឿដែលថា សត្វទន្សាយចូលចិត្តស៊ីចេក ហេតុនេះទើបគេយកចេកជាដង្វាយទន្សាយពោធិសាត់យ៉ាងនេះ ។

ឯពាក្យថា "អកអំបុក" គឺដោយសារថាអំបុកនេះវាងាយនឹងកំពប់ណាស់ក្នុងការបរិភោគ ដូចនេះគេមានរៀបបរិភោគម្យ៉ាងដោយចាប់ អំបុកដាក់នឹងថ្នក់បាតដៃ រួចរលោក់អកបញ្ចូលមាត់ដែលងើយហារចាំ ធ្វើបែបនេះគេហៅថា "អកអំបុក" ហើយដោយក្រោយពីដាក់ថ្វាយលោកខែមួយ អស់ធូបមក ចាស់ក្មេង ប្រុសស្រី ដែលនៅជិតជុំក្នុងពិធី ត្រូវបានគេឲ្យអំបុកនេះអកនោះ ទើបសន្មត់ពិធីនេះថា "អកអំបុក" ។

របៀបប្រារព្ធពិធីបុណ្យ ៖

-អុំទូក គេផ្តើមធ្វើនៅថ្ងៃ១៤កើត ដល់១រោជខែកត្តិក នៅមុខព្រះបរមរាជវាំង ក្រុងព្រះពេញ ចាប់ពីម៉ោង១២ថ្ងៃត្រង់ (ឆ្នាំនេះអាចផ្តើម ពីម៉ោង១០ទៅ ពីព្រោះចំនួនទូកច្រើន) រហូតដល់

*(តទៅទំព័រទី 28 ញ)*

# បច្ចុប្បន្នភាពនៃរឿងមិនគួរកើតឡើងនៅកម្ពុជា

## • បុរសម្នាក់ត្រូវឃ្មុំទិចស្លាប់យ៉ាងអណោចអធម្ម

បុរសម្នាក់ត្រូវរងគ្រោះដល់ស្លាប់ ព្រោះតែឃ្មុំចង្អេរបានទិចប្រហែលជា៥០ទ្រនិច ។ ហេតុការណ៍ពីចុងខែតុលានោះ គឺ បណ្តាលពីក្មេងៗនាំគ្នាយកដុំដីគប់ឃ្មុំចង្អេរ(ឃ្មុំធំ)ខណៈដែលអ្នកភូមិអូរស្នួត ឃុំតាសាញ ស្រុកសំឡូត ខេត្តបាត់ដំបង ប្រមាណជាង១០ នាក់ កំពុងតែនាំគ្នាស្រូតសណ្តែងសៀងជិតនោះ ។ ហើយពេលដែលក្មេងគប់ធ្លាក់មេមួយដុំធំមកនោះ មេឃ្មុំក៏ហើរមកទិចអ្នកច្រូតបួន ១០នាក់នោះរត់ប្រាសអាយុសរៀងៗខ្លួន ។ ចំណែកជនរងគ្រោះ លោក ទឹម ផា អាយុ៥៤ឆ្នាំ ដោយរត់ទៅទាក់នឹងដើមសណ្តែកដួល ក៏ត្រូវឃ្មុំព័ទ្ធតិចច្រើនជាងគេ ដល់៥០ទ្រនិចរហូតដល់ស្លាប់ ឯអ្នកផ្សេងទៀតគេត្រូវឃ្មុំទិច៤-៥ ខ្លះដល់១០ទ្រនិចដែរ តែមិនដល់ ថ្នាក់ស្លាប់ទេ ។/

## • តូចចិត្តចាញ់ល្បែង និងខឹងប្រពន្ធបន្ទោសចាក់សាំងដុតខ្លួនទាំងរស់

បុរសម្នាក់ទំនងតូចចិត្តខឹងចាញ់អាប៉ោងអស់ទ្រព្យធនរលាយរលត់គ្រួសារ ហើយមកផ្ទះត្រូវប្រពន្ធស្តីបន្ទោសឲ្យទៀត ដល់ ពេលយប់ស្ងាត់ក៏ចាក់សាំងដុតខ្លួនទាំងរស់រហូតស្លាប់បង់ និងឆេះដោយទាំងផ្ទះខ្ទេចហ្មត់ កាលពីថ្ងៃទី២ វិច្ឆិកា ២០០៧ ។ ហេតុការណ៍ នេះកើតនៅភូមិកែវឡា ឃុំពន្លៃ ស្រុកបរិបូរណ៍ ខេត្តកំពង់ឆ្នាំង បង្កដោយឈ្មោះ នុត សារឿន អាយុ៤៩ឆ្នាំ ប្រពន្ធឈ្មោះ ហួត សុខា និងមានកូន៤នាក់ ។/

## • ឪពុកតិរច្ឆានរំលោភកូនឯងដល់ទៅពីរលើក

ជារឿងអាស្រូវកើតនៅភូមិត្នោត ស្រុកក្រគរ ខេត្តពោធិសាត់ ដែលឪពុកជាសត្វតិរច្ឆាននេះត្រូវបានសមត្ថកិច្ចចាប់ឃាត់ខ្លួន បញ្ជូនទៅតុលាការហើយ ។ កូនស្រីអាយុ១៣ឆ្នាំ បានប្រាប់បងៗ និងប៉ូលិសថា ឪពុកឈ្មោះ ញែម មាស អាយុ៤៩ឆ្នាំនេះ បានប្រព្រឹត្ត អំពើអនាចារនេះបួនលើកមកហើយ តែធ្វើបានសំរេចតែពីរលើកទេនៅមាត់បឹង ហើយលើកក្រោយនេះនាងបានរត់មកឲ្យបងប្រុសជួយ ទាន់ ហើយបងប្រុសក៏ប្តឹងឲ្យប៉ូលិសចាប់ឪពុកដាក់គុកតែម្តង ។/

## • ប្អូនប្រុសខាងប្តី ចាប់ប្អូនស្រីខាងប្រពន្ធរំលោភ ហើយកាច់បំបាក់.កសម្លាប់

ជារឿងរ៉ាវគួរឲ្យសង្វេគសម្បើមណាស់ ដែលក្នុងគ្រួសារតែមួយបានកើតមានរឿងឃាតកម្មយ៉ាងព្រៃផ្សៃ ព្រោះតែប្អូនប្រុស ខាងប្តី បានចាប់ប្អូនស្រីខាងប្រពន្ធរំលោភ ហើយកាច់បំបាក់.កសម្លាប់ទាំងអាក្រាតកាយ ។ ហេតុការណ៍នេះកើតឡើងនៅឃុំស្វាយ អំពារ ស្រុកកំពង់លែង ខេត្តកំពង់ឆ្នាំង ដោយសារតែយុវជន នាង នីន អាយុ១៨ឆ្នាំ បានចាប់រំលោភក្មេងស្រី រឿន ម៉ារីន អាយុ១៣ឆ្នាំ ហើយកាច់បំបាក់.កសម្លាប់ រួចលីយកទៅបោះចោលក្នុងបឹងទាំងកាយអាក្រាត ។ ក្រោយបែកការណ៍ប៉ូលិសតាមចាប់បានជនល្មើស នៅខេត្តកំពង់ស្ពឺ និងបានបញ្ជូនទៅតុលាការដើម្បីវិនិច្ឆ័យទោស ។ នាង នីន ត្រូវជាប្អូនបង្កើតរបស់ឈ្មោះនាង ណាត ហើយប្រពន្ធ ឈ្មោះ រឿន បុន ត្រូវជាបងស្រីបង្កើតរបស់ជនរងគ្រោះដែលស្លាប់ ។ ជនល្មើស និងជនរងគ្រោះជាមនុស្សនៅក្នុងគ្រួសារតែមួយ ។/

## • ឪពុកមាច្របាច់.កក្មួយអាយុ៩ឆ្នាំ ព្រោះខឹងគប់អាចម៍គោប្រឡាក់ជញ្ជាំង

វាជារឿងមិនគួរកើតទេ តែថាឪពុកមាចិត្តអន្សត្ថិយ ឈ្មោះ សាត ស្រី អាយុ៤០ឆ្នាំ ដោយគ្រាន់តែខឹងក្មួយបង្កើតឈ្លោះគ្នា ហើយគប់អាចម៍គោប្រឡាក់ជាប់ជញ្ជាំងផ្ទះ ក៏ស្ទុះទៅច្របាច់.កក្មួយយួរជើងផុតដីរហូតដល់សន្លប់ ហើយនៅពេលម្តាយក្មេងមកសួរ និងបន្ទោសតិចតួចនោះ សាត ស្រី បានទាំងយកកាំបិតគំរាមសម្លាប់បងស្រីបង្កើតខ្លួនថែមទៀត បើកុំតែអ្នកភូមិដា ឃុំដា ស្រុកក្រចេះ ខេត្តក្រចេះ មកជួយអន្តរាគមន៍ទាន់ កុំអីអាចកើតជារឿងសោកសៅទៀតមិនខាន ។/

## • ផឹកស្រវឹងរាំចាក់ក្បាច់លើម៉ូតូទៅបុករថយន្តស្លាប់ទាំងពីរនាក់

យុវជនពីរនាក់បានស្លាប់បន្តគ្នា ខណៈបានជួបគ្រោះថ្នាក់ចរាចរពេលដែលគេទាំងពីរស្រវឹងហើយជិះម៉ូតូរាំចាក់ក្បាច់ពេញផ្លូវ ហើយធចង្កូតទៅបុករថយន្តដែលមកបញ្ច្រាស់ទិសគ្នាពេញមួយទំហឹង។ ប៉ូលិសចរាចរនិយាយថា ឈ្មោះ គុជ ចន្ថា អាយុ២២ឆ្នាំ មាន ទីលំនៅឃុំបាក់ខែង ស្រុកមុខកំពូល ខេត្តកណ្តាល និងឈ្មោះ មាន រស្មី អាយុ២១ឆ្នាំ មានទីលំនៅឃុំឫស្សីជ្រោយ ស្រុកមុខកំពូល ខេត្តកណ្តាល បានស្លាប់បន្តគ្នានៅឯមន្ទីរពេទ្យ ក្រោយពេលជួបគ្រោះថ្នាក់ចរាចរដោយការជិះម៉ូតូទៅបុករថយន្តម៉ាកតូយ៉ូតាក្សូឡា មួយគ្រឿងនៅចំណុចផ្លូវលេខ២៧១ មុខវិទ្យាល័យជា ស៊ីម ក្នុងសង្កាត់បឹងសាឡាង ខណ្ឌទួលគោក ។ សាក្សីប្រាប់ប៉ូលិសថា មុនពេល ជួបគ្រោះថ្នាក់ គេឃើញជនរងគ្រោះបើកម៉ូតូបណ្តើររាំ ចាក់ក្បាច់បណ្តើរ មើលទៅដូចជាសប្បាយខ្លាំងណាស់ ។/

(តមកពីទំព័រទី 27 ញ)

ម៉ោង១៨ល្ងាច ក៏ចាប់បន្តការដុតកាំជ្រួច និងបណ្តែតប្រទីបផ្កាលា តាំងភ្លើងចម្រុះពណ៌មានទី រមណីយដ្ឋាននានាទូទាំងរាជធានី រួមនិងការសម្តែងសិល្បៈផង ។

នៅរាជធានីផែមុខព្រះបរមរាជវាំង មានប្រគំតន្ត្រីមហោរី...(តាមបុរាណ)។ (នៅមានពិធីថ្មីៗខ្លះទៀត ដែលគណៈកម្មាធិការបុណ្យជាតិ ឆ្នាំនីមួយៗចាត់ឡើង ដើម្បីមានភាពអធិកអធម និងសប្បាយរីករាយ តម្រូវតាមសភាពការណ៍ឆ្នាំនីមួយៗ) ។

-ពិធីសំពះព្រះខែ អកអំបុក គេប្រារព្ធជាមួយគ្នានៅថ្ងៃ១៥កើត ខែកក្តិក វេលាម៉ោង១២អាធ្រាត្រ មានការសែនអំបុក ដូង ចេក ទឹក នៅទីកណ្តាលវាល ដោយមានការបួងសួងសុំសុខសិរីមង្គលផងដែរ ។ ក្នុងពិធីគេមានលេងល្បែងប្រជាប្រិយ ច្រៀងកំដរបរិយាកាសផង ។ ចាស់ទុំទាន រៀបឲ្យក្មេងៗស្លាប់ និងនាំក្មេងមើលរូបទន្សាយក្នុងព្រះចន្ទ ដើម្បីបន្តជំនឿ ហើយពេលបាត់គេសំពះ អកអំបុក ដេញបញ្ចុកគ្នាសប្បាយរីករាយ ។ មាន របៀបអកមួយគឺ គេកាន់អំបុកអកខ្លួនឯង ហើយទៅបញ្ចុកអ្នកផ្សេងទៀត ដោយឲ្យអ្នកនោះហាមាត់ ហើយសួរថា "ពេញហើយនៅ?...?...?" នៅពេលគេឆ្លើយថា "ពេលហើយៗ...!" អ្នកខាងក្រៅទាំងអស់ក៏បន្ទរថា "សាធុ...សាធុ...!" ។

កិច្ចប្រារព្ធពិធី គេអាចធ្វើនៅតាមលំនៅដ្ឋាន និងទីវត្តអារាមនានា ព្រោះមានទីធ្លាស្រឡះ អាចមើលឃើញព្រះចន្ទល្អ ហើយក្រៅពីចេក អំបុក ដូង គេក៏អាចយកភោគផលនានា ដែលបង្កបង្កើនបានមកបូជាព្រះខែបានដែរ ដោយមានធ្វើក្ដោងទង់ជាតិបូជាសម្គាល់ផង ។

នៅព្រះបរមរាជវាំង មានពិធីរួមមួយសំរាប់ប្រទេស ហើយក៏មានការបួលទឹកភ្លៀងនិងភោគផលដំណាំ ដោយការសម្រេចក៏ទៀនផងដែរ ។ តាមភូមិស្រុកចាស់ៗក៏នាំគ្នាបួលមើលពីទំនាយស្រុកភូមិតាមកំណត់ក្នុងទៀន បើស្រក់ច្រើនពីល្អ ឫមិនល្អ តាមទៀនដែលបួលនីមួយៗបានស្រក់ ។ ដោយឡែកពិធីប្រារព្ធនៅព្រះបរមរាជវាំងរាជធានី ដោយមានព្រះមហាក្សត្រ ជាតំណាងប្រទេសជាតិទាំងមូលតែម្តង ។/

ខ្មែរប៉ុស្តិ៍

(តមកពីទំព័រទី 25 ច)

ការបោះឆ្នោតនាពេលខាងមុខ ព្រោះគូប្រជែង Dee នាឆ្នាំក្រោយដែលមិនទាន់បញ្ចេញឈ្មោះ ជាអ្នកមានលុយកាក់គាំទ្រពីអ្នកមានៗ ជាសេដ្ឋី ឬ Union ជាដើម។

ចំណែកមតិផ្សេងៗទៀតលើកឡើងថា គេមិនទាន់អាចទស្សន៍ទាយ ដឹងប្រាកដថា អ្នកមានលុយកាក់ អាចទទួលជោគជ័យបានប្រាកដ 100% នោះទេ ។ ដោយមតិចុងក្រោយនេះលើកយកព្រឹត្តិការណ៍មួយ កាលពីការបោះឆ្នោតឆ្នាំ ២០០៧ គូប្រជែង Dee ឈ្មោះ AL Auspin ជាអ្នកមានលុយ ដែលជំរុញគាំទ្រដោយក្រុមខ្មែរមួយក្រុម ជាពួកឈ្មួញពាណិជ្ជករធំៗ ដែលគ្រប់ៗគ្នាសង្ឃឹមថា AL Auspin ឈ្នះ ឆ្នោត ។ ប៉ុន្តែលទ្ធផលចុងក្រោយត្រូវធ្លាក់ទៅ Dee Andrews ដែលម្នាក់ៗមិនស្មានដល់ថាល្អបន្តិចណាសោះ ។ វាមិនខុសពីពាក្យថា "បើអាប៉ោងមិនទាន់បើកគ្រប់គ្មាននរណាទាយបានថាលេខប៉ុន្មានទេ ? ពីរអ៊ុត ឬ ៣ ទទឹងនោះ ?"។

Dee Andrews អាយុ៦៦ឆ្នាំ មានកូនស្រីពីនាក់ ជាអតីតសាស្ត្រាចារ្យ សាលាវិទ្យាល័យ Poly និង Wilson បន្ទាប់មកដល់ Dee ក្លាយជាចៅសង្កាត់លេខ៦ កាលពី៣ភាគកណ្តាលឆ្នាំនេះ ។ ទសវត្សឆ្នាំ១៩៥០ Dee ជាសិស្សពូកែនៃវិទ្យាល័យ Poly ខាងរត់ប្រណាំង (Track Star) និងនៅសាកលវិទ្យាល័យ Long Beach, Dee ជាអ្នកលេងបាល់ពូកែម្នាក់ (Pro football) ដែលជា អតីតយុវវ័យ ម្នាក់នេះមានការស្រលាញ់រាប់អានពីមិត្តរួមថ្នាក់សាលាជាមួយ ។

ក្នុងបទសម្ភាសន៍តាមទូរស័ព្ទ Dee Andrews បានប្រាប់ខ្មែរប៉ុស្តិ៍ឲ្យដឹងថា ការប្រកាន់ភាពសច្ចៈ, យុត្តិធម៌, មិនកុហកបោកប្រាស ក្នុងនាមមនុស្សទៀងត្រង់ ចូលចិត្តជួយថែរក្សា ការពារដល់អ្នកដទៃ ។ ដែលកត្តាទាំងអស់នេះហើយ ដែលនាំឲ្យគាត់មានមិត្តភ័ក្តិស្រលាញ់ រាប់អានច្រើន ។

ជុំវិញមនោសញ្ចេតនា ជាមួយបងប្អូនខ្មែរ Dee បានបង្ហាញទឹកចិត្តថា វាសឹងតែជាតិសាសន៍តែមួយហើយតាំងពីឆ្នាំ១៩៧៥ ដែលគាត់រស់នៅក្នុងសង្គមខ្មែរ ព្រោះបងប្អូនបានរាប់អានស្រលាញ់ស្និទ្ធស្នាល មិនប្រកាន់វណ្ណៈពណ៌សម្បុរដែលមិត្តខ្មែរតែងហៅគាត់ថា "តាខ្មៅ" ឬ "អាខ្មៅ" ដែលសម្តីនេះមិនបញ្ជាក់ថាស្អប់ទេ! បងប្អូនខ្មែរចង់បង្ហាញពីទឹកចិត្តស៊ីជម្រៅក្នុងការស្រលាញ់រាប់អាន ខណៈដែលមានជាតិ សាសន៍ផ្សេងៗគេមិនសូវចូលចិត្តរាប់អានគាត់ ព្រោះតែឃើញគាត់ក្រនោះ ។

Dee បានបញ្ជាក់សំដីថា បងប្អូនខ្មែរបានជួយផ្តល់សន្លឹកឆ្នោតឲ្យរូបខ្ញុំ ជាប់ឆ្នោតជាចៅសង្កាត់ ។ ដូច្នេះខ្ញុំត្រូវអនុវត្តធ្វើការដើម្បីប្រជាជនទៅតាមតួនាទី និងភារកិច្ច ដោយគាត់សង្ឃឹមថា ការបោះឆ្នោតឆ្នាំ២០០៨ជាថ្មីម្តងទៀត បងប្អូនខ្មែរនឹងនៅតែបន្តការគាំទ្រ បើប្រជាជនខ្មែរយល់ថា គាត់ជាមនុស្សល្អ ។/

ខ្មែរប៉ុស្តិ៍



(តមកពីទំព័រទី 21 ឈ)
មែនតែការពុករលួយ ដែលបានកើតមានខ្លះមែននៅក្នុងរបបសាធារណរដ្ឋ វាមានដោយអន្លើរៗមិន ទាន់រាយប៉ាយគ្រប់ទិសទី គ្រប់ស្រទាប់ គ្រប់ជាន់ថ្នាក់នៃសង្គមនៅឡើយ ហើយវាមិនមែនជាកម្មសិទ្ធិផ្ទាល់ដៃរបស់នាយទាហានជាន់ខ្ពស់ មន្ត្រីស៊ីវិលណាឡើយ ។

ទោះជាយ៉ាងណាក្តី គេមិនត្រូវប្រហែស ឬអនុញ្ញាតឲ្យការពុករលួយ កើតនៅទីណាមួយ ហើយទើបងាកទៅដាក់កំហុស លើជនឯទៀតឡើយ ។ ជាការគួរឲ្យ សោកស្តាយណាស់ ដែលរហូតមកដល់ថ្ងៃនេះ គេតែងឮគេនិយាយថា កម្ពុជាជាជង្រុកនៃការពុករលួយ ។

-ពួកបញ្ញវ័ន្តបានស្តីបន្ទោស សម្តេចសីហនុ ថា បានធ្វើឲ្យប្រទេសជាតិធ្លាក់ក្នុងក្តីអន្តរាយ ព្រោះតែនយោបាយព្រះអង្គ គាំទ្រគោលនយោបាយពួកយួនយៀកកុង និងវៀតណាមខាងជើង រួមជាមួយពួកខ្មែរក្រហមផងនោះ ។ ចំណែកអតីតស្តេចផែនដី នរោត្តម សីហនុ ធ្លាប់វាយប្រហារយ៉ាងធ្ងន់ៗចំពោះអតីតរបបសាធារណរដ្ឋខ្មែរ របស់លោកសេនាប្រមុខ លន់ នល់ ថា បានក្បត់ព្រះអង្គធ្វើរដ្ឋប្រហារបង្កឲ្យកោះសន្តិភាពឯករាជ្យអព្យាក្រិត្យមួយនេះធ្លាក់ចូលក្នុងភ្លើងសង្គ្រាម បំផ្លាញការអភិវឌ្ឍន៍ និងស្នាដៃសង្គមរាស្ត្រនិយមដែលកំពុងតែរីកចំរើន ក្រោមការគាំទ្រពីពួកចក្រព័ត្តិអាកាំង ។ ចំណែកអតីតប្រមុខរដ្ឋខ្មែរក្រហម ខៀវ សំផន ក៏បានវាយប្រហារអាមេរិក ថាបានធ្វើឲ្យកម្ពុជាមានសង្គ្រាម ដែលការមានសង្គ្រាមនោះហើយដែលបង្កឲ្យមានខ្មែរក្រហម ។

ក្នុងឯកសាររបស់អតីតឯកអគ្គរដ្ឋទូត ក្នុងសម័យសង្គ្រាមឆ្នាំ១៩៧៤ និង១៩៧៥ លោក ឌីន មានបំណងចង់យាងសម្តេចព្រះនរោត្តម សីហនុ ដែលគង់នៅទីក្រុង ប៉េកាំង ក្នុងឋានៈជាប្រមុខដ៏សំខាន់នៃក្រុមចម្រុះមួយ ជាមួយពួកកុម្មុយនីស្តខ្មែរមកធ្វើកិច្ចចរចា ជាមួយសាធារណរដ្ឋខ្មែរ ដែលមានលោក លន់ នល់ ជាប្រធានាធិបតី ក្រោមការជួយគាំទ្រសហរដ្ឋអាមេរិក ។ លោក ឌីន ចង់ឲ្យរដ្ឋាភិបាលក្រុងវ៉ាស៊ីនតុន ស្វែងរកមធ្យោបាយគ្រប់ផ្លូវដែលមានដើម្បីនឹងទាក់ទាញឲ្យពួកកុម្មុយនីស្តចូល ជាកម្លាំងចម្រុះមួយ ជាមួយសាធារណរដ្ឋ ហើយនិងកងទ័ព លន់ នល់ ដែលនៅសល់ក្រុមមេដឹកនាំសាសនា និងភាគីដទៃទៀត ។ ដោយអតីតឯកអគ្គរដ្ឋទូត ឌីន ម្នាក់ នេះគិតថាកម្លាំងចុះទ្រុឌទ្រោម របស់សាធារណរដ្ឋនឹងទប់ទល់បានជោគជ័យ ជាមួយកម្លាំងឡើងឥទ្ធិពលរបស់ពួកកុម្មុយនីស្ត ។ ដោយលោកបានហៅថាជាគំនិតនេះថា ជាការដោះស្រាយមិនស្ងប់ណាមួយតាមរយៈកិច្ចចរចាគ្នា របស់លោក ។ ហើយថាការដោះស្រាយមិនស្ងប់ណាមួយនឹងអាចបណ្តាលឲ្យមានមហន្តរាយដ៏ធំសំរាប់ ប្រជាពលរដ្ឋខ្មែរទាំង៧លាននាក់ ។

ក្នុងរយៈពេលជាច្រើនខែ លោក ឌីន បានខំជម្រុញ និងអំពាវនាវទទូចឲ្យមានដំណោះស្រាយដ៏ស្ងប់មួយតាមរយៈកិច្ចចរចានេះ ។ មកដល់ខែកុម្ភៈ លោករដ្ឋមន្ត្រី ការបរទេស លោក ឃីស៊ីងហ្គ័រ មានសេចក្តីនឿយណាយជាមួយនឹងបូជនីយកិច្ចនេះ លោក ឃីស៊ីងហ្គ័រ បានសរសេរតបនឹងលោក ឌីន វិញថា ពួកកុម្មុយនីស្តកំពុងរាំង ស្ទះកិច្ចចរចាគ្នា ដោយចង់ដណ្តើមយកជ័យជំនះដោយកម្លាំង ហើយថាសម្តេច សីហនុ ឥឡូវនេះទ្រង់មិនអាចជួយដឹកនាំឲ្យមានដំណោះស្រាយមួយបានទេ។ លោក ឃីស៊ីងហ្គ័រ ក៏ថែមទាំងបានបរិហារិះគន់លោកឯកអគ្គរដ្ឋទូតនោះវិញដែរ ។

លោក ឌីន បានបន្ទោសលោក ឃីស៊ីងហ្គ័រ ចំពោះបរាជ័យរបស់លោក នៅក្នុងការឈោងដៃ ទៅរកសម្តេច សីហនុ និងពួកកុម្មុយនីស្តខ្មែរ នៅពេល១ឆ្នាំមុននេះ ហើយនៅពេលនេះលោក ឃីស៊ីងហ្គ័រ ជាមន្ត្រីខ្ពស់ដ៏មានអំណាចម្នាក់នៅក្នុងរដ្ឋាភិបាលអាមេរិក ។

នៅរដូវវស្សាឆ្នាំ១៩៧៤ លោក ឌីន បានសម្រេចថា សាធារណរដ្ឋខ្មែរ អាចទប់ទល់បាននឹងពួកបះបោរ ។ ប៉ុន្តែពួកកុម្មុយនីស្តកាន់តែខិតជិតឡើងៗ ហើយមិន ឃើញមានសញ្ញាណាមួយបង្ហាញថា នឹងមានកិច្ចការចរចាគ្នាទេ ។ ចប់រដូវវស្សាភ្លាម ពួកកុម្មុយនីស្ត បានបើកធ្វើការវាយប្រហារដ៏ធំសាហាវ របស់ខ្លួនដែលបង្ហាញឲ្យ ឃើញនូវការចាប់ផ្តើមនៃទីបញ្ចប់របស់សាធារណរដ្ឋខ្មែរ ។ ក៏ប៉ុន្តែលោកឯកអគ្គរដ្ឋទូត ឌីន នៅតែមិនព្រមបោះបង់ចោលដំណោះស្រាយដ៏ស្ងប់របស់លោក ដោយនៅ តែខំស្វះស្វែងរកផ្លូវដោះស្រាយនេះ ហូតដល់ថ្ងៃបញ្ចប់របស់លោក នៅពេលគណៈបេសកកម្មរបស់ ស.រ.អា ត្រូវដកថយចេញពីទីក្រុងភ្នំពេញ នៅក្នុងពេលមិនដល់១ សប្តាហ៍ផង ពីថ្ងៃទី០១ នៃឆ្នាំសូន្យ ។

ពួកកុម្មុយនីស្ត ជឿជាក់អំពីជ័យជំនះខ្លួន ហើយមិនធ្វើការចរចាជាដាច់ខាត ។ ថ្ងៃទី១០ មេសា ពួកគេបានវាយបំបែកខ្សែក្រវ៉ាត់ ការពាររដ្ឋធានីភ្នំពេញ ។ នៅថ្ងៃបន្ទាប់លោក ឌីន បានដឹកនាំបុគ្គលិករបស់លោក ឡើងឧទ្ធម្ភាគចក្រ ដោយពាក់ទង់ជ័យអាមេរិក នៅនឹងដៃរបស់លោកការពារមិនឲ្យគេយកទៅដុត ។/

(តមកពីទំព័រទី 3 យ)
ទៀតដឹកនាំដោយលោក ថាច់ សេដ្ឋា។ ការបែកគ្នាពេលមុនក៏កំពុងដើរមកដល់ដំណាក់កាលថ្មី ដែលអ្នកទាំងបីទិន្ន ជាអាចជួបសហការគ្នាវិញបាន យោងទៅតាមព័ត៌មានដែលយើងទទួលបានពីកិច្ចប្រជុំ នៅហ្វីឡាដែលហ្វីយ៉ា កាលពីខែមុន ។ យើង នឹងបន្តជូនដំណឹង នៅពេលមានព្រឹត្តិការណ៍ថ្មីកើតឡើង ។/

យើងនឹងបន្តជូនដំណឹង នៅពេលមានព្រឹត្តិការណ៍ថ្មីកើតឡើង ។/

ខ្មែរប៉ុស្តិ៍

## ឆាជីប្រវត្តិសាស្ត្រ ៖

# ពីរចនាសម្ព័ន្ធ "កុលសម្ព័ន្ធ" ទៅរដ្ឋចាលជាតិ

*រៀបរៀងដោយ ៖ ពិន សំខុន*

នៅក្នុងភាគថ្មីនេះ គឺជាវគ្គដែលនឹងនាំឲ្យមានការផ្លាស់ប្តូរសំខាន់ៗ ថ្មីៗ ក្នុងព្រឹត្តិការណ៍ដែលមនុស្សចាស់ៗជាច្រើន នៅចាំ ប្រវត្តិទាំងនោះយ៉ាងជាក់ច្បាស់នៅឡើយ ហើយខ្លះទៀតដឹងដោយអន្លើ ហើយពុំអាចចងប្រវត្តិកម្ពុជាសម័យនោះឲ្យជាប់គ្នាដើម្បីងាយ យល់បានឡើយ។ នៅវគ្គនេះយើងនឹងបានឃើញបុព្វបុរស ឬក៏វិរបុរសសម័យមុន ចងដៃឲ្យអ្នកជំនាន់ក្រោយរបៀបណា? បានជាប្រជាពលរដ្ឋខ្មែរសម័យនេះ ពុំមានសេចក្តីសុខនៅក្នុងផ្ទៃដីនៃបុព្វបុរសខ្លួន បែរជាមករស់រាយប៉ាយនៅឯបរទេសទៅវិញយ៉ាងដូច្នោះ?

**ឆ្នាំ១៩២១៖** នាថ្ងៃទី៣១ តុលា សម្តេចនរោត្តម សីហនុ បានចាប់កំណើត ហើយត្រួតត្រាអំណាចលើកម្ពុជាយ៉ាងផ្តាច់មុខ ចាប់តាំងពីឆ្នាំ១៩៤១ទៅ គឺជាថ្ងៃដែលព្រះអង្គម្ចាស់បានក្លាយទៅជាព្រះរាជា ព្រះបាទនរោត្តម សីហនុ វរ្ម័ន ថ្ងៃទី ២៨ តុលា ។

**ឆ្នាំ១៩២២** ៖ នៅពាក់កណ្តាលខែមេសា ប្រជាពលរដ្ឋជាទូទៅនាំគ្នាបះបោរ ដោយមានបារាំងតម្លើងពន្ធដារខ្ពស់ហួសហេតុ គឺជាពន្ធដែលខ្ពស់ជាងគេ ក្នុងបណ្តាអាណាចក្រនៃអាណានិគមបារាំងទាំងអស់។ នៅកំពង់ឆ្នាំង ស្រុកក្រាំងលើ បាតុករបានសម្លាប់ចៅហ្វាយ ខេត្តបារាំង ឈ្មោះ បារដែស៍ (Bardez) ពេលនោះបារាំង បានបង្ក្រាបបាតុករយ៉ាងសាហាវ មានចាប់មនុស្សជាច្រើន កាត់ទោសប្រហារ ជីវិតម្នាក់និងទោសជាប់គុកមួយជីវិត៥នាក់។ ពេលនោះអ្នកសរសេរសៀវភៅបារាំងម្នាក់ ដ៏ល្បីល្បាញឈ្មោះ អង់ដ្រេ ម៉ាល់រ៉ូ (André Malraux) បានបរិយាយក្នុងទំព័ររបស់ខ្លួននៅព្រៃនគរ LIndochine Enchainee ថា៖ សេចក្តីរាយការណ៍រដ្ឋបាលបារាំង បានបំភ្លៃការបះបោរតវ៉ារបស់ពលរដ្ឋខ្មែរថា ជាអំពើចោរព្រៃទៅវិញ ។

**ឆ្នាំ១៩២៧៖** (ថ្ងៃទី៩ ខែសីហា) ព្រះបាទស៊ីសុវត្ថិ ចូលទីវង្គត់

**ឆ្នាំ១៩២៨៖** (២០ កក្កដា) ព្រះបាទ ស៊ីសុវត្ថិ មុនីវង្ស ឡើងគ្រងរាជ្យ

-ប៉ុល ពត កើតនៅថ្ងៃទី២៥ ខែឧសភា ឆ្នាំ១៩២៨

**ឆ្នាំ១៩៣០** ៖ ហូជីមិញ បង្កើតបក្សកុម្មុយនីស្តឥណ្ឌូចិន (ថ្ងៃទី១៣ ខែកុម្ភៈ)

-ថ្ងៃទី១២ខែឧសភា សម្តេចពុទ្ធិកសាសនបណ្ឌិត សំរាប់ថេរវាទ ដែលជាបំណងស្តេចខ្មែរ និងស្តេចលាវរួមគ្នាស្នាដៃនេះគឺជាមជ្ឈមណ្ឌល ដ៏សំខាន់មួយសំរាប់ក្រុមបញ្ញាវន្តខ្មែរហើយបណ្ណាល័យជាតិ ក៏បញ្ចូលទៅក្នុងជាមួយនោះដែរ ។

-ថ្ងៃទី២៧ ខែកក្កដា កំណើត ខៀវ សំផន ។

**ឆ្នាំ១៩៣៣** ៖ លោក សឺង ង៉ុកថាញ់ មានដើមកំណើតនៅត្រាវិញ (កើតឆ្នាំ១៩០៨) រៀនបឋមសិក្សានៅព្រៃនគរ, រៀនមធ្យមសិក្សានៅប្រទេសបារាំង ។ លោកត្រឡប់មកកម្ពុជាវិញ បានធ្វើការជាចៅក្រមនៅពោធិ៍សាត់, ធ្វើសុភាពបុរសនៅភ្នំពេញ ហើយបន្ទាប់មកធ្វើជានាយករងរបស់ពុទ្ធិកសាសនបណ្ឌិត ។

**ឆ្នាំ១៩៣៣៖** សឺង ង៉ុកថាញ់, គឹង ប៉ាចឈឺន បង្កើតកាសែតជាភាសាខ្មែរដំបូងបង្អស់ឈ្មោះ "អង្គរវត្ត" ។ ជាកាសែតនិន្នាការកណ្តាល គាំទ្រការកែទម្រង់រដ្ឋបាល ជាតិនិយម មិនប្រឆាំងនឹងវៀតណាមទេ តែប្រឆាំងនឹងបារាំងយ៉ាងខ្លាំងក្លា ។

**ឆ្នាំ១៩៣៧៖** សន្ធិសញ្ញាបារាំង-សៀម ដើម្បីបញ្ជាក់ពីព្រំប្រទល់ដែនដី ដែលព្រមព្រៀងគ្នាកាលពីឆ្នាំ១៩០៧ និង១៩២៥ គឺសៀមបានប្រគល់ខេត្តបាត់ដំបង ស៊ីសុផុន និងសៀមរាបឲ្យមកខ្មែរវិញ ហើយសន្ធិសញ្ញាសំខាន់មួយនេះ គឺប្រទេសទាំងពីរយល់ព្រមយកតុលាការអន្តរជាតិ ឡាអេ (LAHAYE) មកដោះស្រាយទំនាស់រវាងប្រទេសទាំងពីរ ។

**ឆ្នាំ១៩៣៩** ៖ (ថ្ងៃទី៣១ ខែមករា) សារលិខិតរបស់អគ្គអភិបាលកូសាំងស៊ិន គឺលោក យូល ប្រេវីយេ និយាយអំពីការបែង ចែកដែនសមុទ្រ រវាងកូសាំងស៊ិន ហើយនិងខ្មែរ ។

**ឆ្នាំ១៩៤០** ៖ មានការប្រែប្រួលនយោបាយបារាំងយ៉ាងខ្លាំងក្លា, នៅថ្ងៃទី១០ កក្កដា បារាំងបានប្រែក្លាយពីសាធារណរដ្ឋបារាំង ទៅជារដ្ឋបាល ដែលខិតទៅជិតអាល្លឺម៉ង់ និងជប៉ុន ផ្តាច់ការនិយមហៅថា "របប វីស៊ី" ។

-ថ្ងៃទី៣០ ខែសីហា ៖ សន្ធិសញ្ញាបារាំងជប៉ុន, គឺបារាំងធានាដល់រដ្ឋបាល និងសន្តិសុខនៅឥណ្ឌូចិន ជំនួសយោធាជប៉ុន ។

-ថ្ងៃទី១៧ ខែកញ្ញា ៖ អំណាចកងទ័ពកាន់កាប់ប្រទេសសៀម ទាមទារយកដីខ្មែរពីបារាំងវិញ និងដីលាវមួយភាគទៀត ។

-ថ្ងៃទី១ ខែធ្នូ ៖ រដ្ឋាភិបាលសៀម ចូលដៃជាមួយជប៉ុន ចូលលុកកម្ពុជា ផ្តួលរំលំទ័ពបារាំងបាន, ហើយខែធ្នូដដែលនោះ មានបង្កើតចលនាឥស្សរៈមួយ នៅក្រុងបាងកក ដោយ ប៉ុក យុន ។

**ឆ្នាំ១៩៤១** ៖ នាវាចម្បាំងបារាំងបានវាយតប់នាវាចម្បាំងថៃវិញ នៅកោះចាង ។

-ថ្ងៃទី១៧ ខែមករា ៖ បណ្តាលឲ្យសៀមចុះចាញ់

-ថ្ងៃទី២៣ មេសា ៖ ព្រះបាទស៊ីសុវត្ថិ មុនីវង្ស ចូលទីវង្គត់, តំណាងរដ្ឋបារាំងនៃរបប "វីស៊ី" ឈ្មោះ ឧត្តមសេនីយ៍ ដឺគូ (General Decaux) បានជ្រើសតាំងព្រះអង្គម្ចាស់នរោត្តមសីហនុ ឲ្យស្នងរាជ្យពីព្រះបាទ មុនីវង្ស ដែលត្រូវជាជីតាខាងព្រះមាតា របស់ព្រះអង្គ ។

-ថ្ងៃទី៩ ខែមេសា ៖ បារាំង និងសៀម បានចុះហត្ថលេខាជាមួយគ្នានៅតូក្យូ ប្រទេសជប៉ុន គឺបារាំងត្រូវប្រគល់ខេត្តបាត់ដំបង ផ្នែកខាងជើងនៃសៀមរាប ខេត្តកំពង់ធំ និងខេត្តស្ទឹងត្រែង ឲ្យទៅសៀម លើកលែងតែរង្វង់នៃ "អង្គរវត្ត" ចេញ ត្រូវនៅជាខ្មែរ ។

-ថ្ងៃទី២៩ ខែកក្កដា ៖ កិច្ចព្រមព្រៀងរដ្ឋបាល និងជប៉ុន ឈ្មោះ ដាឡង់ កាតូ (DARLAN-KATO) ចុះហត្ថលេខានៅ វីស៊ី នៃប្រទេសបារាំង អនុញ្ញាតឲ្យជប៉ុនមកឈរជើងនៅកម្ពុជា ។

-ថ្ងៃទី២៨ ខែតុលា ៖ ពិធីអភិសេកការឡើងគ្រងរាជ្យព្រះបាទនរោត្តម សីហនុ វរ្ម័ន ជាព្រះចៅក្រុងកម្ពុជា ។

*សូមអញ្ជើញតាមដានភាគបន្តនៅលេខក្រោយ*

# និយាយអំពីលុយ

**ABOUT MONEY**

១-មានលុយអាចទិញផ្ទះបាន តែពុំអាចទិញលំនៅបានទេ

With Money You Can Buy a House, But Not a Home

២- មានលុយអាចទិញនាឡិកាបាន តែពុំអាចទិញពេលវេលាបានទេ

With Money You can buy a Clock, But Not a Time

៣- មានលុយអាចទិញគ្រែបាន តែពុំអាចទិញដំណេកបានទេ

With Money You can buy a Bed, But Not a Sleep

៤- មានលុយអាចទិញសៀវភៅបាន តែពុំអាចទិញចំណេះបានទេ

With Money You can buy a Book, But Not Knowledge

៥- មានលុយអាចទិញវេជ្ជបណ្ឌិតបាន តែមិនអាចទិញសុខភាពល្អបានទេ

With Money You can buy a Doctor, But Not Good Health

៦- មានលុយអាចទិញតំណែងមួយបាន តែមិនអាចទិញការគោរពបានទេ

With Money You can buy a Position, But Not Respect

៧- មានលុយអាចទិញឈាមបាន តែពុំអាចទិញជីវិតបានទេ

With Money You can buy Blood, But Not Life

៨- មានលុយអាចទិញកាមគុណបាន តែមិនអាចទិញស្នេហាបានទេ

With Money You can buy Sex, But Not Love

សុភាសិតចិននេះ នឹងនាំលាភសក្ការៈដល់អ្នក, វាចេញមកពីប្រទេសនេឌ័រឡែន

This Chinese Proverb Bring Luck, It Originated From the Netherlands

សុភាសិតនេះបានវិល៨ជុំពិភពលោករួចទៅហើយ ឥឡូវនេះដល់វេនអ្នកត្រូវទទួលសំណាងល្អហើយ នៅពេលដែលអ្នកទទួល បានសុភាសិតនេះ ដូច្នេះ សូមអ្នកចម្លងហើយ ផ្ញើលិខិតនេះទៅអ្នកណាដែលត្រូវការសំណាង កុំផ្ញើលុយ ពីព្រោះអ្នកមិនអាចទិញ សំណាងបានទេ តែកុំទុកវាឲ្យលើសបួនថ្ងៃឲ្យសោះ លិខិតនេះបានផ្ញើចេញពី អង់តូនី ដឺក្រៅ ជាគ្រូអាចារ្យនាំដំណឹងល្អទៅអាហ្វ្រិកខាងត្បូង ។

This Proverb Has Gone Luck 8 Times Around The World, Now It is Your Turn to Have Good Luck Only You Have Recent It Send a Copy to The Persons That Really Need Luck, Don't Send Money, Because You Can not Buy Luck, And Do Not keep It More Than 4 Days, This Card Has Been Send By ANTHONY DECROVD, Asissionary In South Africa.

# ហោរាសាស្ត្រប្រចាំខែវិច្ឆិកាថ្ងៃទី ១៦~៣០

**ឆ្នាំ ជូត: (ពង្សទេវតាប្រុស ធាតុទឹក)**



រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការ រីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វើប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីជួញដូរមុននឹងទទួល ឬប្រគល់នូវ មុខទំនិញសព្វសារពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមាន ភាពស្និទ្ធស្នាលដូចប្រក្រតី ។

**ឆ្នាំ ឆ្លូវ: (ពង្សមនុស្សប្រុស ធាតុដី)**



រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេល នេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏មិនត្រូវធ្វើទាំងចិត្តតក់ក្រហល់ដោយខ្វះការពិចារណានោះឡើយ ព្រោះការបើមានការ ភ្លាំងភ្លាត់តែបន្តិចអាចបង់ខាតផលប្រយោជន៍ច្រើន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះ ញង់ ។

**ឆ្នាំ ខាល: (ពង្សយក្សស្ត្រី ធាតុឈើ)**



រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមាន ការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេ ៖ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីៗក៏ដោយ ក៏អាចដំណើរការបានស្រួលដែរ ។ បើជាមេធាវី គ្រូបង្រៀន ឬពិធីករ-ពិធីការិនី នឹងអាច រកប្រាក់ចំណូលបានច្រើន ព្រោះតែពូកែថ្វីមាត់ ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះ មានជោគល្អកម្ររកបាន ព្រោះមានប្រុសៗចោមរោម ស្រលាញ់ ។

**ឆ្នាំថោះ (ពង្សមនុស្សស្រី ធាតុឈើ)**



រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការ រីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកអាចរកផលចំណូលបានច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះការចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិន ខុសពីទុកធំក្តោងធំដែរ គឺបានត្រឹមតែចំណាយពេលវេលា និងកម្លាំងឥតអំពើ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ធ្មត់ទើបបានសេចក្តីសុខ។

**ឆ្នាំ រោង (ពង្សទេវតាប្រុស ធាតុមាស)**



រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបាន ប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំមានការធ្វេសប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីជួញដូរមុននឹងទទួល ឬប្រគល់ទំនិញសព្វ សារពើ ចូរចេះពិនិត្យគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវ ទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍មានរឿងរកាំរកូសច្រើន ។

**ឆ្នាំ ម្សាញ់ (ពង្សមនុស្សប្រុស ធាតុភ្លើង)**



រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបាន ប្រកបការងារអ្វីក៏ដោយ គឺត្រូវធ្វើដោយសន្សឹមៗកុំបំបោល ទើបអាចឈានទៅដល់គោលដៅ តែបើធ្វើទាំងងងឹតងងុលខ្វះការគិតគូពិចារណា និងធ្វើទាំងចិត្តក្តៅក្រហាយ គឺពិតជាអាចរលាយទ្រព្យឆាប់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ បើស្រលាញ់កុំទៅញឹក បើរឭកកុំទៅញយ ទើប សេចក្តីស្នេហាទទួលបានសេចក្តីសុខ ។

**ឆ្នាំ មមី (ពង្សទេវតាស្រី ធាតុភ្លើង)**



រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីក ចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែ ទើបឈានចូលឆ្នាំថ្មី ហើយរាល់កិច្ចការងាររកស៊ីនៅជួននឹងឧបសគ្គខ្លះៗក្តីតែកុំភ័យព្រួយអ្វីឡើយ ព្រោះលោកអ្នកអាចរកដំណោះ ស្រាយបានជ្រះស្រឡះទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រយ័ត្នមានអ្នកទី៣ចូលជ្រៀតជ្រែក។

**ឆ្នាំ មមែ (ពង្សទេវតាស្រី ធាតុមាស)**



រាសីរបស់លោកអ្នកស្រុតចុះយ៉ាងខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ អ្វីដែល លោកអ្នកត្រូវយកចិត្តទុកដាក់នោះ ចូរប្រយ័ត្នប្រយែងចំពោះជនខិលខូចដែលនៅក្បែរៗលោកអ្នក ព្រោះពួកគេមានគំនិតប៉ុនប៉ងធ្វើអំពើ អាក្រក់ដោយមិនចេញមុខ ដូច្នេះត្រូវមានស្មារតីប្រុងប្រយ័ត្នជាប់ជានិច្ច ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ។

**ឆ្នាំ វក (ពង្សយក្សប្រុស ធាតុដែក)**



រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ រាល់ឧបទ្រពចង្រៃ និងរាល់ ឧបសគ្គត្រូវបានសាបរលាបបាត់ស្រមោលអស់រលីង ដូច្នេះលោកអ្នកអាចរកស៊ីជួញដូរបានពេញដៃពេញជើង ហើយទោះជាបានជួបនឹងគូប្រជែង ជើងខ្លាំងចេញមកតតាំងក៏មិនភ័យព្រួយដែរ ព្រោះលោកអ្នកអាចយកប្រៀបឈ្នះជានិច្ច ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខសាន្តក្សេម ក្សាន្ត ។

**ឆ្នាំ រកា (ពង្សយក្សប្រុស ធាតុដែក)**



រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមាន ការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជា លោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចដំណើរការបានស្រួលដែរ ។ ចំពោះអ្នករកស៊ីជួញ ដូរក្នុងរយៈពេលនេះ នឹងមានទ្រព្យ ហូរចូលប្រៀបដូចត្រូវឆ្នោត ព្រោះមានទំនិញលក់ចេញទិញ ចូលឥតទំនេរដៃ ។ ចំពោះគូស្នេហ៍ក្នុងឆ្នាំថ្មីនេះកាន់តែប្រកបដោយភាពផ្អែមល្ហែម ។

**ឆ្នាំ ច (ពង្សយក្សស្រី ធាតុដី)**



រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ លោកអ្នកនឹងបានជួបនូវ គូប្រជែងជើងខ្លាំងចេញមុខមកតតាំង ដូច្នេះចូរចេះរៀបចំជើងព្រួលទុកសម្រាប់ទប់ទល់ជាមុន ទើបមិនលិចលង់ទាន់ តែហាមដាច់ខាតការប្រើ កម្លាំងបាយដោះស្រាយបញ្ហា ព្រោះវាបានត្រឹមតែ ខាតបង់ទាំងសងខាងតែប៉ុណ្ណោះ ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អណាស់ ។

**ឆ្នាំកុរ (ពង្សមនុស្សស្រី ធាតុទឹក)**



រាសីលោកអ្នកល្អជាធម្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ដោយសារតែលោកអ្នកមាន សុខភាពមិនសូវល្អជា និងមានការភ្លេចភ្លាំងច្រើន ដូច្នេះមុនចុះហត្ថលេខា និងផ្តិតស្នាមមេដៃលើ លិខិតស្នាមផ្សេងៗគោងចេះពិនិត្យមើលឲ្យ បានល្អិតល្អន់ ព្រោះកាលបើមានការថ្លោះធ្លោយតែបន្តិចអាចបង់ខាតផលប្រយោជន៍ច្រើន ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អធម្មតា ។/